


ទូរស័ព្ទពាណិជ្ជកម្មខ្មែរប៉ុស្តិ៍
ហ្វីឡាដែលហ្វីយ៉ា

❖សុបិន : (២៦៧) ២៥៣-៣៩៤៧

❖ទូរស័ព្ទ នៅរ៉ូដអាយឡិន

❖សេរី : (៤០១) ៩១៩-៩៩៥៤

ទូរស័ព្ទវិទ្យុសម្លេងខ្មែរអាមេរិកាំង

❖ស៊ីជន : (២១៥) ២៨៤-១៣៤៣

Email : thekhmerpostEC@gmail.com

KHMER BILINGUAL BIWEEKLY NEWSPAPER

VOLUME 02 ISSUE 13 May 08th- 25th 2008 ADVERTISING (267) 253-3947 WWW.THEKHMERPOST.COM



# “ NEW YEAR BABY ” នៅហ្វីឡាដែលហ្វីយ៉ា



**ដោយ : ពិន សំខុន**

•••ស្នូរទះដៃនៃអ្នកដែលមកទស្សនាខ្សែភាពយន្ត "ទារកថ្ងៃចូលឆ្នាំ" បានលាន់ឮបន្ទាប់ពីរឿងនេះ បានបញ្ចាំងចប់នារាត្រីថ្ងៃទី១ ខែឧសភា ឆ្នាំ២០០៨ "នៅផ្ទះអន្តរ-ជាតិមួយ" នៅខាងលិចក្រុងហ្វីឡាដែលហ្វីយ៉ា ។ ជាសញ្ញានៃការអរគុណយុវកញ្ញា សុជាតា ពៅ ដែលបានផលិតខ្សែភាពយន្តឯកសារមួយស្តីអំពីខ្លួននាង ស្វែងយល់អំពីខ្លួនឯង បន្ទាប់ពីសម័យ "ខ្មែរក្រហម" បានធ្វើឱ្យនាងមករស់នៅ ស.រ.អា នេះ ។

កាលពីខ្មែរប៉ុស្តិ៍លេខមុន យើងបានបង្ហាញនូវយុវជនខ្មែរមួយក្រុមបាននាំគ្នាស្វែងរកអត្តសញ្ញាណរបស់ខ្លួន នៅសាលា E3 CENTER នៅខ្មែរប៉ុស្តិ៍លេខ១៣នេះ នាង សុជាតា បានបង្ហាញអំពីការចង់ដឹងអំពីឫសគល់របស់នាង ដែលមានកំណើតនៅជំរុំខាវអ៊ីដង នៃប្រទេសថៃ រស់នៅធំធាត់ ស.រ.អា ក្រុមគ្រួសារក៏ពុំបានពន្យល់ ឬបង្ហាញអំពីអតីតកាល ឬពូជអំបូរ ឬ វប្បធម៌ដើមរបស់នាងយ៉ាងណានោះដែរ ក៏ប៉ុន្តែនាង សុជាតា ដឹងថា ជំនាន់ខ្មែរក្រហម ប៉ុល ពត បានធ្វើឱ្យខ្លួននាងរស់ក្នុងសុបិន្តដ៏អាក្រក់ជាមួយនឹងក្រុមគ្រួសារខ្លួន ដែលអតីតកាលដ៏ខ្មៅងងឹតមួយមកលងពួកគេរៀងរាល់ថ្ងៃ ។

ខុសគ្នាពីយុវជន-យុវនារីជាច្រើន នៅសហ-រដ្ឋអាមេរិក សុជាតា បានទទួលការគាំទ្រពីមាតា-បិតា បងប្អូនប្រុសស្រី រហូតបានរៀនចប់មហា-វិទ្យាល័យ ហើយបានជំនាញខាងថតខ្សែភាពយន្តទៀតផង ។ នាងបាននិយាយនារាត្រីបញ្ចាំងខ្សែភាពនោះថា ដោយសារតែអតីតកាលចេះតែមកលងជីវិតនាងនាងចង់យល់ណាស់អំពី

(តទៅទំព័រទី០៣)

# លោក ឌិត ប្រាណ បាន លាលោកទៅហើយ

**ដោយ : សេរី ភាព**

•••ម្ចាស់ខ្លួននៃតួកុនរឿង "Killing Field" ឈ្មោះ ឌិតប្រាណ បានចូលមរណៈភាពនៅថ្ងៃទី ៣០ មិនា ឆ្នាំ ២០០៨ នៅ New Jersey ដោយជំងឺមហារីក ជន្មាយុ៦៥ឆ្នាំ ។

រឿងរបស់លោកត្រូវបានសំដែង ដោយលោក ហាំង ងោ (ស្លាប់) ហើយបានទទួលរង្វាន់ "អូស្កា"ទៀតផង ។




លោក ឌិត ប្រាណ ធ្វើការជាអ្នកថតរូបឱ្យកា-សែតញូយ៉កថៃម តាំងពីមកដល់

( តទៅទំព័រទី១៧ )



# ថ្ងៃរំលឹកសេរីភាពសារព័ត៌មាន

**ហ្វីឡាដែលហ្វីយ៉ា : ពិន សំខុន**

•••ប្រទេសកម្ពុជាបានផ្តើមរំលឹកសេរីភាពសារព័ត៌មានលើកដំបូងបង្អស់នៅឆ្នាំ១៩៩៤ ដោយសមាគមអ្នកសារព័ត៌មានខ្មែរ និងអង្គការព័ត៌មានចំនួន១៨ ជាសមាជិក ពេលនោះមានសហនាយករដ្ឋមន្ត្រីនរោត្តម រណឫទ្ធិ និង ហ៊ុន សែន បានមកចូលរួមជាកិត្តិយសនៅទីស្នាក់ការសមាគមក្រោយវត្តលង្កាការ នាថ្ងៃទី៣ ខែឧសភា ឆ្នាំ១៩៩៤ ។

នេះជាព្រឹត្តិការណ៍ប្រវត្តិសាស្ត្រសំរាប់កម្ពុជា ដែលពុំធ្លាប់មានពីមុនមកទេ ។ កម្ពុជាមានកាសែតជាច្រើនបានកើតឡើង ហើយដំបូងបង្អស់ គឺកាសែតរបស់លោក សឹង ង៉ុកថាញ់ កើតនៅខែកក្កដា ឆ្នាំ១៩៤២ ឈ្មោះ "នាគរាជ" ។ ជាបន្តបន្ទាប់កាសែតចាប់ពីពេលនោះមកមានតួនាទី សម្រាប់បញ្ចេញមតិចែកចាយដល់សា-ធារណជនយ៉ាងទូលំទូលាយ ។ ការផ្សព្វផ្សាយព័ត៌មានជា

( តទៅទំព័រទី១១ )





បុណ្ណារអ្នករបាំ ចាន់ធូដាងចម្លាក់រូបមកម្លាំងគ្នាចេញរូបរាង "មន្ទីរសិល្បៈខ្មែរ" ជំណាងឱ្យភាពរុងរឿងនៃអតីតកាលរបស់ខ្មែរបានខ សុបិន ថាច់ បានទៅមើល "មន្ទីរសិល្បៈខ្មែរ" នោះហើយឱ្យដឹងថា "អ្នកនាំងពីរផ្តើមព្យាបាលសហគមន៍ខ្លួនដោយសិល្បៈ"

# Let the Healing Process Begins

~by Sabane Thach

Philadelphia, Pa -April 18th, 2008-the Khmer Art Gallery hosted exceeded 300 people to celebrate the Cambodian New Year. There were Cambodian foods for the attended guests and kid's corner snacks. The olds, the young, the Cambodian, and the non-Cambodian mingled together in the art gallery to enjoy thousands of Cambodian classic sculptures, beautiful Apsara paintings, silver & bronze metalwork, silk art, and home furnishings that are well put in the gallery. Bona Weinstein, the former Cambodian folklore and classical dancer, and Bob Weinstein (her husband) are the owners of the Khmer Art Gallery had chosen the special collections of Khmer artifacts and paintings during the Khmer glorious period from 8th - 12th ce ntury in the Kingdom of Cambodia. A special section of the art gallery also dedicated to the Killing Field, in which all

continue page 05

## NEW YEAR BABY ...

អតីតកាលរបស់នាង ហើយក៏ចាប់ "កាមេរ៉ា" ថតរូបជាឯកសារជីវិតរបស់ក្រុមគ្រួសារនាង ជាមួយការរំលឹកអតីតកាល ដែលម្នាក់ៗជិតជាប់ដោយស្នាមកំសត់ស្រក់ទឹកភ្នែក នៅពេលដែលអារម្មណ៍របស់ខ្លួន ចូលស៊ុបទៅដល់ជម្រៅនៃអតីតកាលនោះម្ដងៗ ។ នាង សុជាតា បានត្រឡប់ទៅរស់នៅជាមួយឪពុកម្ដាយនៃប្រទេសដើមកំណើតរបស់ខ្លួន គឺកម្ពុជា ដែលជាជង្រុកនៃប្រវត្តិផ្លូវចិត្តរបស់ក្រុមគ្រួសារនាងដោយនាំទាំង "កាមេរ៉ា" ថតកុនទៅជាមួយផង ។ "កាមេរ៉ា"នោះ បានថតយកនូវព្រឹត្តការណ៍អារម្មណ៍របស់នាងរបស់ម្ដាយរបស់ឪពុករបស់ក្រុមគ្រួសារឯទៀត ដែលជាចំណងនៃប្រវត្តិគ្រួសារ បានធ្វើឱ្យអតីតកាលបានរស់ឡើងវិញ យ៉ាងប្រាកដនៅចំពោះមុខនាងជាមួយនឹងសំនួរដែលគ្មានចម្លើយ ដែលនាងបានរក្សាទុកខ្លួនឯងយូរមកហើយ ។ សុជាតា បានរកឃើញអតីតកម្មាភិបាលនៃខ្មែរក្រហមម្នាក់ ហើយនាំឪពុករបស់នាងឱ្យប្រឈមមុខនឹងអតីតកម្មាភិបាលនោះ ដើម្បីរំលឹកឡើងវិញ នូវយល់សុបិន្តអាក្រក់ ដែលចេះតែមកលងជីវិតខ្មែរតែរៀងរាល់ថ្ងៃ ធ្វើឱ្យឪពុករបស់នាងខ្យល់ចាប់បន្ទាប់ពីបាននិយាយគ្នាសួរនាំពីអតីតកាលនោះរួចមក ។ "កាមេរ៉ា"នាង សុជាតា ក៏បានបង្ហាញដូចគ្នាដែរ នូវលទ្ធផលល្អដែលបានមកពីការយល់ច្បាស់នូវអតីតកាលរបស់នាងរបស់ម្ដាយនឹងឪពុកនាង ធ្វើឱ្យក្រុមគ្រួសារ នាងជាសះស្បើយពីសុបិន្តអាក្រក់បានប្រសើរជាងមុន ។



( តទៅទំព័រទី២១ )

# ទស្សនៈឡប់ៗ

**●វត្តអាយរ៉ាប់ជាទ្រព្យសាធារណៈ ឬជារបស់បុគ្គល Sic !**

●●●នាយ ខ្ពុយ ខ្ញុំគ្មានយោបល់ ដោយបានត្រឹមតែក្រវីក្បាល ដើរចេញនិយាយមិនរួច ពេលដែលអ្នកសន្តិសុខម្នាក់ថា ជនអាតាំងខ្មៅបានហាមនាយ ខ្ពុយ និងអាសម្លាញ់ខ្ញុំម្នាក់ទៀតជាគូកនអាជីពអ្នកកាសែតខ្មែរប៉ុស្ដិ៍ដូចគ្នា មិនឱ្យចូលវត្ត ព្រោះមានបញ្ហាមេដឹកនាំវត្តមាន ពៅ ស៊ីវន, ទិត្យ ស៊ីផាន់ ដាក់បំរាមហាមមិនឱ្យអ្នកណាម្នាក់ចូលវត្តអាយរ៉ាប់ ដោយគ្មានការអនុញ្ញាតពីពួកគេ ។ នេះពិតជាអស្ចារ្យរបស់គេមែន ។ នាយ ខ្ពុយ យើងនាឱកាសនោះក៏បានគោរពសិទ្ធិសន្តិសុខនោះដែរ ប៉ុន្តែ អ្វីដែលនាយ ខ្ពុយ ខ្ញុំឆ្ងល់ក្នុងលក្ខណៈឡប់សតិសួរថា តើវត្តអាយរ៉ាប់ ជាទ្រព្យសម្បត្តិបុគ្គលរបស់អស់លោកទាំងពីរទិញសំរាប់ជូលឱ្យព្រះសង្ឃគង់នៅ ឬជាសម្បត្តិរួមរបស់ស្ថាប័ន Non-Profit ? នាយ ខ្ពុយ ខ្ញុំមិនយល់ទាល់តែសោះ Sic ! ជួយជំរាបប្រាប់ផងទាន ! ។ ហើយ អាខ្ពុយ ខ្ញុំសួរថា បើវត្តអាយរ៉ាប់ជាកម្មសិទ្ធិរបស់លោកទាំងពីរ គួរតែដកផ្លាកឈ្មោះជាវត្តចេញទៅ ឬក៏វិនិយោគវត្តទុករកស៊ីចំណេញ ដើម្បីលក់សំបុត្រចូលធ្វើបុណ្យក្នុងការគោរពជាទីសក្ការៈតាមផ្លូវព្រះពុទ្ធសាសនាសំរាប់ក្រុមពុទ្ធបរិស័ទទៅជាការប្រសើរជាង ឬ Sic ! ។ ព្រោះចៀសវាងការភាន់ច្រឡំពីញាតិញោមយល់ថា វត្តអាយរ៉ាប់ ជាវត្តសាធារណៈ នៅពេលដែលពួកគាត់ទៅដល់វត្តមិនត្រូវបានគេឱ្យចូល ដែលជាក់ស្ដែងកាលពីថ្ងៃទី ២៦ ខែមេសាកន្លងទៅនេះ នាយ ខ្ពុយ ខ្ញុំមានបំណងទៅថ្វាយបង្គំព្រះសង្ឃក្នុងការនិមន្តមកធ្វើពិធីសង្ឃទាននៅផ្ទះនាយខ្ញុំ ក៏ត្រូវបានគេឃាត់ឃាំងមិនឱ្យចូលវត្ត ។ សិទ្ធិអ្នកកាសែតមួយ និងជាអ្នកនិយមពុទ្ធសាសនាម្នាក់ត្រូវបានគេហាមឃាត់ ដោយមិនបានបញ្ជាក់ពីមូលហេតុច្បាស់លាស់ ធ្វើឱ្យយើងមិនឱ្យទទួលយកបានទេ ។ ហើយនៅថ្ងៃនោះដែរ គ្រួសារខ្មែរមួយមានទុក្ខសោកក្នុងគ្រួសារ មិនដឹងថា ឪពុក ឬម្ដាយស្លាប់

( តទៅទំព័រទី១៨ )

# ពិធីដង្ហែក្បួនចូលឆ្នាំអបអរដោយការធ្វើបាតុកម្ម

*ឡុងប៊ិច : មាជ សុវណ្ណារ៉ា*

●●●ពីរថ្ងៃក្រោយនៃពិធីដើរក្បួនបង្ហាញពីតម្លៃវប្បធម៌ ប្រពៃណី ចូលឆ្នាំ ខ្មែរនៅ Long



លី ឡេប (រូបកណ្តាល) ចាងហ្វាងកាសែតអង្គរបុរី និងក្រុមអ្នកបាតុកម្ម ធ្វើកិច្ចសម្ភាសន៍ជាមួយវិទ្យុអាស៊ីសេរី (រូបថត : ឯល វ៉ាន់ថា )

Beach ដែលជាទីប្រជុំជនខ្មែរដ៏ធំបំផុតមួយក្នុងសហរដ្ឋអាមេរិក នាថ្ងៃទី៧ ខែ មេសា កន្លង ទៅនេះ មានក្រុមនិស្សិត បញ្ញវន្ត និងពលរដ្ឋខ្មែរអាមេរិក ប្រមាណ៣០នាក់ បានឈររាយបណ្តាក់គ្នាដៃកាន់បដាមានសរសេរអក្សរខ្មែរ-អង់គ្លេស ដែលបំណងប្រឆាំងក្រុមប្រតិភូរាជរដ្ឋាភិបាលលោក ហ៊ុន សែន ខណៈដែលមនុស្សតំណាងរាជរដ្ឋាភិបាលកម្ពុជាកំពុងបើកសន្និសីទកាសែតស្តីពីទិដ្ឋភាពបច្ចុប្បន្ននៃបូជនីយដ្ឋានប្រាសាទព្រះវិហារ ។



ប្រតិភូរដ្ឋាភិបាល ហ៊ុន សែន ដឹកនាំដោយ តា គឹមហុង ក្នុងពិធីដង្ហែក្បួនចូលឆ្នាំថ្មី (រូបថតខ្មែរប៉ុស្តិ៍)

ក្រុមអ្នកធ្វើបាតុកម្មប្រឆាំង ដែលមានចាងហ្វាងកាសែតអង្គរបូរី លោក លី ឡេប ចូលរួមផងដែរនោះ បានបញ្ចេញសំដីថា ពួកគេធុញទ្រាន់ ចំពោះអ្នកដឹកនាំខ្មែរ ដែលកាន់អំណាចនៅស្រុកខ្មែរ ពោរពេញទៅដោយការរំលោភបំពានសិទ្ធិសេរីភាពពលរដ្ឋខ្មែរខ្លួនឯង លួចទឹកដីរបស់ខ្មែរបណ្តេញខ្មែរចេញពីផ្ទះសម្បែងប្លន់យកដីធ្លី ។

អត្ថន័យក្នុងបដា និងតាមសម្រែកជេរនោះ គេឃើញនឹងភ្នែក ឮនឹងត្រចៀកយ៉ាង ដូច្នេះថា "យើងប្រឆាំងដាច់ខាតចំពោះអាស្វាវ៉ាគីម ហុង ប៉ុល ពត ទី២ បាតដៃប្រឡាក់ឈាម ជាអាយ៉ងកញ្ជះយួន ជាពួកសម្លាប់ខ្មែរ ជាពួកវៀតណាមខាងជើង យៀកកុង ។

ក្រុមអ្នកប្រឆាំងបានសម្តែងឱ្យដឹងថា ការធ្វើបាតុកម្មនោះ ពួកគេមិនចង់ឱ្យអ្នកដឹកនាំខ្មែរក្រោមរបប ហ៊ុន សែន ដែល គេគិតថា ជាជនផ្តាច់ការជិះជាន់ធ្វើបាបពលរដ្ឋខ្មែរខ្លួនឯង ចូលមកជាន់ទឹកដី Long Beach ដោយមិនអាចទទួលយកបានឡើយ ។

អ្នកនាំពាក្យនៃទីស្តីការគណៈរដ្ឋមន្ត្រីនៃរាជរដ្ឋាភិបាលកម្ពុជា ផៃ ស៊ីផាន បានឆ្លើយតបទៅនឹងទង្វើនោះថា វាជាព្រឹត្តិការណ៍កើតមកពីក្រុមមនុស្សដែលបណ្តោយខ្លួន ឱ្យពុលទៅនឹងសកម្មភាពប្រជាធិបតេយ្យ ដែលគ្មានទិសដៅពិតប្រាកដ ថាតើពួកគេចង់បានអ្វីនោះទេ ? ។

ផៃ ស៊ីផាន និយាយថា ក្នុងនាមរាជរដ្ឋាភិបាលកម្ពុជាយើងមកកាន់ទីនេះ គឺដើម្បីពន្យល់ប្រាប់ដល់ពលរដ្ឋខ្មែរ-អាមេរិកាំង ដែលលោកមិនបានទទួលព័ត៌មានពិតប្រាកដឱ្យបានយល់ច្បាស់ពីសកម្មភាពអភិវឌ្ឍន៍សង្គមខ្មែរ ក្រោមការដឹកនាំរបស់លោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន ។ ដូច្នេះពួកអ្នកធ្វើបាតុកម្មត្រូវតែមានញត្តិ និងប្រធានបទទាមទារចង់បានអ្វីឱ្យច្បាស់លាស់ ដើម្បីរួមគ្នារកដំណោះស្រាយក្នុងនាមខ្មែរតែមួយ ។

ប្រធានប្រតិភូរាជរដ្ឋាភិបាលលោក ហ៊ុន សែន , វ៉ា គឹមហុង បានហៅពាក្យសំដី ដែលក្រុមបាតុករប្រើប្រាស់នោះថា ជាសំដីអសុរស មិនសមទៅនឹងប្រទេស ដែលមានអរិយធម៌ក្នុងប្រទេសប្រជាធិបតេយ្យសេរី ដែលពួកខ្លួនរស់នៅ ។

គួរបញ្ជាក់ថា កាលពីថ្ងៃទី ៦ ខែ មេសា ឆ្នាំ

( តទៅទំព័រទី១៥ )

# Let the Healing Process Begins

of the art works are done by Chanthou Oeur.

Chanthou Oeur appeared at the event to give his audiences and admirers an opportunity to meet and question him personally about the meaning of his art works. For the first time entering into the Killing Field section, the whole of my body got the goose bumps. I was not born during the Killing Field, nor have seen the pictures of the torturing camps that the Cambodian people experienced. This was the first time.

The first art piece capture my eyes was the piece that shows skinny-bonny Cambodian feet that are locked during their sleeps. As I asked what the





main theme of his works is, Mr. Oeur points out, "Well. As you can see this piece of sculpture" he direct me to look at a sculpture of a woman sitting on the floor without an arm raising her one hand for foods, while a young infant is breastfeeding from her and he continues, "missing an arm or a leg is a visible scar from the war. What about the invisible scar?" Then he turned to the opposite piece of a stand up rock with holes printed on it. He explains, "look at this one, these are the invisible scars that the Cambodian experienced, and no one knows about."

The Khmer Art Gallery is the biggest Khmer art collections that anybody personally owns in the United States of America. Combining the artistic skills from the two artists Bona and Chanthou, they have created a Khmer art legacy that intrigued not only the Western eyes, but also to remind the Cambodians about the beauty of their own culture in the past, not just the killing filed. Although the event was scheduled to end at 8 p.m., guests did not leave until past 9 o'clock. In addition to the beautiful Khmer art collections, there were live Khmer Traditional music and classical performance; a short film of The Golden Voice, a children story called The Brother Rabbit, a brief traditional Khmer music lesson for children, and the author of Bones That Float-Kari Grady Grossman. The guests enjoyed learning about the Cambodian art, beauty, history, and culture for hours.

# ទុរេនកំពតមានរសជាតិឆ្ងាញ់ និងលក់ដាច់ជាងគេ

***កម្ពុជា : សោម សុខុន***

កំពត គឺជាខេត្តមួយដែលសម្បូរទៅដោយបឹងបួ សមុទ្រ ភ្នំ និងប្រាង្គសាទ រមណីយដ្ឋានសួនសត្វអាហារសមុទ្រ និងផ្លែឈើសំរាប់ទទួលទាន ក្នុងការទាក់ទាញភ្ញៀវទេសចរឱ្យទៅទស្ស-នាកាន់តែច្រើន។ ពិសេសនោះ អ្នកស្រុកបានជាតិផ្អែម ។

ទុរេន ជារុក្ខជាតិពិបាកក្នុងការដាំដុះបន្តិច និងរើសស្ថានភាពដី ព្រមទាំងទាមទារនូវការប្រើប្រាស់បច្ចេកទេសត្រឹមត្រូវ ទើបអាចទទួលបានទិន្នផលខ្ពស់ ។ ទោះបីមានការលំបាកយ៉ាងណាក៏ដោយ ក៏ប្រជាជននៅខេត្តកំពត មិនរុញរាក្នុងការដាំដុះនោះទេ ។ ចំការ ទុរេន ខេត្តកំពត សម្បូរជាងគេ គឺនៅក្បែររមណីយដ្ឋានទឹកឈូ និងនៅក្បែរភ្នំបូកគោ។



ផ្លែទុរេននៅក្នុងចំការរបស់អ្នកស្រុកកំពត

ស្រុះស្រួលគ្នា ដាំទុរេនកាន់ តែច្រើន ដើម្បីដោះស្រាយជីវភាពរស់នៅឱ្យកាន់តែប្រសើរឡើង ។

អ្វីដែលអ្នកទេសចរមិនអាចបំភ្លេចបាននោះ គឺរសជាតិផ្លែទុរេនដ៏ឈ្ងុញឆ្ងាញ់របស់អ្នកស្រុកកំពត ទោះមានប៉ុន្មានក៏លក់អស់ដែរ ។

បច្ចុប្បន្ននេះ ទុរេន កំពត បានក្លាយជាដំណាំពេញនិយមរបស់អ្នកស្រុក ហើយផ្លែទុរេននេះបានធ្វើចរាចរនៅលើទីផ្សារតូចធំទូទាំងប្រទេស ។ ក្នុងចំណោមផ្លែទុរេនកំពត ក៏មាននាំចូលមកពីប្រទេសវៀតណាម ថៃ និងតាមបណ្តាខេត្តនានា ដូចជា ខេត្តកំពង់ចាម ក្រុងព្រះស៊ីហនុ ខេត្តរតន-គីរី ខេត្តមណ្ឌលគីរី ។ល។ ប៉ុន្តែ ទុរេនដែលលក់ដាច់ជាងគេ គឺទុរេនដែលនាំចូលមកពីខេត្តកំពត ព្រោះវាមានឱជារសឈ្ងុញឆ្ងាញ់ផ្អែមជាប់មាត់ និងមិនប្រើប្រាស់ជាតិគីមីក្នុងការដាំដុះឡើយ ។

ទុរេន ជារុក្ខជាតិហូបផ្លែម្យ៉ាងមានស្លឹកតូចៗ ដើមវាសាខាមិនសូវជាខ្ពស់ប៉ុន្មានទេ ចំណែកផ្កា របស់វាស្រដៀងនឹងផ្កា រីឯផ្លែរបស់វាមានបន្លាច្រើនស្រដៀងនឹងផ្លែខ្នុរ ។ នៅខាងក្នុងវិញ គឺវាចែកចេញជាក្លែបមានច្រើន ឬតិចទៅតាមផ្លែវាធំ ឬ តូច មានសាច់ពណ៌លឿង និងមានរស

លោក ខៀវ សារឿន អាយុ៥២ឆ្នាំ ជាម្ចាស់ចំការ នៅភូមិអណ្តូងខ្មែរ ស្រុកកំពង់បាយ ខេត្តកំពត បានមានប្រសាសន៍ថា ប្រកបមុខរបរដាំទុរេន តាំងពីឆ្នាំ១៩៩២ ហើយមានចំការចំនួន ២ហិកតា ដែលមានទុរេនចំនួន៩០ដើម កំពុងឱ្យផលទាំងអស់ ។

លោកបានបន្ថែមទៀតថា គាត់ប្រជាជនខេត្តកំពតភាគច្រើនរួមទាំងរូបលោកផងដែរ ពេញចិត្តនឹងដាំផ្លែទុរេនខ្លាំងណាស់ ។ ទោះបីវាលំបាកក្នុងការដាំដុះ និងថែរក្សាយ៉ាងណាក៏ដោយ តែវាអាចទទួលនូវប្រាក់ចំណូលខ្ពស់ និងមានភាពងាយស្រួលក្នុងការលក់ដូរ ។ ទុរេន ជាដំណាំដែលរើសដីណាស់ គឺអាចដាំវា បានលើដីក្រហម ដែលលាយល្បាយខ្សាច់ និងគ្មានថ្ម។

សព្វថ្ងៃនេះ អ្នកស្រុកអាចទិញកូនទុរេន ដែលគេផ្សាំសម្រាប់លក់នៅក្បែរទឹកឈូរមួយដើម តំលៃ១ដុល្លារ ឬអាចយកគ្រាប់ខ្ញុំទុរេន ដែលផ្លែ

( តទៅទំព័រទី១០ )

# គំនិតតូចមួយសំរាប់ជួយមាន សេចក្តីស្ងប់សុខនិងសប្បាយរីករាយ

**និទានពីសច្ចណា**

**ហ៊ីឡាដែលហ៊ីយ៉ា : គីម ភាន**

ក្រោមកំនៀបនៃគំនិតណាមួយដូចធុញថប់ ឬអស់សង្ឃឹមចិត្តយើងនៅតែជាប់ជុំពាក់ជានិច្ចក្នុងការធុញថប់ ឬភាពអស់សង្ឃឹមនោះរកផ្លូវចេញមិនរួច ។ ប៉ុន្តែបើយើងអាន ឬស្តាប់រឿងណាមួយជាសតិអារម្មណ៍ធុញថប់ ឬអស់សង្ឃឹមនោះហាក់ដូចរសាយបាត់ទៅតាមគំនិតនៃរឿងនោះៗ ។ ខ្ញុំសូមជូននូវទង្វើរបស់អ្នកស្រែមួយក្រុម ចំពោះសត្វលាជរាមួយក្បាល និងក្តីត្រិះរិះពិចារណា នៃលោកបណ្ឌិត ជេន និងជាគ្រូជំនួយខាងផ្នែកវិបស្សនា ដើម្បីជាសតិដែលអាចផ្លាស់ប្តូរអារម្មណ៍របស់លោកអ្នកអានបានមួយគ្រាពីការធុញថប់ ឬអស់សង្ឃឹមងាករកអារម្មណ៍សប្បាយរីករាយ និងក្តីសង្ឃឹមជាថ្មីវិញដូចតទៅ :

សម័យថ្ងៃមួយមានសត្វលាមួយរបស់អ្នកស្រែបានធ្លាក់ចុះក្នុងអណ្តូង ។ សត្វនោះបានស្រែករាប់ម៉ោងយ៉ាងអណោចអធម៌ ក្នុងពេលដែលម្ចាស់វាកំពុងគិតគូរថា ត្រូវធ្វើយ៉ាងណា ។ ចុងបញ្ចប់គេបានសំរេចចិត្តថា សត្វនោះវាចាស់ដែរហើយ ឯអណ្តូងក៏ត្រូវលុបចោលដែរ ។ វាគ្មានបានប្រយោជន៍អ្វីផងក្នុងការស្រង់យកមកវិញ នូវសត្វលានោះ ។ ពួកគេក៏កញ្ចក់បានប៉ែលជីកអាចម៍ដីបោះទៅក្នុងអណ្តូង ។ សត្វលាបានដឹងជាដំបូងថា អ្វីដែលកំពុងកើតឡើង ហើយក៏ស្រែករោរ៍យ៉ាងរន្ធត់ ។ រួចហើយដោយការងឿងឆ្ងល់របស់គេទាំងអស់គ្នាថា សត្វលាគង់តែត្រូវកប់ជ្រៅៗទៅក្នុងអណ្តូងនោះ ស្រាប់តែបានពីរបីប៉ែលនៃអាចម៍ដីដែលបានបោះទៅក្នុងក្រោយគេរួចហើយ ម្ចាស់លាក៏ឈ្ងោកចុះមើលទៅក្នុងអណ្តូង គេងឿងឆ្ងល់នឹងអ្វីដែលគេបានឃើញ ។ អាចម៍ដី

( តទៅទំព័រទី២១ )

# មេដឹកនាំ CFF អាចជាប់មួយជីវិត?

ឈុន យ៉ាសិទ្ធ រុំខ្លួនក្នុងទង់សញ្ញា CFF ក្នុងទីបញ្ជាការកណ្ដាលរបស់លោកនៅទីក្រុងឡុងប៊ិច
( រូបថតមុនជាប់ឃុំ )

***ឡុងប៊ិច : មាជ សុវណ្ណារ៉ា***

•••មេចលនាតស៊ូកងទ័ពសេរីជាតិកម្ពុជា CFF ដែលមានមូលដ្ឋាននៅទីក្រុង Long Beach សហគមន៍ ខ្មែរដ៏ធំមួយក្នុងសហរដ្ឋអាមេរិក អាចប្រឈមមុខនឹងទោសជាប់ពន្ធនាគារមួយជីវិតដោយគ្មានលក្ខខ័ណ្ឌដោះលែង នៅពេលដែលតុលាការកាត់ទោសនាថ្ងៃទី៨ កញ្ញា ខាងមុខនេះ ។

ឈុន យ៉ាសិទ្ធ ដែលជាប្រធានចលនា CFF ត្រូវបានគេរកឃើញថាមានកំហុស កាលពីថ្ងៃ ពុធ សប្ដាហ៍នេះ ពីបទរៀបចំការប៉ុនប៉ងធ្វើរដ្ឋប្រហារ ក្នុងឆ្នាំ ២០០០ ប្រឆាំងរដ្ឋាភិបាលលោក ហ៊ុន សែន ។

រដ្ឋអាជ្ញាអាមេរិកាំងបានអះអាងថា ឈុន យ៉ាសិទ្ធ អាយុ៥២ឆ្នាំ ជាគណនេយ្យករក្រុមហ៊ុន ធ្វើពន្ធដារ CCC នៅទីក្រុងឡុងប៊ិច និងជាប្រធានដែលតែងតាំងដោយខ្លួនឯងរបស់កងទ័ពសេរីជាតិកម្ពុជានោះ អាចប្រឈមមុខនឹងទោសជាប់ពន្ធនាគារមួយជីវិត ។

ឈុន យ៉ាសិទ្ធ ជាពលរដ្ឋខ្មែរ សញ្ជាតិអាមេរិកាំង ត្រូវបានគណៈវិនិច្ឆ័យតុលាការសហព័ន្ធកាត់ឱ្យជាប់ទោសនៅក្នុងទីក្រុង Los Angeles លើករណីចំនួន ៤របស់សហព័ន្ធប្រឆាំងនឹងគាត់ គឺការរួមគំនិតសម្លាប់មនុស្សនៅក្រៅប្រទេសការរួមគំនិតបំផ្លាញទ្រព្យសម្បត្តិនៅក្រៅប្រទេសការរួមគំនិតប្រើប្រាស់អាវុធខុសច្បាប់នៅក្រៅប្រទេស និងការជាប់ពាក់ព័ន្ធនៅក្នុងកិច្ចការយោធារ ប្រឆាំងប្រទេសមួយ ដែលសហរដ្ឋអាមេរិកកំពុងមានទំនាក់ទំនងការទូតដោយសន្តិភាពមួយ ។

យ៉ាងហោចណាស់ មានមនុស្ស៤នាក់ ត្រូវបានស្លាប់ និង ជាង១០នាក់ ត្រូវបានរងរបួសនៅក្នុងការវាយប្រហារមួយឈុតវិលងអាធ្រាត្រ ចូលថ្ងៃទី២៤ ខែវិច្ឆិកា ឆ្នាំ២០០០ ដោយកងទ័ពសេរីជាតិកម្ពុជា CFF ទៅលើអគារជាច្រើនរបស់រាជរដ្ឋាភិបាលក្នុង ទីក្រុងភ្នំពេញ ។ រដ្ឋអាជ្ញាអាមេរិកនិយាយថា ឈុន យ៉ាសិទ្ធ ដែលត្រូវបានចាប់ខ្លួននៅក្នុងការិយាល័យរបស់គាត់នាទីក្រុងឡុងប៊ិច កាលពីខែមិថុនា ឆ្នាំ ២០០៥ នោះ បានរៀបចំការវាយប្រហារពីមូលដ្ឋានសុវត្ថិភាពក្នុងប្រទេសថៃ ។ អ្នកនាំពាក្យរាជរដ្ឋាភិបាលកម្ពុជា លោក ខៀវ កញ្ញារីទ្ធ បានថ្លែងថា រដ្ឋាភិបាលកម្ពុជារីករាយចំពោះដំណើរការផ្លូវច្បាប់នៅក្នុងករណីនេះ ។

ដោយលោកបានអះអាងបន្តថា គ្មាននរណាមួយប្រើអំពើហឹង្សាផ្ដួលរំលំរដ្ឋាភិបាលដែលជាប់ឆ្នោតបាននោះទេ ។

នៅក្នុងសាវនាការរយៈពេលពីរសប្ដាហ៍នាទីក្រុង Los Angeles កន្លងទៅនេះ រដ្ឋអាជ្ញាធរបានអះអាងថា ឈុន យ៉ាសិទ្ធ បានរៀបចំកិច្ចប្រជុំជាមួយអតីតខ្មែរក្រហមនៅក្នុងប្រទេសថៃ និងរៀបចំរៃអង្គាសមូលនិធិឈ្មោះ Queen Mary នៅភាគ ខាងត្បូងរដ្ឋ California និងរៀបចំផែនការយុទ្ធសាស្ត្រឈ្មោះថា ប្រតិបត្តិការភ្នំភ្លើង នៅ ខែវិច្ឆិកា ឆ្នាំ២០០០ ។

មេធាវីរបស់ ឈុន យ៉ាសិទ្ធ លោក រីឆាត កាឡាហាន បាននិយាយថា គោលបំណងតែមួយរបស់កូនក្តីគាត់ គឺធ្វើដើម្បីនាំលទ្ធិប្រជាធិបតេយ្យទៅកាន់ស្រុកកំណើតរបស់គាត់ ដោយលោកអះអាងថា គាត់មិនដែលមានបំណងសម្លាប់ ឬចង់ធ្វើឱ្យនរណាម្នាក់រងរបួសនោះទេ ។ មេធាវីរូប នោះបានចាត់ទុក ឈុន យ៉ាសិទ្ធ និងអ្នកសកម្មប្រយុទ្ធរបស់គាត់ជាជនស្លូតត្រង់ ប៉ុន្តែមានការព្រួយបារម្ភយ៉ាងខ្លាំងអំពីប្រជាជនកម្ពុជា និងអនាគតរបស់ពួកគេ ។

ឈុន យ៉ាសិទ្ធ និងចលនាកងទ័ពសេរីជាតិកម្ពុជាបានចេញមុខទទួលខុសត្រូវចំពោះការប្រយុទ្ធគ្នា កាលពីខែវិច្ឆិកា ឆ្នាំ ២០០០ ដែលយ៉ាងហោចណាស់សមាជិក

ដែលជាជនសង្ស័យចំនួន៧៥នាក់ ត្រូវបានកាត់ទោសក្នុងប្រទេសកម្ពុជា និងអ្នករួមគំនិតមួយចំនួនរបស់ ឈុន យ៉ាសិទ្ធ បានផ្ដល់ចម្លើយជាសាក្សីតាមខ្សែអាត់ដល់សាវនាការនេះ ។ ក្នុងកិច្ចសម្ភាសន៍ជាមួយកាសែតខ្មែរប៉ុស្តិ៍ អ្នកគាំទ្រចលនាកងទ័ពសេរីជាតិកម្ពុជា CFF ជាច្រើនរូបបានអះអាងថា ឈុន យ៉ាសិទ្ធ បានបង្កើតចលនានេះឡើងក្នុងបំណង ដើម្បីជួយប្រទេសក្រីក្រកម្ពុជាមួយនេះ ពីការត្រួតត្រារបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ក្រោយពីសម្រេចថា ទាំងពាក្យសំដី និងនយោបាយការទូត ពិតជាមិនអាចទំលាក់នាយករដ្ឋមន្ត្រីរូបនេះបាននោះទេ ក្រៅតែពីកិចប្រតិបត្តិការប្រយុទ្ធមួយឈ្មោះបន្ទុះភ្នំភ្លើង ។

បើទោះបីជាយ៉ាងនេះក៏ដោយ ក៏គេពុំទាន់ដឹងប្រាកដថា ឈុន យ៉ាសិទ្ធ ពិតជាអាចជាប់គុកមួយជីវិត ឬយ៉ាងណានោះទេ ដែលលទ្ធផលនឹងដឹងជាចុងក្រោយក្នុងសវនាការមួយនាថ្ងៃទី៨ ខែ កញ្ញា ឆ្នាំ ២០០៨ ៕

# ភាពក្រីក្រជំរុញឱ្យប្រជាពលរដ្ឋឆ្លងដែនទៅធ្វើជាកម្មករនៅប្រទេសថៃ

***ដោយ : គិម សារឿន***

●●●មនុស្សគ្រប់ៗ រូបបានពុះពារព្យាយាមក្រាញននាលនឹងឆាកជីវិត ដើម្បីដោះស្រាយបញ្ហាគ្រប់ប្រភេទ ។ ការធ្វើស្រែមិនបានផលអ្នកស្រែចំការបាននាំគ្នាចាកចេញពីភូមិស្រុកទៅរកការងារនៅតាមតំបន់ផ្សេងៗដូចជាទីក្រុង-



ភ្នំពេញ សៀមរាប ប៉ោយប៉ែត អន្លង់វែង ប៉ៃលិន កោះកុង និងប្រទេសថៃ ។

ក្រុងភ្នំពេញ និងប្រទេសថៃ គឺជាកន្លែងមួយដែលប្រជាជនខ្មែរធ្វើចំណាកស្រុកទៅរកការងារធ្វើច្រើនជាងគេ ។ ក្នុងចំណោមប្រជាជនរាប់ម៉ឺននាក់នោះ ក៏មានយុវសិស្សនៅវិទ្យាល័យកំពង់ឈើទាល ខេត្តកំពង់ធំ បានភ្លក្សរសជាតិជីវិតឆ្លង ដែនដ៏កំសត់ ដើម្បីស្វែងរកប្រាក់ផ្គត់ផ្គង់ជីវភាពគ្រួសារដែរ ។

ទាក់ទិនទៅនឹងបញ្ហាធ្វើចំណាកស្រុកទៅរកការងារធ្វើនៅប្រទេសថៃនេះ យុវជន ធី ចាន់ ណា អាយុ១៨ឆ្នាំ រស់នៅភូមិថ្នល់បែក ឃុំត្រពាំងឫស្សី ស្រុកកំពង់ស្វាយ ជាសិស្សថ្នាក់ទី១១ "ក" នៃវិទ្យាល័យកំពង់ឈើទាល បាននិយាយទាំងទឹកមុខញញឹមស្ងួតថា ដោយសារតែខ្លួនជាកូនអ្នកក្រនោះ ទើបដាច់ចិត្តទៅប្រទេសថៃ ក្នុងពេលវិស្សមកាល ដើម្បីរកប្រាក់មកផ្គត់ផ្គង់គ្រួសារ និងទុកដោះស្រាយការរៀនសូត្រផង ។

យុវជន ធី ចាន់ណា បានរៀបរាប់ទៀតថា ខ្លួន បានទៅប្រទេសថៃតាមរយៈម្ដាយមីង ដែលមានប្ដីជាជនជាតិថៃ ។ គាត់បានមកហៅខ្លួនឱ្យទៅជួយធ្វើការងារស្រែចំការ និងជួយជញ្ជូនឥវ៉ាន់ទៅលក់នៅទីផ្សារ ។ បន្ទាប់ពីធ្វើការជាង ២ខែ ក៏សុំម្ដាយមីងត្រឡប់មកផ្ទះវិញ ។

ចំណែកឯការរស់នៅក្នុងប្រទេសថៃនោះ មានការលំបាកខ្លាំងណាស់ ព្រោះយើងរស់នៅដោយខុសច្បាប់ ត្រូវគេវាយដំច្រំធាក់ ឬតម្រួតថៃចាប់ដាក់គុក ចំណែកអ្នកខ្លះទៀតស្លាប់បាត់បង់ជីវិតក៏មាន ។

ដោយសារអ្នកភូមិស្រុកខ្វះការចេះដឹង និងខ្វះគំរូល្អពីអ្នកជំនាន់មុន យុវជន សាយ ប៊ុនធន អាយុ១៥ឆ្នាំ បានបោះបង់ការសិក្សាត្រឹមថ្នាក់ទី៧ប៉ុណ្ណោះ ។ ដោយហេតុតែគ្មានការងារធ្វើ និងជឿតាមគេទៅធ្វើការជាកម្មករនៅប្រទេសថៃថា ស្រួលហើយរកលុយបានច្រើន អាចធ្វើជាអ្នកមាន ក៏ដាច់ចិត្តចាកចោលភូមិកំណើតទៅរកលុយនឹងគេ ។

យុវជន ប៊ុនធន បានបន្តទៀតថា ពេលនោះខ្លួន សុំឪពុកមាទៅជាមួយដែរ តែខ្លួននៅក្មេងពេកមិនអាចរកលុយកើតទេ ។ ក្រោយមកក៏វិលត្រឡប់មកទឹកដីកំណើតវិញ ហើយប្ដេជ្ញាចិត្តថាប្អូននឹងសុំគេចូលរៀនសូត្រលែងខ្ជិលច្រអូសទៀតហើយ ព្រោះលើលោកនេះ គ្មានអ្វីមានតំលៃជាងចំណេះវិជ្ជានោះទេ ។

នៅប្រទេសថៃ កម្មករចុះទូក ក្នុងមួយថ្ងៃទទួលបានកម្រៃពី២០០ ទៅ២៥០បាត តែតំលៃពលកម្មនេះ ពុំមានតុល្យភាព និងការងារលំបាកៗដែលថៅកែកំណត់នោះទេ ។ ការងារលំបាក ប៉ុន្តែចំណីអាហារហូបចុកមិនគ្រប់គ្រាន់ជូនកាលឈឺថៅកែប្រើទាំងឈឺ ហើយលុយដែលរកបានមួយថ្ងៃៗត្រូវចំណាយអស់ទៅវិញ ។

ដោយមិនគាំទ្រនឹងការងារដ៏លំបាកវេទនានេះ បានពួកយុវជនដែលឆ្លងដែនទៅថៃ ក៏បានវិលត្រឡប់មកកាន់មាតុភូមិវិញ គ្មានស្ដាយស្រណោះបន្តិចឡើយ ។ ពួកគេបានអំពាវនាវដល់យុវវ័យទាំងអស់គ្នាថា សូមកុំគិតថា របរចុះទូកនៅប្រទេសថៃ ស្រួលកើបលុយឱ្យសោះ ។ បើចង់រកលុយបានស្រួល មានតែខំប្រឹងរៀនសូត្រមានការងារជាក់លាក់នោះទេ ទើបមានអនាគតល្អ ។

លោក តាន់ ប៊ុនហុង នាយកវិទ្យាល័យកំពង់ឈើទាល បានឯកភាពថា ស្រុកប្រាសាទសម្បូរជាស្រុកក្រីក្រមួយ បើប្រៀបធៀបទៅនឹងស្រុកផ្សេងៗនៃខេត្តកំពង់ធំ ។ ដូច្នេះហើយការសិក្សាអប់រំក៏មានកំរិតទាបដែរ សំរាប់ប្រជាជននៅស្រុកនេះ ។

ដោយហេតុតែពុំទាន់យល់ពីតំលៃនៃចំណេះវិជ្ជា ទើបបណ្ដាលឱ្យឪពុកម្ដាយ ក៏ដូចជាយុវសិស្សនៅទីនេះ យកភាពក្រីក្រជាបញ្ហាបញ្ចប់ជីវិតសិក្សា ។ អ្នកខ្លះទៅស៊ីឈ្នួលគេ ខ្លះចុះទូកនៅថៃ និងខ្លះទៀតធ្វើកម្មករកាត់ដេរនៅភ្នំពេញ ។

លោក ផុន ប៊ូច មេឃុំតាំងក្រសៅ ស្រុកប្រាសាទសម្បូរ បានឱ្យដឹងថា ភាពក្រីក្របានធ្វើឱ្យប្រជាពលរដ្ឋក្នុងឃុំប្រមាណ៣០% ចាកចេញពីស្រុកកំណើតទៅរកការងារធ្វើនៅតំបន់ផ្សេងៗ។ ជាពិសេសប្រទេសថៃ ហើយជួបនឹងរឿងរ៉ាវគួរឱ្យឈឺចាប់ខ្លាំងណាស់ ។

លោក ចេង សុខ អាយុ៤០ឆ្នាំ រស់នៅភូមិកូប ឃុំកូប ស្រុកអូរជ្រៅ ខេត្តបន្ទាយមានជ័យ បាននិយាយថា កន្លងមកគាត់ត្រូវមេខ្យល់នាំទៅចុះទូកនេសាទត្រីក្នុងសមុទ្ររងទុក្ខលំបាកវេទនាខ្លាំងណាស់ ។ នៅទីនោះ គាត់ត្រូវថៅកែថៃបង្ខំឱ្យធ្វើការទាំងឈឺទាំងជា ពេលធ្វើការឱ្យហើយមិនព្រមបើកលុយឱ្យទៀត ។ ពួកកម្មករខ្មែរដែលចុះទូកភាគច្រើន ថៅកែថៃបង្ខំឱ្យធ្វើការធ្ងន់ៗខ្លះក៏ធ្លាក់ខ្លួនញៀនថ្នាំថែមទៀត ។ ដោយទ្រាំទ្រនឹងការលំបាកមិនបាននាំគ្នាលួចរត់មកផ្ទះវិញនៅពេលថៅកែឡើងទូកមកច្រាំង ។

ពួកគេដែលឆ្លងដែនទៅថៃ ខ្លះចុះទូកនេសាទដកស្ទូង ធ្វើចំការ និងស៊ីឈ្នួលគេ ហើយការចាកចេញទៅនោះ រកលុយកាក់បានតិចតួចណាស់ ។ ចំណែកពួកយុវវ័យមួយចំនួនបានធ្លាក់ខ្លួនញៀនថ្នាំ ខូចសុខភាព ហើយអ្នកខ្លះស្លាប់បាត់បង់ជីវិតក៏មានដែរ ។

ការចាកចេញពីស្រុកកំណើតរបស់ប្រជាពលរដ្ឋនេះ មិនមែនមានតែអ្នកស្រុកកំពង់ធំទេ គឺមានប្រជាពលរដ្ឋគ្រប់ខេត្ត-ក្រុងទូទាំងប្រទេសភាគច្រើនមកភ្នំពេញ ដើម្បីរកការងារធ្វើជាកម្មករសំណង់កម្មករកាត់ដេរ ស៊ីឈ្នួលតាមផ្ទះ និងរត់ម៉ូតូឌុប និងអ្នកខ្លះមានមហិច្ឆតាឆ្លងដែនទៅថៃ ៕

# ចូលឆ្នាំខ្មែរទៅលេងវត្តណា?

***ដោយ : សេរី ភាព***

***រដូវប្រាំងឆ្នាំនេះណាអ៊ូម រដូវភ្ជុំឆ្នាំនេះ ណាស្ងួន បងនិងអូនទៅលេងវត្តណា....?*** គឺជាបទចំរៀងឆ្លើយឆ្លងយ៉ាងពិរោះរណ្តំរបស់អ្នកចំរៀងជើងចាស់លោក ស៊ិន ស៊ីសាមុត និងអ្នកស្រី រស់ សេរីសុទ្ធា ។ តែសំណួរដែលសួរត ៗគ្នាពីមាត់មួយទៅមាត់មួយថា តើចូលឆ្នាំខ្មែរទៅវត្តណា? វាក្លាយទៅជាសំណួរពេញនិយមរបស់ខ្មែរ នៅក្នុងរដ្ឋរ៉ូដអៃឡិន្ត ស្ថិតក្នុងតំបន់ឆ្នេរសមុទ្រខាងកើតនៃសហរដ្ឋអាមេរិក ។ ក្រុងប្រូវិដិន និងក្រុងក្រេនស្តុន ក្នុងរដ្ឋរ៉ូដ អៃឡិន្ត មានវត្តខ្មែរចំនួនបី គឺវត្តធម្មិការ៉ាម វត្តពុទ្ធមណ្ឌល និងវត្តធម្មាឃោសនារ៉ាម ឬវត្តថ្មី ។ ប្រវត្តិនៃការកកើតវត្ត និងរឿងរ៉ាវដែលនាឱ្យមានការបែកបាក់បង្កើតវត្តថ្មីជាបន្តបន្ទាប់ ក្នុងសមាគមន៍ខ្មែរនៃរដ្ឋរ៉ូដអៃឡិន្ត គឺមានដំណើររឿងមិនសូវត្រូវគ្នាទេ ។

វត្តធម្មាឃោសនារ៉ាម ជាវត្តទីបីស្ថិតក្នុងទីក្រុងក្រេនស្តុន និងដែលតាំងនៅទីវាល ដែលមានទីធ្លាដីធំទូលាយជាងគេ ។ មនុស្សម្នាតែងនាំគ្នាទៅវត្តនេះ ព្រោះមានទីកន្លែងចតរថយន្តបានស្រួល និងជាពិសេសអាចទទួលបានខ្យល់អាកាសបរិសុទ្ធពីវាល ចំការពោតដែលនៅជាប់នោះផង ។ ប៉ុន្តែបច្ចុប្បន្ននេះ ពុំសូវមានមនុស្សទៅវត្តនេះ ច្រើនដូចពីមុនទៀតទេ ជាពិសេសក្នុងឆ្នាំនេះ សំណួរដែលសួរថា តើចូលឆ្នាំខ្មែរទៅវត្តណា? បានក្លាយជាសំណួរប្រជាប្រិយ៍ បន្ទាប់ពីលិចឮព័ត៌មានថា ព្រះសង្ឃចៅអធិការវត្ត ព្រះនាមព្រះ សត្ថា ជាឆោម ជាសង្ឃបរាជិក ព្រោះមិនអាចផ្តាច់កិលេសតណ្ហាបាន ។ ព្រះសង្ឃអង្គនេះកាលគង់នៅជាព្រះចៅអធិការវត្តពុទ្ធមណ្ឌលក្នុងក្រុងប្រូវិដិន ត្រូវបានគណៈកម្មាវត្តបណ្តេញចេញពីវត្ត ដោយចោទប្រកាន់ថាបានបង្ខំរួមភេទជាមួយយាយជីក្នុងវត្ត ។ ឥឡូវនេះនៅពេលកំពុងគង់ជាចៅអធិការវត្តធម្មាឃោសនារ៉ាម ក្នុងក្រុងក្រេនស្តុន ត្រូវបានអតីតព្រះសង្ឃដូចគ្នាចោទប្រកាន់ថា បានបង្ខំរួមភេទជាមួយខ្លួន ដែលជាព្រះសង្ឃដូចគ្នា ។

បងស្រីម្នាក់ដែលជាអតីតសមាជិកគណៈកម្មាធិការវត្ត និងជាអ្នកធ្លាប់ជួយឧបត្ថម្ភព្រះសង្ឃ ជា ឆោម បានប្រាប់ខ្មែរ ប៉ុស្តិ៍ថា "ក្រោយបានឮរឿងនេះ គាត់បានទូរស័ព្ទទៅសួរនាំគណៈកម្មាធិការវត្តភ្លាម និងបានសំណូមពរឱ្យជំរះមន្ទិលសង្ស័យនេះដោយហៅអ្នកចោទប្រកាន់ និងជនរងគ្រោះមកសួរនាំទល់មុខគ្នា ដើម្បីរកយុត្តិធម៌ឱ្យភាគីរៀងៗខ្លួន" ។ ប៉ុន្តែប្រធានវត្តបានឆ្លើយថា "រឿងហ្នឹងគេដឹងអស់ហើយ តែគេទុកលោក (ព្រះសង្ឃ ជា ឆោម) គ្រាន់រកលុយក្រែងបានបួន ឬប្រាំពាន់ដុល្លារទុកបង់ថ្លៃវត្តសិន" ។ បងស្រីម្នាក់នោះ បានបន្តថា គួរឱ្យអាណិតលោកណាស់ មិនគួរគេទុកលោកជាឧបករណ៍រកលុយសំរាប់បង់ថ្លៃវត្តទេ ។ បើលោកពិតជាបរាជិក និងអស់និស្ស័យជាព្រះសង្ឃហើយ ម្តេចមិននិមន្តលោកឱ្យសឹករួច និមន្តលោកថ្មីជំនួសទៅ ? ហើយបើលោកមិនបានប្រព្រឹត្តដូចការចោទប្រកាន់ ក៏ត្រូវរកយុត្តិធម៌ជូនលោកដែរ កុំចេះតែឱ្យគេធ្វើបាបលោកតាមចិត្ត" ។

នៅថ្ងៃច័ន្ទ ទី០៨ ខែមេសា នេះ បន្ទាប់ពីសារព័ត៌មានខ្មែរប៉ុស្តិ៍ បានរាយការពីរឿងរ៉ាវដែលជាប់ទាក់ទងនឹងការប្រព្រឹត្តខុសវិន័យធម៌ជាព្រះសង្ឃរបស់ព្រះសត្ថា ជា ឆោម រួចមកនៅកណ្តាលទីសាធារណៈក្នុងផ្សារខ្មែរមួយឈ្មោះសាន់នី គេបានលឺលោក កើ ភិរុណ ដែលជាប្រធានវត្ត ស្រែកគេអ្នកសរសេរអត្ថបទនៅកណ្តាលទីសាធារណៈ ។ ពលរដ្ឋខ្មែរជាច្រើន ដែលបានឮបានគ្រវីក្បាលគ្រប់គ្នា ហើយនិយាយតិចៗថា "មិនគួរខ្ញុំបោះឆ្នោតឱ្យគាត់ធ្វើប្រធានទេ" ។

លោក យូវឡ្ស សូ ដែលជាដើមចោទថា ព្រះសង្ឃ ជា ឆោម បរាជិកនោះបាននិយាយថា "មើលទៅគណៈកម្មាការថ្មីនេះ មិនចេះដោះស្រាយបញ្ហាទេ តែបែរជានាំគ្នាបង្កើតបញ្ហាបន្ថែមទៅវិញ" ។ លោក អន្ទិត ទិត ស៊ីណា ដែលជាអតីតព្រះចៅអធិការវត្តខ្មែរ នៅរដ្ឋមូនីសូតា បានប្រាប់ពុទ្ធបរិស័ទ ក្នុងរដ្ឋរ៉ូដអៃឡិន្ត "ក្នុងរឿងនេះ គឺលោកជឿជាក់ថា វាជារឿងពិតរហូតដល់ទៅ២០០%" លោកបន្តថា កាលដែលលោកនៅបួសជាព្រះសង្ឃលោកធ្លាប់បានសឹងលើគ្រែតែមួយជាមួយព្រះសង្ឃ ជា ឆោម ហើយព្រះសង្ឃ ជា ឆោម គឺយកដៃលូករាវលោកជានិច្ច ។

តាមប្រភពពីគណៈកម្មាការវត្តធម្មាឃោសនារ៉ាម បានប្រាប់ឱ្យដឹងថា "ឥឡូវនេះ ព្រះសង្ឃជា ឆោម និងប្រធានវត្តថ្មីកំពង់ បានរកមេធាវីដើម្បីប្តឹងទៅតុលាការហើយ" ។ ក្នុងការឆ្លើយតបវិញភ្លាមៗ លោក យូ វឡ្សសូ បានប្រាប់ថា "លោកមានការសប្បាយចិត្ត ប្រសិនបើរឿងនេះបានទៅដល់តុលាការ ព្រោះវាអាចបញ្ជាក់បានការពិតថា តើនរណាជាជនបោកប្រាស់ ? អ្នកណាជាអ្នកបំផ្លាញសាសនា ?" ។ លោកបន្តថា "ពេលទៅដល់តុលាការលោក និងសំណូមពរឱ្យតុលាការប្រើម៉ាស៊ីនកុំព្យូទ័រសួរចំលើយ ដើម្បីបញ្ជាក់ការពិត" ។

ភាគីម្ខាងទៀត មិនអាចសុំការបំភ្លឺបានទេ ដោយសំដែងអាការៈបែបជាខឹងសម្បា និងឆ្លើយទូរស័ព្ទទាំងកំបុតថា "គេគ្មានសិទ្ធិនិយាយជាមួយកាសែតទេ" ។

ក្រុមពុទ្ធបរិស័ទ ដែលមានជំហរឯករាជ្យ បានបញ្ចេញទស្សនៈថា "ខ្មែរមានរឿងច្រើន តែនាំគ្នាយកលុយឱ្យមេធាវី ឬបង់ឱ្យតុលាការអត់ប្រយោជន៍" ។ ខ្មែរមិនចេះដោះស្រាយបញ្ហាខ្មែរ ដោយយកលក្ខខ័ន្តរបស់សមាគមមកដោះស្រាយទេ ។ ដល់ចាយលុយឱ្យមេធាវី និងបង់លុយតុលាការអស់តាំងតែនាមគ្នាធ្វើបុណ្យផ្កាប្រមូលលុយមួយកាក់មួយសេនពីអ្នកគាំទ្រ ហើយឃោសនាឱ្យគេជួយ ថាយកលុយទៅកសាងនេះ ឬកសាងនោះ" ៕

# លោក អ៊ិន សុផុន អ្នកពលិកម្មដើម្បីសមាគមន៍ខ្មែរក្នុងរដ្ឋរ៉ូដអៃឡិន្ត

***ដោយ : សេរី ភាព***

កាលណាគេធ្វើដំណើរកាត់តាមផ្លូវ Hanover Street ក្នុងទីក្រុងប្រូវិដិន គេហ្នឹងឃើញមានវត្តមួយឈ្មោះថា វត្តធម្មិការ៉ាម ។ នៅជាប់ទីនោះ គឺមានផ្ទះមួយខ្នងកំពស់៣ជាន់ ដែលនៅពីខាងមុខមានទាំងទង់ជាតិខ្មែរបង្ហូតឡើងទៅលើ



Mr. Sophon Im
Property of Cambodia Society of RI

យ៉ាងសង្ហា ។ កាលបើឃើញផ្ទះសមាគមន៍ខ្មែរ នោះហើយគ្រប់គ្នាពិតជានឹកឃើញដល់លោក អ៊ិន សុផុន ដែលជាអតីតប្រធានសមាគមន៍ខ្មែរ នៃរដ្ឋរ៉ូដអៃឡិន្ត កាលពីអណត្តិ ២០០៥-២០០៦ ។

លោក អ៊ិន សុផុន ដែលមានវ័យហុកសិបបីឆ្នាំ និងដែលបានមករស់នៅក្នុងរដ្ឋរ៉ូដអៃឡិន្ត តាំងពីថ្ងៃទី២៣ ខែឧសភា ឆ្នាំ១៩៧៩ ហើយនិងពេលបច្ចុប្បន្នជាអនុប្រធាន នៃគណៈកម្មាធិការវត្តធិម្មិការ៉ាមផងនោះ គឺជាចាស់ទុំម្នាក់ដែលទទួលបានការរាប់អានច្រើនជាងគេពីសំណាក់សមាគមន៍ក្នុងរដ្ឋរ៉ូដអៃឡិន្ត ។ លោក សារ៉ាត សាយ ដែលបច្ចុប្បន្នជាអគ្គលេខាធិការនៃសមាគមន៍ក្នុងរដ្ឋរ៉ូដអៃឡិន្តធ្លាប់បាននិយាយថា "អ្នកណាក៏ដោយឱ្យតែមកដល់រ៉ូដអៃឡិន្ត ដំបូងនោះគឺមានតែលោក អ៊ិន សុផុន នេះហើយ ដែលជួយផ្តល់ខោអាវរបស់របរប្រើប្រាស់ និងប្រដាប់ប្រដាដេកពួន" ។ លោកគឺជាមនុស្សមានចិត្តថ្លើមម្នាក់ដែលកំរនឹងរកបាន ព្រោះលោកជួយនរណាម្នាក់មិនទាមទារគុណស្រ័យអ្វីទេ ។

ប្រជាពលរដ្ឋខ្មែរក្នុងរដ្ឋរ៉ូដអៃឡិន្តទាំងមូលមានការកោតសរសើរ និងព្រមទាំងឱ្យតំលៃខ្ពស់ ចំពោះលោក អ៊ិន សុផុន ។

( តទៅទំព័រទី១១ )

## ទំព័រហ្វីឡាដែលហ្វីយ៉ា

# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**តពីលេខមុន**

ថ្ងៃទី៦ ខែកក្កដា សមាគមនិស្សិតខ្មែរនៅស្រុកបារាំងដឹកនាំដោយ ហ៊ូ យន់ បានសរសេរលិខិតថ្កោលទោសការផ្តួលរំលំរដ្ឋាភិបាលប្រជា-ធិបតេយ្យ ។

ខែសីហា នៅក្នុងព្រឹត្តិប័ត្រ "សមាគមនិស្សិតខ្មែរ" នៅប្រទេសបារាំង សាឡុតស បានសរសេរអត្ថបទដំបូងបង្អស់ចុះផ្សាយអំពីរាជានិយមនិងបដិវត្តន៍បារាំង, រុស្ស៊ី, ចិន ដោយប្រើឈ្មោះអ្នកសរសេរ "ខ្មែរដើម" ។

ថ្ងៃទី២៤ ខែកញ្ញា ចលនារំដោះខ្មែរ និងរណសិរ្សរួបរួមជាតិឥណ្ឌូចិន បានសំរេចរួមកំលាំងគ្នា ។

ថ្ងៃទី២៧ ខែវិច្ឆិកា សឺង ង៉ុកថាញ់ រណបអាមេរិកាំង និង សឺង ង៉ុកមិញ រណបវៀតណាមបានខំប្រឹងប្រែងឱ្យមានការទទួលស្គាល់ជាអគ្គបញ្ជាការនៃរណសិរ្សរំដោះតែរៀង១ខ្លួនតែពុំបានសំរេច ។ គេបានព្រមព្រៀងគ្នាតែត្រឹមធានាសន្តិសុខទៅវិញទៅមករវាងក្រុមនីមួយ១តែប៉ុណ្ណោះ ។ សន្តិសុខនោះគេអាចរក្សាបានរហូតដល់ឆ្នាំ១៩៥៤ ។

**ឆ្នាំ១៩៥៣ :**

ថ្ងៃទី១៤ ខែមករា សាឡុតស ត្រឡប់ពីបារាំងមកកាន់កម្ពុជាវិញ ។

ថ្ងៃទី១១ ខែមករា សម្តេចនរោត្តម សីហនុ បានស្នើសុំអំណាចពិសេសពីរដ្ឋសភាជាតិ ។

ថ្ងៃទី១៣ ខែមករា វគ្គថ្មីមួយទៀតនៃរដ្ឋប្រហាររបស់សម្តេច គឺសម្តេច សីហនុ រំលាយរដ្ឋសភាចោល ហើយបញ្ចេញក្រឹត្យប្រកាសថា "ជាតិមានអាសន្ន" ហើយឱ្យប្រគល់អំណាចទាំងមូលឱ្យរដ្ឋាភិបាលសមាជិកសភាជាតិ៩នាក់នៃគណបក្សប្រជាធិបតេយ្យបានត្រូវចាប់ខ្លួនពីបទឃុបឃិតជាមួយពួកយៀកមិញ និងចលនាឥស្សរៈ ។

**+ថ្ងៃទី២៩ ខែមករា រដ្ឋាភិបាលនរោត្តម សីហនុ :**

**១៥. រដ្ឋាភិបាលនរោត្តម សីហនុ (២៤.១. ១៩៥៣-២៨.៧.១៩៥៣) :**

-នាយករដ្ឋមន្ត្រី : នរោត្តមសីហនុ

-រាជប្រតិភូនាយករដ្ឋមន្ត្រីទីស្តីការរដ្ឋាភិបាលរដ្ឋមន្ត្រីកីឡា និងយុវជន : ប៉ែន នុត

-នាយករដ្ឋមន្ត្រីបំរុង-រដ្ឋមន្ត្រីការបរទេស និងធម្មការ : អ៊ូ ឈឿន

-ទេសរដ្ឋមន្ត្រី-រដ្ឋមន្ត្រីសាធារណសិក្សា និងវិចិត្រសិល្បៈ : ព្រះអង្គម្ចាស់ក្សត្រីនរោត្តម ប៉េង ប៉ោះយុគន្ធរ

-រដ្ឋមន្ត្រីការពារជាតិប្រៃសណីយ៍ និទូរ-គមនាគមន៍ : ស៊ីសុវត្ថិ ស៊ីរីមតៈ

-រដ្ឋមន្ត្រីយុត្តិធម៌ : តុង អូនម៉ម

-រដ្ឋមន្ត្រីសេដ្ឋកិច្ចជាតិ និងសាធារណការ : ស៊ឹម វ៉ា

-រដ្ឋមន្ត្រីហិរញ្ញវត្ថុ : ដាញ់ សួន

-រដ្ឋមន្ត្រីមហាផ្ទៃ និងស្វ័យការពារ : ប្រាក់ សារិន

-រដ្ឋមន្ត្រីសាធារណសុខាភិបាល-សង្គមកិច្ច និងការងារ : សាម សុង ហ្វៀណង់ដេស

ថ្ងៃទី២៧ ខែមករា បង្កើតក្រុមប្រឹក្សាជាតិមានសមភាពមកពីក្រុមសភាចាស់ ។

ថ្ងៃទី៩ ខែកុម្ភៈ ផ្តើមរាជបូជនីយកិច្ច ដើម្បីឯករាជ្យកម្ពុជា ដោយសម្តេចនរោត្តមសីហនុ ។ ព្រះអង្គបានប្រគល់រាជានុសិទ្ធិថ្វាយព្រះបីតាព្រះនាមសុរាម្រិត ហើយហាងចេញទៅប្រទេសបារាំង ។ ទៅដល់បារាំងភ្លាមរដ្ឋាភិបាលបានបិទសមាគមនិស្សិតខ្មែរចោល តាមការស្នើរបស់សម្តេចនរោត្តមសីហនុ ។

ថ្ងៃទី២៥ ខែមីនា សម្តេចសីហនុ បានជួបជាមួយលោកប្រធានាធិបតីបារាំង វ៉ាំងសង អូរីយ៉ូល តែព្រះអង្គពុំបានទទួលជោគជ័យក្នុងការទាមទារឯករាជ្យឱ្យកម្ពុជាទេ ។

ថ្ងៃទី១៣ ខែមេសា សម្តេចសីហនុ បានចាកចេញពីប្រទេសបារាំង ឆ្ពោះទៅកាណាដា ទៅសហរដ្ឋអាមេរិក និងទៅជប៉ុន ដើម្បីស្វែងរកការគាំទ្រដល់ព្រះរាជបូជនីយកិច្ចរបស់ព្រះអង្គ ។ ថ្ងៃ៦កក្កដា ឆ្នាំ១៩៥២

លិខិតសមាគមនិស្សិតខ្មែរ AEK នៅប្រទេសបានសរសេរថ្កោលទោស ពីការរំលំ រដ្ឋាភិបាលគណបក្សប្រជាធិបតេយ្យ ចុះហត្ថលេខាដោយ ហ៊ូ យន់ ។

ខែសីហា នៅក្នុងព្រឹត្តប័ត្រសមាគមនិស្សិត សាឡុតស បានចុះផ្សាយអត្ថបទដំបូងរបស់ខ្លួននិយាយអំពី"រាជានិយម ទៅបដិវត្តបារាំង រុស្ស៊ី ចិន ដោយប្រើឈ្មោះថា "ខ្មែរដើម" ។

ថ្ងៃ២៤ កញ្ញា ចលនា ឥស្សរៈពីរក្រុមរួមកំលាំងគ្នា ។

**តទៅលេខក្រោយ**




# អត្ថបទស្តីអំពីខន្ធ៥ និងសមាធិវិប្បសនា

***ដោយ : ម៉ៅ ច័ន្ទសំណុំ***

ខ្ញុំប្រើវិធីនេះជា ច្រើនថ្ងៃ មុនពេលឡើងតុលាការ ។

ដល់ថ្ងៃឡើងតុលាការមន្ត្រីនោះសួរខ្ញុំថា "តើអ្នកចង់មិនឱ្យ John (ចោរ) នេះមានមុខនៅទីនេះឬ ? ពេលនោះចោរអមដោយប៉ូលិសឈរប្រមាណ៣ Ft ពីខ្ញុំ ។ ខ្ញុំឆ្លើយថា "ទុកឱ្យគាត់នៅទីនេះចុះ ខ្ញុំអាចម្ចាស់ការនិយាយដោយគ្មានញាក់ញ័រ ក្លាហានអស្ចារ្យមែន ។ តុលាការកាត់ទោសចោរជាប់គុក៦ខែ" ។

រកបទពិសោធន៍ជាច្រើនទៀត ដែលខ្ញុំពុំអាចលើកមករៀបរាប់ទីនេះបាន ។ លោកគ្រូ SN GOENKA មានប្រសាសន៍ដោយ សារុន ថា សមាធិវិប្បសនាថា សិល្បៈនៃជីវិត (Art of Liv-ing) ។ កាន់តែប្រតិបត្តិទៅកាន់តែឃើញចំណុច នេះច្បាស់ឡើង ។

**VII. ខន្ធទី៥ : វិញ្ញាណខន្ធ (Vinnana = Con-sciouness) :**

ក្នុងទ្រឹស្តីព្រះពុទ្ធសាសនា វិញ្ញាណខន្ធនេះមានចែកជាពីរ គឺទី១. វិញ្ញាណខន្ធបរិសុទ្ធ (Pure Consciouness) និងទី២. វិញ្ញាណខន្ធលាយឡំ ដោយជំពូកចិត្តផ្សេង (Pure Consciouness + Mental State & Mental Factors) ។ ដើម្បីយល់អត្ថន័យនេះ ខ្ញុំសូមជូនឧទាហរណ៍ដូចជាមនុស្សម្នាក់មើលដើមឈើមួយដើម :

១-ប៉ុន្មានវិនាទីដំបូង, ពេលបើកភ្នែកភ្លាម, មនុស្សនេះឃើញតែដើមឈើសុទ្ធសាត (ព្រឹត្តិការនេះរហ័សណាស់) មនុស្សសាមញ្ញពិបាកនឹងសំគាល់បានឡើយ ។ ពេលនេះមនុស្សពិសោធន៍វិញ្ញាណខន្ធបរិសុទ្ធ ។

២-បន្ទាប់មកភ្លាម១នោះ សញ្ញាខន្ធចាប់ផ្តើមបញ្ជូនព័ត៌មានមកផៃលើនៃចិត្តដូចជាថា យី ! ដើមឈើនេះដូចជាដើមពោធិ៍ ដែលព្រះពុទ្ធលោកធ្លាប់បានត្រាស់ដឹងទីនោះ បើអាត្មាអញទៅទីនោះ អង្គុយសមាធិបានផលណាស់, សង្ខារខន្ធប្រតិកម្មភ្លាមថា បីតិសោមនស្ស ។ (វិញ្ញាណបរិសុទ្ធ+ការចងចាំ+ការពិចារណា+សង្ខារខន្ធប្រតិកម្ម) ។

វិញ្ញាណបរិសុទ្ធនេះ គឺជាវិញ្ញាណដែលគ្មានប្រឡាក់ប្រឡូសនឹងអ្វីទាំងអស់វិញ្ញាណដែលគ្មានប្រតិកម្ម ។ បើមើលដើមឈើឃើញតែដើមឈើបើមើលភ្នំឃើញតែភ្នំ បើមើលទន្លេឃើញតែទន្លេ ។ ព្រះសង្ឃចិនមួយអង្គលោកអង្គុយសមាធិបានកំរិតខ្ពស់ហើយលោកបានសរសេរកំណាព្យមួយដ៏ល្បីល្បាញ "ទឹកបឹងនឹងថ្កល់កង្កែបលោតប្លូក !" កំណាព្យនេះល្បី ពីព្រោះព្រះសង្ឃអង្គនេះលោកមើលឃើញធម្មជាតិជាធម្មជាតិ ។ បើមនុស្សសាមញ្ញវិញ ពុំអាចយល់បានថា ហេតុអ្វីកំណាព្យនេះមានន័យ ព្រោះបើជននេះមើល ិដ្ឋភាពដូចព្រះសង្ឃនេះ គាត់នឹងនិយាយថា ទីនេះជាទីមនោរម្យសំរាប់គូស្នេហ៍សារសងគ្នា ឬក៏ជាកន្លែងដែលអ្នកគូចង់បានបំផុត ។ល។ បើមនុស្សទៅដល់វិញ្ញាណបរិសុទ្ធនេះហើយមនុស្ស គ្មានអរ គ្មានភ័យ គ្មានព្រួយគ្មានទុក្ខគ្មានសប្បាយ ។ គេនឹងជួបភាពសុខក្សេមក្សាន្ត ស្រោចស្រពសព្វរូបកាយ ហើយមានមេត្តាករុណាឥតព្រំដែន ។

តាមពិតវិញ្ញាណបរិសុទ្ធនេះ មនុស្សពិសោធន៍រាល់ថ្ងៃ ប៉ុន្តែមនុស្សពុំដឹងទាល់តែសោះ ។ អ្នកប្រាជ្ញទំនើបជាច្រើនរូបបានស្រាវជ្រាវអំពីរឿងនេះ ហើយបញ្ជាក់ថា មនុស្សពិសោធន៍វិញ្ញាណបរិសុទ្ធនេះ នៅពេលភ្ញាក់ពីដេក ពេលដឹងខ្លួនភ្លាម១ប៉ុន្មានវិនាទីដំបូងនោះ ។ បន្ទាប់មកវិញ្ញាណបានប្រែក្លាយហើយ ព្រោះសញ្ញាខន្ធចាប់ផ្តើមធ្វើការចាប់ផ្តើមបញ្ជូនព័ត៌មានពីស្តុករបស់គេមក ។ ពេលនេះមនុស្សចាប់គិតដូចជាយប់មិញអញយល់សប្តិឃើញអ្វី ? អូ ! មើលទៅឆ្នោតចេញលេខនេះ ឬនោះហើយ ! អាំ ! ភ្លេចឱ្យឈឹងអញ ត្រូវជួបលោក សុខ ព្រឹកនេះ ! ចុះអញនឹងនិយាយអ្វីជាមួយគេ ? ប្រហែលគេនៅខឹងនឹងអញទេមើលទៅ ! អូ ! ដល់ម៉ោងជូនកូនទៅរៀនហើយ... មនុស្សនិយាយខាងក្នុងចិត្តរហូត គ្មានឈប់ឈរវិញ្ញាណដ៏បរិសុទ្ធនោះត្រូវល្អក់ ព្រោះត្រូវបូកបន្ថែមនូវរលកព័ត៌មានពីសញ្ញាខន្ធ និងការប្រតិកម្មពីសង្ខារខន្ធ ។ សោកនាដកម្មរបស់មនុស្សលោកយើងនេះ គឺមនុស្សរស់នៅតែជាមួយនឹងស្រមោលពីអតីតកាល និងការប៉ាន់ស្មានទៅពេលខាងមុខដែលផ្តល់ដោយខន្ធសញ្ញានេះ ហើយប្រតិកមទៅរកពីមួយ១ទៅមួយដូចគ្រាប់បែកផ្ទុះ ប្រតិ-កម្មតាមរាងកាយជាស្រ្តេះញ័របេះដូង ។

**(តទៅលេខក្រោយ)**

# បារ៉ាក់ នឹងហ៊ីឡារីការប្រកួត នៅតែក្ដៅ

•••ភ្នែកនៃអាមេរិកាំង នាំគ្នាងាកទៅផ្ដោត អិនឌីយ៉ាណាម្ដងវិញ បន្ទាប់ពីបារ៉ាក់ ចាញ់ឆ្នោត ហ៊ីឡារី នៅផែនស៊ីវេញ៉ាមក។ ចាញ់មែនតែឆ្នោតនៅតែ បារ៉ាក់ ឈ្នះសម្លេងសរុបនៅឡើយ ហេតុនេះហើយបានជាអិនឌីយ៉ាណា លោកស្រី ហ៊ីឡារី បានខិតខំយកជ័យជំនេះ

( តទៅទំព័រទី១១ )


John Mcaim (Repuplican Party)


Hillary Clinton (Democratic Party)


Obama (Democratic Party)

## ទុរេនកំពតមានរសជាតិឆ្ងាញ់ និងលក់....

វាល្អមកបណ្ដុះខ្លួនឯងក៏បាន ។ ប៉ុន្ដែក្នុងចំណោមទុរេន ដែលផ្សាំ និងបណ្ដុះកូន គឺ ទុរេន ផ្សាំឆាប់ឱ្យផ្លែជាងមានអាយុពី៦ខែទៅ៨ឆ្នាំ ទើបចាប់ផ្ដើមផ្លែ ។ រីឯការបណ្ដុះគ្រាប់វិញរយៈពេល១០ឆ្នាំទើបផ្លែ ហើយវាឱ្យផលរហូតដល់ពី៣០ទៅ៥០ឆ្នាំ ។

ទាក់ទិននឹងបញ្ហាការ ដាំដុះនេះ លោក ខៀវ សារឿន បានឱ្យដឹងថាគេត្រូវជីករណ្ដៅជម្រៅ ១ម x ៤ម ហើយកំណត់ពីរណ្ដៅ ១ ទៅរណ្ដៅ១ ចំងាយពីគ្នា ៨ទៅ១០ម៉ែត្រ រួចគេប្រមូលសំរាមមកដាក់ក្នុងរណ្ដៅឱ្យពេញរួចដុត វាយកដីដែល នៅជិតមាត់រណ្ដៅដាក់ឱ្យជិតពេញរួចស្រោចទឹកវាឱ្យសើមល្មម។


និមិត្តសញ្ញារបស់ផ្លែទុរេនរបស់ខេត្តកំពត

ពេលដាំហើយត្រូវធ្វើរបាំងព័ទ្ធជុំវិញកុំឱ្យត្រូវខ្យល់ ដោយទុករយៈពេលពីរឆ្នាំ គឺមើលថែទាំកុំមាន ដង្កូវ និងសត្វល្អិតស៊ី ព្រមទាំងស្រោចទឹកឱ្យជិតដល់ដាក់ដីអាចម៍គោលាយជាមួយអាចម៍ប្រចៀវ ។ នៅពេលបាន ៥ ទៅ៦ឆ្នាំ ត្រូវយកលួសមកចងដើមវា ដើម្បីការពារកុំឱ្យខ្យល់បក់រលំទុរេនចាប់ផ្ដើមផ្លែ ដោយត្រូវថែរក្សាដោយប្រុងប្រយ័ត្នកុំឱ្យដង្កូវស៊ីបេះផ្កាចុងមែកចោល ព្រោះបើទុកវាផ្លែមិនល្អហើយ ធ្វើឱ្យទន់ដើមទុរេន ។

ចាប់ផ្លែពីខែមីនា ដល់ខែកក្កដា ទុរេន កំពតមិនពិបាកក្នុងការលក់ដូរនោះទេ ព្រោះមានអតិថិជន និងឈ្មួញជាច្រើនបានស្គាល់ពីរសជាតិរបស់វាក្នុងមួយរដូវៗអ្នកស្រុកអាចលក់ទុរេននៅចំការមុខផ្ទះខ្លះ និងផ្ញើតាមរថយន្ដទៅអតិថិជនតាមទូរស័ព្ទក៏បាន។

លោក ខៀវ សារឿន បានបន្ថែមទៀតថា ទុរេន ដែលផ្លែក្នុងរដូវ១គីឡូក្រាមតំលៃ១ដុល្លារ ដែល ១ ផ្លែមានទម្ងន់ពី២ ទៅ៥គីឡូក្រាម ហើយ ទុរេន មួយដើមអាចផ្លែពី ១០០ផ្លែ ទៅ២០០ផ្លែ ទៅតាមប្រភេទល្អ ឬមិនល្អ ។ ដោយក្នុងមួយរដូវ ទុរេន លោកអាចរកប្រាក់ចំណូលបានពី៥០០០ដុល្លារ ទៅ៦០០០ ដុល្លារ ។

ចំណែកកញ្ញា ខា ស្រី អ្នកលក់ទុរេននៅផ្សារអូរឡាំពិក ក្រុងភ្នំពេញ បានឱ្យដឹងថា ទុរេន ទាំង នេះមានម៉ូយដឹកយកមកដល់ទីកន្លែង គឺខេត្តកំពត កំពង់សោម កំពង់ចាម ហើយទុរេនក្នុងរដូវតំលៃមួយគីឡូក្រាម ចាប់ពី ៤០០០ ទៅ៨០០០រៀល ចំណែកខែមិនសូវសម្បូរមួយគីឡូក្រាមតំលៃ ចាប់ពី១០.០០០ ទៅ១៣.០០០រៀល ។

នៅពេលណាទុរេនមិនសូវសម្បូរម៉ូយនាំមកពីប្រទេសវៀតណាម និង ថៃ ដើម្បីបំពេញតាមតម្រូវការរបស់អតិថិជន ។

នៅកំពត ក្រៅពីរសជាតិទុរេននោះ នៅមានអាហារសមុទ្រដ៏មានរសជាតិឈ្ងុយឆ្ងាញ់ទៀត ។ ជាពិសេសមានស្ងួនសត្វ ទឹកឈ្ងួរសំរាប់ងូតកំសាន្ដ ដែលទឹកហូរខ្ចបប្រាំង និងវស្សាមានភ្ញៀវទេសចរទៅយ៉ាងច្រើនកុះករនៅថ្ងៃបុណ្យទានម្ដងៗ ៕




**ហ៊ីឡារដែលហ៊ីយ៉ា : ម៉ម យឹម**

ប្រទេសជាតិខ្មែរ មានមកហូរហែ ច្រើនពាន់ឆ្នាំហើយ
ខ្មែរសាសន៍ពូកែ មិនធ្វើប្រងើយ ហើយមិនបណ្ដោ
ឱ្យចុះអន់ថយ ។

នៅពេលសម័យ អង្គរថ្លាថ្លៃ ជាតិខ្មែរលឿនលយ
លូតលាស់ច្រើនណាស់ ពេញពាសរៀបរយ ទីណាក៏ដោយ
ខ្មែរសាងប្រាសាទ ។

ប្រាសាទច្រើនពាន់ ស្ដេចគ្រប់ជំនាន់ ទ្រង់បានសង្ខាត
ខិតខំកសាង ទុកជាបទបាថ ឱ្យខ្មែរឱហាត
ហើយត្រូវចងចាំ ។

ទុជាភស្តុតាង ធ្វើជាតំណាង ចាំជាតិខ្មែរធំ
មានរិទ្ធិខ្លាំងណាស់ ជាតិខ្មែរឧត្តម ដោយមានមេនាំ
ល្អពិសេសពិត ។

ប្រាសាទច្រើនណាស់ ស្ថិតនៅពេញពាស ដែនដីពិសិដ្ឋ
ជាមហានគរ ជាដែនមានរិទ្ធិ ធំធេងនៅនិត
ជ្រៅសុវណ្ណភូមិ ។

ដោយសារប្រាសាទ សងយ៉ាងស្អាងស្អាត ល្អល្អះទាំងព្រម
រូបរាងសង្ហា ឈរយ៉ាងសក្តិសម ជាភាពឧត្តម
រុងរឿងអស្ចារ្យ ។

បើតាមប្រវត្តិ សាស្ត្រខ្មែរបានកត់ ហើយប្រាប់មកចាំ
ប្រាសាទទាំងអស់ សុទ្ធសឹងជាស្នា ដៃដ៏ខ្លាំងក្លា
ស្ដេចពីជាន់មុខ ។

ព្រះអង្គកសាង ទុកជាភស្តុតាង ឱ្យខ្មែរដឹងគុណ
ហើយខំការពារ ដោយចិត្តអត់ធន់ បេតិកភណ្ឌ
ដ៏ថ្លៃថ្លាណាស់ ។

ប្រាសាទទាំងអស់ បើរាប់ជាឈ្មោះ មុខជាដឹងច្បាស់
ជាប្រាសាទខ្មែរ ស្ថិតនៅពេញពាស មិនអាចជាតិខ្លះ
បំភន់បានឡើយ ។

ប្រាសាទដែលមាន នៅគ្រប់ទីស្ថាន សុទ្ធសឹងជាតិខ្មែរ
ខិតខំកសាង រួចខំទាំថែ ឱ្យនៅស្ថិតស្ថេរ
គង់វង្សប្រាកដ ។

តួយ៉ាងដូចជា ប្រាសាទសោភា នាមអង្គរវត្ត
ប្រាសាទបាខែង ប្រាសាទស្ទូព្រាត់ មាព្រៃប្រាសាទ
ប្រាសាទបាយ័ន ។

ប្រាសាទតាសោម ប្រាសាទភ្នំក្រោម ប្រាសាទនាគព័ទ្ធ
ប្រាសាទបាពួន ប្រាសាទព្រះខ័ន្ធ ប្រាសាទក្រវ៉ាន់
ប្រាសាទបាទជុំ ។

ប្រាសាទចាំក្រុង ចាំក្រុងប្រពៃ ប្រាសាទតាព្រហ្ម
ប្រាសាទមេបុណ្យ ប្រាសាទអកយំ ប្រាសាទទេពភ្នំ
ចៅសាយទេវតា។

ប្រាសាទនរាយ ប្រាសាទលលៃ ប្រាង្គបឹងមាលា
ប្រាសាទតាកែវ ប្រាសាទទឹកឆា ព្រះធាតុថ្មដា
អង្គរក្នុងក្រៅ។

( តទៅទំព័រទី១៣ )

## ថ្ងៃរំលឹកសេរីភាព...

លក្ខណៈឯករាជ្យ មានតុល្យភាព មិនលំអៀង ពុំបានត្រូវនាយកសារព័ត៌មានចាត់ទុកថា ជាសំខាន់បំផុតនោះទេ ។ ភាគច្រើនអ្នកនយោបាយបានយកកាសែតជាមធ្យោបាយយុទ្ធសាស្ត្រដើម្បីយកឈ្នះភាគីណាមួយដែលខ្លួនប្រឆាំង កាសែតរដ្ឋក៏មានតួនាទីឃោសនា តែអំពើល្អរបស់មន្ត្រីរដ្ឋាភិបាលតែប៉ុណ្ណោះ កាសែតឯកជនមួយចំនួនទៀតជាជម្រកនៃក្រុមកុម្មុយនីស្តលាក់មុខបង្កើតឡើងក្នុងតួនាទីយុទ្ធសាស្ត្របំភ្លៃការពិត បំបោ៉ងព័ត៌មានបំផ្លាញសត្រូវនៃទស្សនៈខ្លួន ហើយបំពេញចិត្តឱ្យវណ្ណៈអធន... ។ ក្នុងតួនាទីរបៀបនេះ បុគ្គលិកកាសែតជាច្រើនបានទទួលរងគ្រោះ ដោយការតាបសង្កត់ ឬសងសឹក ដោយពុំមានសាធារណៈជនណា ឬឯកជនណាជួយបានឡើយ ។

ឆ្នាំ ១៩៩៤ វិជ្ជាជីវៈបានផ្តើមចូលទៅកម្ពុជាជាមួយនឹងអ៊ុនតាក់ ដែលមករៀបចំបោះឆ្នោតសកលនៅស្រុកខ្មែរ ។ អ្នកជំនាញសារព័ត៌មានធំៗបានមកជួយកម្ពុជាស្តារវិស័យព័ត៌មាន ដោយបង្កើតមជ្ឈមណ្ឌលសិក្សាវិជ្ជាព័ត៌មានពាកន្លែង គឺនៅសមាគមអ្នកសារព័ត៌មានខ្មែរមួយនៅក្រសួងព័ត៌មានមួយ និងនៅសកលវិទ្យាល័យភូមិមិន្ទភ្នំពេញមួយ ។ គឺចាប់ពីពេលនោះហើយ ដែលយុវជនខ្មែរចាប់ផ្តើមយល់អំពីសារព័ត៌មានសេរី និង "សេរីភាពនៃសារព័ត៌មាន" មានន័យយ៉ាងណានោះ ។ មនុស្សជាច្រើនពាន់នាក់ទទួលនូវចំណេះជាអ្នកសារព័ត៌មាន ក៏ប៉ុន្តែសារព័ត៌មានខ្មែរភាគច្រើនពុំបានដកខ្លួនពីការគាំទ្រអ្នកនយោបាយទេ ។ ទោះជាកាសែត វិទ្យុ ទូរទស្សន៍ខ្មែរ ពុំបានងាកទៅរកវិជ្ជាជីវៈរបស់ខ្លួនក្តី ក៏កាសែតនៅតែជាការឱ្យសម្លេងដល់សាធារណជនយ៉ាងជាក់ស្តែង រហូតដល់អង្គការសហប្រជាតិប្រកាសនៅឆ្នាំ ១៩៩៦ ថា "វិស័យសារព័ត៌មាន គឺបេសកកម្មជោគជ័យតែមួយរបស់អង្គការសហប្រជាជាតិនៅឆ្នាំ១៩៩៣ នៅកម្ពុជា" ។

សេរីភាពនៃសារព័ត៌មាននេះត្រូវការពារដោយច្បាប់រដ្ឋមានសារសំខាន់ណាស់ សំរាប់ផ្តល់ដំណឹងដ៏ត្រឹមត្រូវ ដោយមិនខ្វះ ដោយគ្មានគំរាមគ្មានសំណូក គ្មានកាន់ជើងជូនសាធារណជន ។ អ្នកអាន ឬអ្នកស្តាប់ត្រូវការជឿថាការសរសេរនោះជាការពិត និងមិនលំអៀង បើគេជឿលើអ្នកសរសេរនោះហើយ ព័ត៌មាននោះ នឹងក្លាយទៅជាចំណេះក្លាយជាចំណងមេត្រីរបស់សហគមន៍ ហើយចុងក្រោយបង្អស់ក្លាយទៅជាអភិវឌ្ឍន៍ ។ រីឯការពិតមួយចំនួននោះ មិនច្បាស់ជាអាចលើកមកនិយាយបានទាំងអស់នោះទេ ហេតុនេះគេត្រូវគោរព "ក្រមសីលធម៌" ថែមទៀត ។

កាសែតខ្មែរមិនថា តែនៅកម្ពុជាទេ នៅក្រៅស្រុកក៏មិនបានប្រើវិជ្ជាជីវៈជាអ្នកសារព័ត៌មានដែរ គេប្រើសំរាប់ហែកហួរគ្នាសំរាប់ឈ្នះគ្នា ឬប្រើសំរាប់បំរើលុយ ។ គេពុំបានដឹងទេថា ទង្វើនេះនឹងធ្វើឱ្យអ្នកអានបែកបាក់គ្នាចេះតែសង្ស័យគ្នា... ។ ហើយគេនាំគ្នាដើរត្រឡប់ទៅរកសម័យមុនឆ្នាំ១៩៩៤វិញភ្លាម ។

កាសែតដែលស្រឡាញ់ការពិតចេះជួយយកអាសារ ចេះការពារអ្នករងគ្រោះ ឬកុមារ ឬមនុស្សចាស់ ជាកាសែតរុងរឿងនាំសង្គមឱ្យវឌ្ឍមាន គឺជាកាសែតដែលសង្គមខ្មែរត្រូវការឱ្យមកបំរើសហគមន៍ខ្លួនបាន បើពុំនោះទេត្រូវចៀសវាងអានកាសែតដែលបំផ្លាញខ្លួនឯង និងសហគមន៍ខ្លួន ។ នេះជាអត្ថន័យនៃសេរីភាពសារព័ត៌មាន ៕

## បារ៉ាក់ នឹងហ៊ីឡារីការប្រកួត នៅតែក្តៅ

នៅតំបន់សម្បូរអាមេរិកាំង ស្បែកខ្មៅ ជាថ្មីម្តងទៀត ។

នៅឱកាសចុងក្រោយនេះ សម្លេងស្ទង់មតិខាងលោកស្រី ហ៊ីឡារី បានត្រឡប់ឡើងខ្ពស់មកវិញ នៅពេលអ្នកកាសែតសួរថា "តើបេក្ខជនណាមួយ ដែលអាចយកឈ្នះ ជនម៉ាគេនបាន"លើកនេះ ហ៊ីឡារី បានចម្លើយ៥០% ទល់នឹងបេក្ខជន ម៉ាគេន ដែលបានតែ៤២% រីឯលោក បារ៉ាក់ វិញ បាន៥២% ទល់នឹង ជនម៉ាក់គេន បាន ៤៨% ។

នៅពេលដែលសារព័ត៌មានខ្មែរប៉ុស្តិ៍កំពុងចូលទៅរោងពុម្ពនៅអ៊ិនឌីយ៉ាណា ឯណោះមានការរំជើបរំជួលនៃអ្នកបោះឆ្នោតថ្មីថ្មោងម្តងទៀត ហ៊ីឡារី នឹងបារ៉ាក់ មិនដឹងជាត្រូវបញ្ចប់ការឃោសនារបស់ខ្លួនយ៉ាងណានៅឡើយទេ ដោយការប្រកួតនៅប្រកៀកគ្នាខ្លាំងពេក ហើយយើងក៏ ពុំមានលទ្ធផលថ្មីមកជម្រាបជូនជាចុងក្រោយបង្អស់បានដែរ ។

នេះជាឱកាសល្អសំរាប់លោកជន ម៉ាគេន នៃគណបក្សសាធារណៈរដ្ឋសំរាប់ឃោសនាដោយគ្មាននរណាប្រឆាំង នឹងលោកនៅឡើយ ៕

## លោក អ៊ិន សុផុន អ្នកពលិកម្ម...

ក្នុងឋានៈជាប្រធានសមាគមន៍លោកបានសំរេចសមិទ្ធិផលដ៏លេចធ្លោមួយ នោះគឺជាផ្ទះមួយខ្នងមានកំពស់បីជាន់តំលៃជាងសែសិបម៉ឺនដុល្លារ បានក្លាយទ្រព្យសម្បត្តិរបស់សមាគមន៍ខ្មែរនោះជាលទ្ធផលដែលមិននឹកស្មានដល់ ។ ផ្ទះសមាគមន៍ខ្មែរ ដែលជាស្នាដៃរបស់លោក អ៊ិន សុផុន មិនត្រឹមតែបង្ហាញពីមោទនភាពខ្មែរក្នុងរដ្ឋដ៏តូចនោះទេ ពេលបច្ចុប្បន្ននេះគឺបានកំពុងរកប្រាក់ចំណូលបានជិតបីពាន់ដុល្លារ ក្នុងមួយខែសំរាប់ចិញ្ចឹមគណនេយ្យរបស់សមាគមន៍បច្ចុប្បន្នទៀតផង ។

ប៉ុន្តែដោយសារការលះបង់ដើម្បីខ្មែរប្រជាប្រិយភាព លោក អ៊ិន សុផុន គឺនៅក្នុងចិត្តរបស់ប្រជា-



Property of Cambodia Society of RI

ពលរដ្ឋខ្មែរ ក្នុងរដ្ឋរ៉ូដអៃឡិន្តជានិច្ច ។ លោកយាយលោកតានៅគ្រប់វត្តពលរដ្ឋខ្មែរក្មេងចាស់ព្រះសង្ឃតែងប្រាថ្នាឱ្យលោក អ៊ិន សុផុន វិលមកឈរឈ្មោះជាប្រធាន និងដឹកនាំសមាគមន៍ក្នុងអាណត្តិថ្មីខាងមុខនេះ ព្រោះគេមើលឃើញថា លោក សុវណ្ណ ឈូក បានត្រឹមតែដើរនិយាយអួតអត់បានការ ឡូឡានិយាយច្រើន គ្មានប្រយោជន៍ និងមិនបានធ្វើអ្វីតាមការពាក្យសន្យា កាលពីការបោះឆ្នោតទាល់តែសោះ លោក អ៊ិន សុផុន គឺជាអតីតនាយទាហានសាធារណៈរដ្ឋធ្លាប់បានទៅបំពេញកម្មសិក្សានៅប្រទេលជប៉ុន និងអាមេរិក ក្នុងសតវត្សរ៍ឆ្នាំ ៧០ ។ បច្ចុប្បន្នលោកមានវ័យចាស់បន្តិចមែន តែមានកំលាំងមាំមួន ហើយក៏បានប្រកបមុខរបរជាជាងជួសជុលផ្ទះផង ជាអនុប្រធានគណៈកម្មាធិការវត្តធម្មាការ៉ាមផង និងក៏នៅបន្តជួយកិច្ចការសង្គមជាច្រើនក្នុងរដ្ឋរ៉ូដអៃឡិន្តផងដែរ ។ ដោយសារតែនៅជាប់ជំពាក់អាល័យជាមួយនឹងផ្ទះរបស់សមាគមន៍ លោក អ៊ិន សុផុន តែងតែចេញចូលមើលការខុសត្រូវ និងជួយជួសជុលជាប្រចាំ ។ ខ្មែរអ្នកជួលផ្ទះសមាគមន៍បាននិយាយប្រាប់ខ្មែរប៉ុស្តិ៍ថា "កុំតែបានលោកពូអតីតប្រធាននេះហើយ ដែលជួយមើលការខុសត្រូវជួយជួសជុស បើសង្ឃឹមអ្នកជាប់ឆ្នោតថ្មីកុំថា ឡើយមកអួតពេលមានការទូរស័ព្ទហៅផងក៏មិនលើកដៃ តែបើដល់ខែមកយកលុយ ទើបឃើញមុខ" ។ លោក អ៊ិន សុផុន បាននិយាយទាំងទឹកមុខស្មើរថា "ផ្ទះនេះខ្ញុំធ្លាប់ដើរយាមរាប់ខែទំរាំតែជួសជុលហើយ និងបើកពិធីសម្ពោធទទួលចាំផ្លូវពីចៅហ្វាយក្រុង ដូច្នេះ គឺខ្ញុំពិតជាមានអនុស្សាវរីយ៍ជាមួយមែន ហើយណាមួយផ្ទះនេះជាប់ជាមួយវត្តខ្មែរ ដែលខ្ញុំធ្វើការនៅទីនោះស្រាប់ ដូច្នោះការធ្វើការដើម្បីខ្មែរខ្ញុំពិតជាមិននឿយហត់ទេ" ។ លោក សារ៉ាត សាយ ដែលបច្ចុប្បន្នជាអគ្គលេខាធិការសមាគមន៍ខ្មែរ ក្នុងរដ្ឋរ៉ូដអៃឡិន្ត បានទទួលស្គាល់ "សព្វថ្ងៃនេះ សមាគមន៍ខ្មែរ ពិតជាមានការលំបាកមែនដោយសារអ្នកដឹកនាំមិនយកចិត្តទុកដាក់ពីកិច្ចការរបស់សមាគមន៍ ។ លោកបន្តថា កិច្ចការថែរក្សាផ្ទះសម្បែង ពិតជាបន្ទុកដ៏ធ្ងន់ធ្ងរមួយ ដែលលោក អ៊ិន សុផុន កំពុងរែកតែម្នាក់ឯងមែន ។ លោកបានបន្តទៀតថា "ទាក់ទងរឿងលុយកាក់លោកមានការកោតសរសើរ លោក យ៉ឹន សារី ដែលជាអតីតអគ្គហេរញ្ញិករបស់សមាគមន៍ខ្មែរអាណត្តិមុន" ។ លោកបន្តទៀតថា "លោក យ៉ឹន សារី តែងបានផ្តល់របាយការណ៍ចាយវាយជាប្រចាំ និងច្បាស់លាស់សូម្បីមួយកាក់មួយសេន ហើយក៏មិនមានការពិបាកស្នើរសុំថវិកាចាយវាយសំរាប់កិច្ចការសមាគមន៍ដែរ"។

លោក អ៊ិន សុផុន បានបញ្ជាក់ការប្តេជាចិត្តថា "ក្នុងអាណត្តិក្រោយ បើលោកទទួលបានការគាំទ្រជាប់ជាប្រធានសមាគមន៍លោកនិងមិនបន្តជួលផ្ទះធ្វើការិយាល័យទៀតទេ" ។ លោកបន្តថា "ការចំណាយលើថ្លៃការិយាល័យ និងបង់ថ្លៃទឹក និងភ្លើង តែគ្មានសកម្មភាពជួយខ្មែរ គឺជាការចាយខ្ជះខ្ជាយអត់ប្រយោជន៍" ៕



# Education

Quiz Your Knowledge
About the High School Drop out Rate

**សូមបំពេញចន្លោះតាមចំណេះរបស់អ្នក ស្តីពីចំនួនសិស្សបោះបង់វិទ្យាល័យ**

1. There are more than __________ American high school students who drop out every year.

2. Nearly ______ of all public high school students, and nearly _____ of all African Americans, Hispanics and Native Americans, fail to graduate from public high school with class.

3. There are nearly 2,000 high schools in the U.S. where ______ percent of the typical freshman class leaves school by its senior year.

4. Dropouts earn ________ less per year than high school graduates and more than less over _______ a lifetime than college graduates.

5. Dropouts were more than _________ as like as high school graduates to slip into poverty in a single year and ________ times more likely than college graduates to be unemployed.

6. Dropouts are _________ likely than high school graduates to be unemployed, in poor health, living in poverty, on public assistance, and single parents with children who drop out of high school.

7. Dropouts are ________ times as likely to be in jail or prison as high school gradates.

8. Dropouts are __________times less likely to volunteer than college graduates, ________ less likely to vote or participate in community projects, and represent only ________ of actively engaged citizens in the U.S. today.

9. The government would reap $45 billion in extra tax revenues and reduced cost in public heath, crime, and welfare payments if the number of high school dropouts among 20-year olds in the U.S. today, which numbers more than _________ individuals, were cut in half.

10. The dropout problem is likely to _________ substantially through 2020 unless significant improvements are made.

### Word Bank

| | | | | |
|---|---|---|---|---|
| One million | One-third | One half | 40 | $9,200 |
| $1 million | Twice | Three | Eight | More |
| Four | Twice | 700,000 | 3 percent | Increase |

Correction Answers: (1) 1 million; (2) 1/3, ½; (3) 40 percent; (4) $9,200; (5) twice, three; (6) more; (7) 8; (8) 4, 2, 3; (9) 700,000; (10) increase.

# Opinion Section

Campaign 2008: The Choice for Cambodian Americans

I am a first-generation American whose family came to the United States as refugees fleeing the genocide in Cambodia. Like many immigrant families, my family struggled to achieve the American dream. And like all immigrant families, we want to contribute to a better future for this country.

There is one candidate for president of the United States who I believe can personally identify with this experience and who can lead America in a new direction. It is not the candidate who is an advocate for the policies of the past eight years. It is not the candidate who seems to regard the presidency as her entitled birthright. I support the candidate who has demonstrated that he understands the struggles of Americans of all backgrounds, including mine: Senator Barack Obama.

We Asian Americans have grown accustomed to being taken for granted or overlooked in presidential elections. And as Cambodian Americans, we hardly register on the radar of candidates from either party.

This year is a chance to change that. Never before have we had the opportunity to elect a candidate who has Asian Americans in his immediate family. A candidate who himself spent part of his childhood in Southeast Asia. A candidate who was born and came of age in the state with more Asian Americans than any other. Of all three presidential candidates, only Barack Obama can say that he understands the vicious wound of racial discrimination firsthand. And only he has worked to fight discrimination as a civil-rights lawyer and community organizer.

Barack Obama personifies the American dream that many of us are part of. He knows what it means to love America even more because of roots in another continent.

But Barack Obama's life story is not the most compelling reason to vote for him. Senator Obama has shown that he cares about the issues that matter to Cambodian Americans, to Asian Americans, and to all Americans who care about the future of our country. Of importance to Cambodian Americans, he cares about regaining America's honor abroad through fundamental improvements in our foreign policy throughout the world. This includes doing more to prevent genocides, such as the one we remember in Cambodia, the one that festered unchecked in Rwanda as Bill Clinton sat idly by, and the one George Bush has allowed to happen right now in Darfur. The sincerity of Senator Obama's concern about genocide was clear to me when I heard that he had not only read the award-winning book "A Problem from Hell: America and the Age of Genocide" but had also contacted the author to discuss the role of the United States in stopping genocides.

Obama's compassion, however, is also matched by his record on international issues, unlike his rivals. Unlike Senator Clinton, Senator Obama was from the very start against the needless war in Iraq-a war that has cost our nation dearly in lives and in dollars. Barack Obama has the judgment and temperament to craft a solution to this difficult problem that George Bush got us into, that Hillary Clinton voted for, *continue page18*

# រមណីយដ្ឋានកាំពីជាអន្លង់ផ្សោតច្រើនជាងគេ

***ក្រចេះ : ម៉ី សម្ផស្ស***

អតីតរាជធានីពីបុរាណនៅសម័យចេនឡា ត្រូវបានបុព្វបុរសយើងកសាងនៅ សម្បុរៈលើទឹកដីខេត្តក្រចេះ ដែលសម្បូរទៅដោយធនធានធម្មជាតិ ប្រាង្គប្រាសាទ និងរមណីយដ្ឋានយ៉ាងច្រើនសន្ធឹកសន្ធាប់ ដើម្បីទាក់ទាញភ្ញៀវទេសចរពីគ្រប់មជ្ឈដ្ឋាន ឱ្យទៅទស្សនា ព្រមទាំងជួយលើកកម្ពស់ជីវភាពអ្នកស្រុកបានមួយកម្រិតថែមទៀត ។



ត្រីផ្សោតកំពុងតែហែលបង្អួតភ្ញៀវទេសចរ

ក្នុងចំណោមកេរដំណែលទាំងនេះ គេសង្កេតឃើញអន្លង់ផ្សោតកាំពីដែលជារមណីយ ដ្ឋានដ៏ចំណាស់មួយមានទិដ្ឋភាពដ៏ល្អត្រកាលមានទឹកថ្លាឈ្វេង ហើយសត្វផ្សោតតូចធំហែលប្រជែញគ្នាក្នុងទឹកទន្លេគួរឱ្យគយគន់ ដែលមិនធ្លាប់ឃើញពីមុនមកសោះ ព្រមទាំងបានទាក់ទាញអារម្មណ៍ភ្ញៀវទេសចរជិតឆ្ងាយឱ្យទៅកំសាន្តសប្បាយនៅថ្ងៃបុណ្យទាន ។

ភ្ញៀវរាប់ម៉ឺននាក់ ដែលនាំគ្នាទៅកំសាន្តក្នុងបំណងងូតទឹកលេង និងទស្សនាហ្វូងសត្វផ្សោត ដែលកំពុងតែហែលប្រជែញគ្នានៅក្នុងទឹកក្នុងឱកាសបុណ្យទានម្តងៗ ។

រមណីយដ្ឋានអន្លង់ផ្សោតកាំពីយើងអាចធ្វើដំណើរទៅកំសាន្តតាមដងទន្លេមេគង្គ ដោយទូក ឬ កាណូត ឬក៏ធ្វើដំណើរតាមម៉ូតូ រថយន្តចេញពីទីរួមខេត្តឆ្ពោះទៅទិសខាងជើងតាមបណ្តោយផ្លូវជាតិលេខ៧ប្រមាណ១៥គីឡូម៉ែត្រនឹងទៅដល់ទីនោះ ដែលមានទិដ្ឋភាពចំឡែកគួរឱ្យគយគន់ និងចាប់អារម្មណ៍យ៉ាងខ្លាំង ។

នៅលើផ្ទៃទឹកគេសង្កេតឃើញមានទឹកពុះពណ៌សក្បោះនៃដងទន្លេមេគង្គពុះញ្ច្រៀក ជាចំណែកពំនូកជាកោះរាប់ម៉ឺនមានថ្មព័ទ្ធជុំវិញ ដែលលំអទៅដោយទឹកថ្លាឈ្វេង ព្រមទាំងមានរុក្ខជាតិដើមរាំងដុះជាគុម្ពពណ៌ខៀវស្រងាត់ ក្បែរបរិវេណនោះ ផ្តល់ជាម្លប់ត្រជាក់កាយ សប្បាយចិត្តអស់នូវទុក្ខកង្វល់ក្នុងអារម្មណ៍ពេលអ្នកទេសចរ បានឃើញទិដ្ឋភាពនៅទីនោះ ។

រមណីយដ្ឋាននេះ ជាជម្រកសត្វផ្សោតតែមួយកន្លែង ដែលអ្នកទេសចរនិយមទៅទស្សនាចាប់ពីខែមករាដល់ខែឧសភា ។ នៅរដូវចូលឆ្នាំខ្មែរមានមនុស្សរាប់ម៉ឺននាក់ បាននាំក្រុមគ្រួសារ មិត្តភក្តិទៅទស្សនានៅទីនោះ ដោយភ្ញៀវខ្លះអង្គុយលើច្រាំងរង់ចាំមើលសត្វផ្សោតហែលប្រជែញគ្នា ។ ភ្ញៀវខ្លះទៀតជួលកាណូតជិះទៅកណ្តាលទន្លេ និងកោះទៅបណ្តែតអារម្មណ៍ឱ្យកាន់តែសប្បាយរីករាយអស់ទុក្ខកង្វល់ទាំងពួង ។

បន្ទាប់ពីទៅកំសាន្តហត់អស់កំលាំងមកអង្គុយលេងក្រោមម្លប់ឈើ ឬទៅអង្គុយទទួលទានអាហារគ្រប់មុខនៅតាមរោងស្តង់ទឹក ដែលសង់នៅជាប់គ្នារជីករង់ចាំទទួលភ្ញៀវគ្រប់ពេលវេលាក្នុងតម្លៃសមរម្យ ។ ទីជំរកអន្លង់ផ្សោតនេះមានជំរៅពី ០.៥ម៉ែត្រទៅ១.៣០ម៉ែត្រ អាចឱ្យភ្ញៀវចុះហែលទឹកបានស្រួលមានទឹកថ្លាឈ្វេងឆ្លុះឃើញបាតដី ហើយទឹកហូរលឿនតែមិនបង្កគ្រោះថ្នាក់ដល់ភ្ញៀវទេសចរម្តងណាសោះឡើយ ។ នៅទីនោះមានប្រជុំកោះតូចៗជាច្រើន និងមានវាលខ្សាច់ពណ៌សសំរាប់លំអឱ្យកាន់តែមានសោភ័ណភាពមួយកម្រិតថែមទៀត ។



ភ្ញៀវទេសចរកំពុងហែលលេងនៅក្បាលកាំពី

មន្ត្រីអភិរក្សអន្លង់ផ្សោតកាំពីនេះ បានឱ្យដឹងថា ភ្ញៀវទេសចរ ដែលមកទស្សនាខេត្តក្រចេះ ហើយមិនដែលខកខាន មកកំសាន្តសប្បាយនៅទីនេះទេ គឺមានភ្ញៀវមកពីគ្រប់មជ្ឈដ្ឋានមិនថា ជិត ឬឆ្ងាយ តែងតែមកងូតទឹកកំសាន្តគយគន់សត្វផ្សោតជារៀងរាល់ថ្ងៃ ហើយផ្សោតទីនេះ ប្រហែល២៥ក្បាល ។

ចំណែកភ្ញៀវទេសចរបរទេសចំរុះជាតិសាសន៍មានចំនួនច្រើន នៅពេលមកកំសាន្តម្តងៗតែងតែជួលកាណូតជិះបណ្តែតអារម្មណ៍លើផ្ទៃទឹកទន្លេមេគង្គមើលហ្វូងសត្វផ្សោតអស់មួយម៉ោង ឬពីរម៉ោង ទើបត្រលប់មកវិញ ដោយបញ្ចេញស្នាមញញឹមដាក់គ្នាជាប់មិនដាច់ ។ តំបន់នេះមានផ្សោតរស់នៅច្រើនខុសប្លែកខុសពីកន្លែងដទៃ ដោយសារតែមានលក្ខណៈធម្មជាតិល្អប្រសើរមានរោងសំរាប់វាស្នាក់នៅទឹកខួបប្រាំខួបវស្សាមិនដែល

(តទៅទំព័រទី២៥)

( តមកពីទំព័រទី១០ )

| | | |
|---|---|---|
| ប្រាសាទតានី<br>ប្រាង្គព្រះពិធូ | ភ្នំជ័យគីរី<br>ប្រាង្គបាឡិល័យ<br>ប្រាង្គបន្ទាយធំ ។ | ប្រាសាទនាងខ្មៅ<br>ប្រាង្គបន្ទាយស្រី |
| ពិមានអាកាល<br>ប្រាសាទព្រះលាន | អង្គរគោកធ្លកព្រះ<br>ប្រាសាទក្រពុំ<br>និងតាព្រហ្មតិល ។ | ប្រាសាទឯកភ្នំ<br>ឈូកដ៏ឧត្តម |
| ថ្មបាយក្អែកប្រាង្គ<br>ប្រាសាទបានន្ទ | ប្រែរូបលាក់នាង<br>និងប្រាសាទស្ទឹង<br>ប្រាសាទក្រោលគោ ។ | ប្រាសាទគោកបឹង<br>មានប្រាសាទឃ្លាំង |
| ប្រាង្គព្រះវិហារ<br>ប្រាង្គភ្នំជើងព្រៃ | ប្រាង្គបន្ទាយឆ្មារ<br>បន្ទាយត្តីល្អ<br>បន្ទាយសំរែ ។ | ប្រាង្គវត្តអង្គរ<br>បាកងបវរ |
| ប្រាសាទច្រើនណាស់<br>មានប្រាសាទខ្លះ | ស្ថិតនៅពេញពាស<br>មិនបានរាប់ទេ<br>ដោយប្រពៃណាស់ ។ | លើទឹកដីខ្មែរ<br>តែយើងត្រូវថែ |
| សូមរិទ្ធិបារមី<br>ជួយរក្សាថៃ | ខ្លាំងក្លាពេកក្រៃ<br>ឱ្យខ្មែរបានឈ្នះ<br>ហើយគង់វង្សពិត ។ | រិទ្ធីតេជះ<br>មានជ័យជំនះ |
| សូមអស់វិញ្ញាណ<br>ក្នុងអង្គរូបកាយ | វីរៈក្លាហាន<br>ក្នុងក្រអៅចិត្ត<br>ខ្មែរពិតប្រពៃ ។ | នៅគង់សណ្ឋិត<br>ជាតិខ្មែរស្នេហ៍ស្និទ |
| និងអស់ប្រាសាទ<br>ជាតិសាសន៍ពូជខ្មែរ | ប្រាង្គប្រាល្អស្អាត<br>ពិតឥតសង្ស័យ<br>រួមដៃការពារ ។ | កើតពីស្នាដៃ<br>ខ្មែរទាំងប្រុសស្រី |
| បើខ្មែរបែកបាក់<br>ខ្លាចផ្សាខ្លាំងក្រៃ | ជាតិមុខជាធ្លាក់<br>ក្សិណក្ស័យជីវ៉ា<br>បាត់បង់អស់ហើយ ។ | រងទុក្ខវេទនា<br>ប្រាសាទផងណា |
| សូមខ្មែរសាមគ្គី<br>ឱ្យខ្មែររលាយ | ស៊ូលះជីវី<br>រលំបាត់ឡើយ<br>ខិតខំការពារ ។ | មិនត្រូវបណ្តោយ<br>សូមខ្មែរយើងអើយ |
| ដោយចិត្តអត់ធន់<br>ទើបយើងបានថ្កើន | បេតិកភណ្ឌ<br>កិត្តិយសថ្លៃថ្លា<br>រដ្ឋាគង់អើយ ៕ | ផងយើងគ្រប់គ្នា<br>នាំជាតិខេមរា |

# ជនជាតិភាគតិចរៀបការកូនចៅ ត្រូវយល់ចិត្តថ្លើមគ្នា

***មណ្ឌលគិរី : ម៉ី សម្ផស្ស***

●●●បងប្អូនជនជាតិភាគតិច ដែលភាគច្រើនរស់នៅតំបន់ព្រៃភ្នំក្រំថ្ម ពួកគេតែងប្រកាន់ខ្ជាប់នូវទំនៀមទំលាប់ប្រពៃណីគោរពព្រលឹងបុព្វការី អារក្ស អ្នកតា ទេវតា ការសែនព្រេន និងមានទឹកចិត្តស្មោះត្រង់ចេះជួយគ្នាទៅវិញទៅមក ។

ជាពិសេសអ្វីដែលគួរឱ្យចាប់អារម្មណ៍នោះ ពួកគេហាក់ដូចជាមានគំនិតជឿនលឿនចំពោះការរៀបចំទុកដាក់កូនចៅឱ្យមានគូស្រករ ដោយផ្តល់ឱកាសឱ្យកូនចៅប្រុសស្រីបានស្គាល់ចិត្តថ្លើមគ្នាជាមុនសិន ចំណែកឯឪពុកម្តាយក៏ត្រូវតែមានភាពស្និទ្ធស្នាលជាមួយគ្នាយ៉ាងតិច២ឆ្នាំដែរ ។

ទំនៀមទំលាប់ប្រពៃណីនេះ បើក្រុមគ្រួសារដែលជាឪពុកម្តាយ ឬអាណាព្យាបាលធ្វើខុសពីលក្ខន្តិកៈនោះនឹងត្រូវមេកន្ទ្រាញធ្វើការពិន័យដកហូតយកទ្រព្យសម្បត្តិទាំងអស់តែម្តង ។

ម្តាយខាងប្រុសត្រូវតែមានអាយុច្រើនជាងអាយុកូនស្រីធ្វើបណ្ណាការតាមការកំណត់របស់មេបាខាងស្រីនោះ ទើបគេរៀបការបាន ។

ប៉ុន្តែ អ្វីដែលគួរឱ្យអំនួតនោះ ជនជាតិព្នងមិនប្រកាន់ពេលវេលាថ្ងៃរៀបចំសែនព្រេននោះទេ គឺគ្មានប្រកាន់ខែចូលព្រះវស្សា ឬមិនចូលវស្សាឡើយ ឱ្យតែកូនចៅយល់ចិត្តថ្លើមគ្នាឪពុកម្តាយស្រុះស្រួលគ្នាថា កូនចៅអាចរស់នៅជាមួយគ្នាបាន ដោយគ្មានការបង្ខិតបង្ខំពីឪពុកម្តាយខាងណាទេ ។

បើពុំនោះទេនឹងត្រូវមេកន្ទ្រាញប្រចាំភូមិធ្វើការពិន័យ ដោយដកហូតទ្រព្យសម្បត្តិទាំងអស់ហើយ ប្រពៃណីនេះបានបន្តរហូតដល់សព្វថ្ងៃ ចំណុចនេះពួកព្នងមានការជឿនលឿនគួរកត់សំគាល់ ។

ប្រភពខាងលើបន្តថា បន្ទាប់ពីការចែចូវស្រុះស្រួលគ្នាហើយខាងកូនប្រុសត្រូវតែលើក


បងប្អូនជនជាតិព្នងកំពុងផឹកស្រាទិនពេលមង្គលការកូនប្រុសស្រី

បងប្អូនជនជាតិភាគតិចច្រើនរស់នៅតាមតំបន់ជួរភ្នំនៃប្រទេសកម្ពុជាប្រកបរបរបាញ់សត្វបេះផ្លែឈើ នេសាទ ដាំស្រូវ ហើយមានទំលាប់រៀបចំសែនព្រេនគ្រប់ពិធីទាំងអស់ ។ មិនថាពេលរៀបការបណ្តេញឧបទ្រពចង្រៃប្រមាញ់សត្វ ឬបង្កបង្កើនផលនោះទេ គឺពួកគេតែងធ្វើការបួងសួងសុំឱ្យព្រលឹងអ្នកមានគុណ ឬ អារក្សអ្នកតាជួយឱ្យបានសំរេចបំណងប្រកបដោយជោគជ័យ មានលាភសក្ការៈ និងសិរីសួស្តីដល់ក្រុមគ្រួសារនៅពេលបច្ចុប្បន្ន និងពេលអនាគត ។

ចាស់ទុំជនជាតិព្នងនៅខេត្តមណ្ឌលគិរី បានរៀបរាប់ថា ទំនៀមទំលាប់នៃការរៀបចំទុកដាក់កូនចៅឱ្យមានគូស្រកររបស់ពួកយើងមានការតឹងរ៉ឹងជាងបងប្អូនខ្មែរកណ្តាល គឺគិតតាំងពីអាយុរបស់កូនស្រី បងប្អូនជីដូនមួយឪពុកបណ្ណាការទៅជូនខាងស្រីតាមបង្គាប់ ដូចជាអង្កាំខ្សែក ទំហ៊ូ ក្រាស កញ្ចក់ ក្រមា សំលៀកបំពាក់ ។ ចំណែក ឯឪពុកម្តាយខាងកូនប្រុសក៏យកមេជ្រូកមួយក្បាល ក្រឡធំ លំពែងមួយ កាំបិតមួយ ស្រា.ស ៣ឪទិន ទៅប្រគល់ឱ្យមេកន្ទ្រាញសំរាប់យកទៅឱ្យកូនស្រី ។

ការរៀបចំសែនព្រេននេះគេធ្វើឡើងរយៈ៣ ឬ៤ថ្ងៃ ដែលមានការចូលរួមពីអ្នកស្រុកយ៉ាងច្រើនកុះករជួយធ្វើការងារតាមការពឹងពាក់ ។ រៀបចំគ្រឿងបណ្ណាការសែនព្រេនចំពោះព្រលឹងបុព្វការីជនឱ្យដឹងឮ ឱ្យពរជ័យ និងមានការដាំដើមរកាសំរាប់ព្យួរសត្វមាន់ គោ ជ្រូក ដែលសំលាប់ហើយ ។ អ្វីដែលចំលែកក្នុងពិធីនោះ ពេលកម្លោះក្រមុំឈរទទួលភ្ញៀវ គឺកូនកំលោះក្រមុំ

( តទៅទំព័រទី២០ )

# បេះដូងអ្នកប្រជាធិបតេយ្យដើរ មិនទាន់ត្រូវសង្វាក់គ្នា

***ភ្នំពេញ : ចាន់ កុសល***

●●●បន្ទាប់ពីមានការជួយប្រឹងប្រែងពីសំណាក់លោក ម៉ម សូណង់ដូ ប្រធានវិទ្យុសំបុកឃ្មុំ ដែលបានចាក់ផ្សាយជារៀងរាល់ថ្ងៃនូវការបញ្ចេញទស្សនៈពីសំណាក់ប្រិយមិត្តអ្នកស្តាប់យ៉ាងច្រើនកុះករសំណូមពរឱ្យគណបក្សប្រជាធិបតេយ្យបង្រួបបង្រួមគ្នា ដើម្បីដណ្តើមជ័យនិងគណបក្សនយោបាយផងដែរ ដើម្បីដណ្តើមយកជ័យជំនះលើគណបក្សកាន់អំណាចសព្វថ្ងៃ ។

លោកប្រធានគណបក្សសិទ្ធិមនុស្សបន្តថា : វេលានៃការចុះឈ្មោះបោះឆ្នោតរបស់គណបក្សនីមួយៗ បានខិតជិតមកដល់ ហើយឆ្លៀតឱកាសនេះ យើងសូមបញ្ជាក់ជាជំហរម្តងទៀត និងជាលើកចុងក្រោយចំពោះអ្នកប្រជាធិបតេយ្យទាំង


គណបក្សសិទ្ធិមនុស្សធ្វើសន្និសីទកាសែត

ជំនះពេលបោះឆ្នោតនាថ្ងៃទី២៧ កក្កដា ២០០៨ ខាងមុខនេះ ។

កាលពីចុងខែមេសា ឆ្នាំ២០០៨ នេះ គណបក្សសិទ្ធិមនុស្ស ដែលមានទីស្នាក់ការនៅសង្កាត់បឹងកក់ខណ្ឌទួលគោក ក្រុងភ្នំពេញ បានធ្វើសន្និសីទកាសែតស្តីពីការបង្រួបបង្រួមគណបក្ស ដែលមាននិន្នាការប្រជាធិបតេយ្យទាំងអស់ ។ គោលបំណងរបស់សន្និសីទ គឺចង់ប្រមូលផ្តុំអ្នកប្រជាធិបតេយ្យទាំងអស់ឱ្យរួបរួមគ្នាបង្កើតជាបក្សមួយដើម្បីប្រកួតប្រជែងជាមួយគណបក្សប្រជាជនកម្ពុជា ដែលកំពុងកាន់អំណាចសព្វថ្ងៃ ។

ការអំពាវនាវរបស់គណបក្សសិទ្ធិមនុស្សនេះត្រូវបានគណបក្សមួយចំនួនបញ្ចេញប្រតិកម្ម និងសើចចំអកផងដែរ ។ ចំណែកមន្ត្រីអង្គការសង្គមស៊ីវិល និងប្រជាពលរដ្ឋមួយភាគធំបានសំដែងនូវការសប្បាយរីករាយចង់ឃើញអ្នកប្រជាធិបតេយ្យរួមគ្នាជាធ្លុងមួយឈប់ឈ្លោះប្រកែកគ្នាដណ្តើមយកត្រូវតែរៀងខ្លួន តាមរលកធាតុអាកាសបន្តទៀត ។

លោក កឹម សុខា ប្រធានគណបក្សសិទ្ធិមនុស្ស និងជាបេក្ខភាពនាយករដ្ឋមន្ត្រីសំរាប់អាណត្តិទី៤ បានបញ្ជាក់ថា កន្លងមកគណបក្សសិទ្ធិមនុស្សមិនដែលបានបដិសេធចំពោះការរួបរួមគ្នារវាងគណបក្សដែលមាននិន្នាការនយោបាយដូចគ្នានោះទេ ។ ប៉ុន្តែផ្ទុយទៅវិញគណបក្សសិទ្ធិមនុស្សកំពុងគាំទ្រឱ្យមានការរួបរួមគ្នារវាងប្រជាពលរដ្ឋអស់ ។

លោក កឹម សុខា បន្តទៀតថា ចំពោះគណបក្សនរោត្តម រណឫទ្ធិ យើងរង់ចាំស្វាគមន៍ជានិច្ច ខណៈពេលដែលព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ អាចយាងត្រឡប់ចូលរួមបោះឆ្នោតនៅថ្ងៃទី២៧ កក្កដា ២០០៨ ។ ដោយឡែកគណបក្ស សម រង្ស៊ី យើងស្វាគមន៍គ្រប់ពេលវេលា ទោះបីជាកន្លងគណបក្សនេះបិទទ្វារការចរចារបង្រួបបង្រួមគណបក្សប្រជាធិបតេយ្យក៏ដោយ ។

ជាមួយគ្នានេះដែរ លោក ប៉ែន សុវណ្ណ អនុប្រធានគណបក្សសិទ្ធិមនុស្ស និងលោក សឺន ស៊ូប៊ែរ៍ សមាជិកគណៈកម្មាធិការនាយកបានថ្លែងស្រដៀងគ្នាពីវត្តការចង់រួបរួមគ្នារបស់គណបក្សសិទ្ធិមនុស្សជាមួយនឹងគណបក្សផ្សេងៗ ។ ក្នុងនោះអ្នកទាំងពីរធ្លាប់បានជួបផ្ទាល់ជាញឹកញាប់ជាមួយសម្តេចក្រុមព្រះ កាលនៅជាប្រធានហ្វ៊ុនស៊ិនប៉ិច និងលោក សម រង្ស៊ី ប្រធានគណបក្ស សម រង្ស៊ី ដើម្បីការរួមគ្នា ។ ប៉ុន្តែក្តីសង្ឃឹមទាំងប៉ុន្មានបានរលាយអស់ ដោយសារតែអ្នកទាំងនោះមានអំនួតរៀងៗខ្លួនខ្លាំងពេក ។ ទោះជាយ៉ាងនេះក្តី យើងនៅតែមានឆន្ទៈបង្រួបបង្រួមគ្នាសំរាប់អ្នកប្រជាធិបតេយ្យដូចគ្នានោះ ។

ការអន្ទងហៅគណបក្សនយោបាយដែលមាននិន្នាការដូចគ្នាឱ្យចូលរួម ដើម្បីឈានទៅរកជ័យជំនះ ត្រូវបានលោក អេង ឆៃអ៊ាង អគ្គ-

( តទៅទំព័រទី១៨ )

# គ្រឿងឥស្សរិយយស និងការជូនពរ ក្លាយជាការបញ្ចើចបញ្ចើនៅសង្គមខ្មែរ

***ឡុងប៊ិច : សុភាបុទ្ធិ***

●●●មនុស្សគ្រប់រូបតែងតែចង់បាននូវគ្រឿងឥស្សរិយយស និងការជូនពរពីអ្នកដទៃ ពីព្រោះវត្ថុទាំងពីរនេះវាមានតំលៃណាស់ ។ ដោយឡែកនៅស្រុកខ្មែរវត្ថុទាំងពីរនេះ បានក្លាយទៅជារឿងសាមញ្ញទៅហើយ ដោយសារគ្រឿងឥស្សរិយយសមួយចំនួនត្រូវផ្តល់ទៅឱ្យជនខិលខូចកេងប្រវ័ញ្ចទ្រព្យសម្បត្តិជាតិ ។ ចំណែកឯការជូនពរវិញ ពុំមែនជូនដោយស្មោះត្រង់ទេ គឺជូនពរលាយឡំទៅនឹងផលប្រយោជន៍ចង់បានមុខមាត់ទៅវិញ ។

នៅលើទំព័រកាសែត តូច ធំ និងទូរទស្សន៍នានាក្នុងស្រុកខ្មែរ ថ្ងៃណាក៏មានបំពាក់គ្រឿងឥស្សរិយយស និងការជូនពរដែរ ។ អ្នកដែលទទួលបានគ្រឿងឥស្សរិយយសទាំងនេះ ភាគច្រើនជាឧកញ៉ារកស៊ី និងមន្ត្រី


ហេង សំរិន កំពុងថតអនុស្សាវរីយ៍ជាមួយនឹងបំរើក្សារបស់ខ្លួន

ដែលចេះអោនក្រាបពូកែខាងខិលខូចទៅវិញ ។

ការជូនពរនោះទៀតសោតមានតាំងពីថ្នាក់ ប្រធានការិយាល័យ ប្រធានមន្ទីរ អភិបាល អភិបាលរងខេត្តរដ្ឋមន្ត្រី ។ អ្នកត្រូវជូនពរនោះ ខ្លះពុំបានបំពេញស្នាដៃអ្វីសំរាប់ជាតិសោះ គឺគ្រាន់តែរៀនចប់ថ្នាក់អនុបណ្ឌិត ឬបណ្ឌិតក៏ជូនពរដែរ ។ អ្នកដែលបានសញ្ញាប័ត្រមួយចំនួននេះ ចូលថ្នាក់រៀនបានតិចតួចណាស់ ជាប់រវល់ធ្វើការ ឬរកស៊ីក៏បានសញ្ញាប័ត្រដែរ ។

ការជូនពរបែបនេះ ត្រូវបានមជ្ឈដ្ឋាននានាយល់ថា វាគឺជាទំលាប់មួយមិនល្អក្លាយជារឿងបញ្ចើចបញ្ចើលើកជើងឱ្យផុតពីក្បាល និងសម្លឹងរកប្រយោជន៍ពីការជូនពរនេះមកវិញ ។ ការជូនពរតាមរយៈទំព័រកាសែតម្តងៗ គឺមានតំលៃរាប់រយដុល្លារ ពុំមែនតំលៃតិចតួចដែលអ្នកក្រអាចធ្វើបាននោះទេ ។

អ្នកដែលត្រូវបានគេជូនពរជាញឹកញាប់នោះ គឺជា ស៊ីម, ហេង សំរិន, ស ខេង, សុខ អាន, ហុក ឡងឌី តាំងពីខួបកំណើតដំឡើងឋានៈ ការទទួលសញ្ញាប័ត្រកិត្តិយស... ។

មូលហេតុដែលមន្ត្រីក្រោមឱវាទនាំគ្នាជូនពរតាមបណ្តាញផ្សព្វផ្សាយច្រើនបែបនេះ មកពីពួកគេជឿថា អ្នកទាំងនោះមានសិទ្ធិអំណាចអាចផ្តល់តួនាទីបុណ្យសក្តិ និងទុកឱ្យគេមានឱកាសរកលុយធ្វើភាពមានបានរហូតដល់សព្វថ្ងៃ ។

ចំណែកអតីតព្រះមហាក្សត្រ និងមហាក្សត្រដែលមានគុណបំណាច់យ៉ាងថ្លៃថ្លាចំពោះជាតិមាតុភូមិនោះ គឺគេសង្កេតឃើញមានការជូនពរតិចតួចបំផុត ។ ទង្វើបែបនេះ ត្រូវបានអ្នកវិភាគមួយចំនួនអះអាងថា ព្រះអង្គពុំមានសិទ្ធិក្នុងការផ្តល់អំណាច និងតួនាទីឱ្យពួកគេ ដូចអស់លោកទាំងប៉ុន្មាននាក់ខាងលើឡើយ ។

ទាក់ទិននឹងការតែងតាំង និងជូនពរយ៉ាងគគ្រឹតគគ្រេងនោះ អ្នកនយោបាយមួយចំនួនបានបញ្ចេញទស្សនៈថា វាជារឿងមួយល្អណាស់សំរាប់ខ្មែរដែលចេះស្រឡាញ់គ្នា ផ្តល់កិត្តិយសឱ្យគ្នាទៅវិញទៅមកនោះ ។ សំរាប់រូបលោកផ្ទាល់មិនឯកភាពចំពោះការផ្តល់គ្រឿងឥស្សរិយយស និងការជូនពរដូចសព្វថ្ងៃនេះទេ ពីព្រោះទង្វើបែបនេះ វាធ្វើឱ្យបាត់បង់តំលៃទៅវិញទេ ។

លោកក៏បានឱ្យជាគំនិតថា ការជូនពរគួរតែជូនជាបាច់ផ្កានៅឯផ្ទះ ឬសរសេរសំបុត្រ ឬផ្ញើអ៊ីម៉ែលវិញប្រសើរជាង ។ ការជូនពរតាមរយៈ បណ្តាញផ្សព្វផ្សាយព័ត៌មាននេះ សំរាប់អ្នកមានលុយ ល្អណាស់ បើសំរាប់អ្នកក្រវិញ ហើយចង់ឡើងបុណ្យ សក្តិមិនបានធ្វើការជូនពរ វាអាចទៅជារឿងគុំគួនដក តំណែងគ្នាថែមទៀត ។

លោកបានបន្តថា អ្នកដែលត្រូវជូនពរជាសាធារណៈ គួរតែព្រះមហាក្សត្រ ប្រធានព្រឹទ្ធសភា រដ្ឋសភា និងនាយករដ្ឋមន្ត្រីបានហើយ ចៀសវាងប្រធានការិយាល័យ ប៉ូលិសសក្តិ៣ ឬ ៤ ក៏ជូនពរដែរ ដូចជាពុំល្អមើលទេ ។ នៅប្រទេសគេការជូនពរដូចស្រុកខ្មែរ គឺពុំមានទេ បើមានក្នុងករិតតិចតួចបំផុត ហើយសំរាប់តែអ្នកមានឋានៈខ្ពង់ខ្ពស់ប៉ុណ្ណោះ ។

ដោយមើលឃើញពីគ្រឿងឥស្សរិយយសនោះ ធ្លាក់ទៅលើបុគ្គលខិលខូចមួយចំនួននោះ កាលពីថ្ងៃទី៨ ខែមេសា ឆ្នាំ២០០៨ កន្លងមកនេះ នៅអគាររដ្ឋសភាមានរៀបចំបំពាក់មេដាយឱ្យតំណាងរាស្ត្រ ក្រោយអធិបតីភាព ហេង សំរិន ប្រធានរដ្ឋសភា ដែលមានការចូលរួមពីអ្នកតំណាងរាស្ត្រគណបក្សប្រជាជនកម្ពុជា និងគណបក្សហ្វ៊ុនស៊ិនប៉ិច ។ មេដាយឥស្សរិយយសមុនី ថ្នាក់ធិបឌិន និងថ្នាក់មុនីសេរីភ័ណ្ឌ ថ្នាក់សេនា ហើយមេដាយលេខ១ បំពាក់ជូនឥស្សរជន ៤នាក់ គឺ ហេង សំរិន, ហ៊ុន សែន, ស ខេង និង គង់ សំអុលក្នុងចំណោមអ្នកទាំងនោះមានវត្តមានតែ ហេង សំរិន ម្នាក់ប៉ុណ្ណោះ ។ រីឯ៣នាក់ផ្សេងទៀត មិនចូលរួមទេ ដោយលើកហេតុផលថា ជាប់រវល់ទំនងយល់ថាខ្លាចគេរិះគន់វាត្រឹមត្រូវជាង ។

ចំណែកគណបក្ស សម រង្ស៊ី មិនត្រឹមតែមិនទៅចូលរួមប៉ុណ្ណោះទេ ថែមទាំងចេញសេចក្តីថ្លែងការណ៍ថា ពិធីបំពាក់គ្រឿងឥស្សរិយយសនេះ ត្រូវបានធ្វើឡើងជាហូរហែដល់ជនបរទេសខ្មែរ អ្នកជំនួញ និងមន្ត្រីមួយចំនួនដែលក្នុងនោះ មានអ្នកល្អ អ្នកអាក្រក់ និងជនឧក្រិដ្ឋមួយចំនួនផងដែរ ។

សេចក្តីរាយការណ៍បញ្ជាក់ថា គ្រឿងឥស្សរិយសនេះធ្វើឡើងក្រោយឥទ្ធិពលប្រាក់បក្ខពួកតែមិនបានគិតគូរ ឬលើកតំកើងជីវភាពប្រជាពលរដ្ឋទេ ។ អ្នកតំណាងរាស្ត្រទាំងនេះ ក៏បានសុំឱ្យរដ្ឋសភាគិតគូរពង្រឹងសមត្ថភាពរបស់ខ្លួន ដើម្បីលើកតំកើងសីលធម៌ និងធ្វើច្បាប់ប្រឆាំងអំពើពុករលួយវាប្រសើរជាង ។

ការដែលក្រុមអ្នកតំណាងរាស្ត្រគណបក្ស សម រង្ស៊ី មិនព្រមទទួលយកមេដាយនេះ ត្រូវបានលោក ជាម យៀប មន្ត្រីគណបក្សប្រជាជនកម្ពុជាថា វាគឺជាការប្រមាថចំពោះព្រះមហាក្សត្រធ្ងន់ធ្ងរណាស់ ។

ជាការឆ្លើយតបនឹងការចោទប្រកាន់របស់លោក ជាម យៀប លោក សម រង្ស៊ី ប្រធានគណបក្ស សម រង្ស៊ី បានធ្វើការបដិសេធភ្លាមៗផងដែរ ដោយលើកហេតុផលថា គណបក្សលោកមិនបានប្រមាថចំពោះព្រះមហាក្សត្រទេ គឺគណបក្ស លោកដង្ហែតាមព្រះរាជតំរិះព្រះអង្គជានិច្ច ។

លោក សម រង្ស៊ី បន្តថា ព្រះមហាក្សត្រគ្រាន់តែធ្វើតាមសំណើរបស់រាជរដ្ឋាភិបាលប៉ុណ្ណោះ គឺពុំបានធ្វើឡើងតាមទឹកព្រះទ័យរបស់ព្រះអង្គឡើយ ។

គួរបញ្ជាក់ថា កាលពីឆ្នាំ២០០២ តំណាងរាស្ត្រគណបក្ស សម រង្ស៊ី បានបដិសេធមិនទទួលយកមេដាយនេះម្តងហើយ នៅឆ្នាំ២០០៨នេះ បដិសេធម្តងទៀត ។

ហេង ពៅ កាលពីនៅធ្វើជាស្នងការប៉ូលិសក្រុងភ្នំពេញ ទទួលបានមេដាយគោរមងារជាច្រើន ហើយត្រូវបាន ហ៊ុន សែន តែងតាំងជាទីប្រឹក្សា ។ ប៉ុន្តែក្រោយមកត្រូវតុលាការស្រាវជ្រាវឃើញមានពាក់ព័ន្ធបទឧក្រិដ្ឋសំលាប់មនុស្សបង្ខាំងមនុស្សជំរិតយកប្រាក់ និងមានរឿងជាច្រើនទៀតដែល ហេង ពៅ បានប្រព្រឹត្តហើយ ឆ្លើយដាក់មន្ត្រីជាន់ខ្ពស់របស់រាជរដ្ឋាភិបាលមុនពេលចាប់ខ្លួននៅប្រទេសម៉ាឡេស៊ី ៕

## ពិធីដង្ហែក្បួនចូលឆ្នាំខ្មែរ...

២០០៨ នៅទីក្រុង Long Beach តាមដងផ្លូវ Anaheim Street មានមនុស្សរាប់ពាន់នាក់ បានទៅចូលរួមមើលការហែរក្បួនបង្ហាញពីទំនៀមទំលាប់ប្រពៃណីចូលឆ្នាំខ្មែរ ។ ក្បួនដង្ហែវប្បធម៌ដ៏មហាឡារិកដែលប្រកបដោយក្រុមចម្រុះជាតិសាសន៍ជាង៨០ក្រុម ។ តំណាងរាជរដ្ឋាភិបាលកម្ពុជាលោករដ្ឋលេខាធិការក្រសួងវប្បធម៌ ជុច ភឿន បានថ្លែងថា នេះជាទិដ្ឋភាពនៃសម្ព័ន្ធភាពរវាងក្រុម Long Beach និងរាជរដ្ឋាភិបាលភ្នំពេញ ដែលយើងមាន

( តនៅទំព័រទី១៩ )



# ភ្នាល់ទឹកភ្លៀងក្លាយជាល្បែងស៊ីសាច់ហុតឈាម

***បាត់ដំបង : គីម សារឿន***

●●●ដោយសារតែមនុស្សមួយចំនួនមានជំនក់ចិត្តនឹងល្បែងស៊ីសងចង់មានចង់បានហួសដែនកំណត់បានធ្វើឱ្យពួកគេយកល្បែងប្រជាប្រិយមកធ្វើជាភាពមានបាន ហើយស៊ីសាច់ហុតឈាមគ្នាទៅវិញទៅមក ។

ជាឧទាហរណ៍ល្បែងភ្នាល់ទឹកភ្លៀង ដែលចាស់ៗធ្លាប់លេងកំសាន្តសប្បាយនៅពេលបុណ្យសំលឹងទៅផ្ទៃមេឃខ្មៅមីដេជាសរកកលនឹងភ្លៀងលាយឡំសំលេងជជែកគ្នាស្ទើរស្តាប់មិនបាននោះ លោក សេង ម៉េងហុង អាយុ៦៩ឆ្នាំ បានឱ្យដឹងថា នៅសម័យមុនយើងសប្បាយខ្លាំងណាស់ពេលភ្លៀងធ្លាក់ម្តងៗ ព្រោះវានាំមកនូវទឹកសំរាប់ស្រោចស្រពផលដំណាំរបស់ប្រជា-កសិករគ្រប់ទិសទី ។ បើសិនជាគេភ្នាល់គ្នាក៏ដើម្បីការសប្បាយប៉ុណ្ណោះ ។



អ្នកលេងល្បែងភ្នាល់ទឹកភ្លៀងកំពុងសម្លឹងមើលមេឃ

ទានម្តងៗនោះ សព្វថ្ងៃត្រូវអ្នកបាត់ដំបងនាំគ្នាភ្នាល់ដាក់លុយរាប់ពាន់ដុល្លារ ហើយអ្នកខ្លះចាញ់អស់លុយឡានផ្ទះសម្បែងធ្លាក់ខ្លួនក្ររហាមក៏មានដែរ ។

ល្បែងភ្នាល់ទឹកភ្លៀងនេះ គេច្រើនលេងនៅរដូវវស្សា ឬពេលមេឃងងឹតរកកល់ជិតភ្លៀង គឺមានមនុស្សម្នាទាំងក្មេងចាស់ច្រើនទៅជួបជុំគ្នានៅផ្សារបឹងឈូក ក្បែរស្ថានីយវិទ្យុជាតិខេត្តបាត់ដំបង ដូចជាទៅផ្សារទិញម្ហូបអាហារអីចឹង ។

នៅពេលមេឃរកកល់នឹងភ្លៀងអ្នកលេងល្បែងទឹកភ្លៀងបាននាំគ្នាភ្នាល់តាមរយៈការឆ្លើយឆ្លងទូរស័ព្ទ អៃកូមខ្សែងខ្វាត់ ហើយអ្នកខ្លះទៀតឡើងទៅលើផ្ទះឈើដែលគ្មានជញ្ជាំងនៅម្តុំផ្សារបឹងឈូក ។

អ្នកដែលលេងភ្នាល់ទឹកភ្លៀងភាគច្រើនហាក់ដូចជាមានសេចក្តីក្លាហានមិនខ្លាចរន្ទះភ្លៀងខ្យល់ ឬស្លាប់នោះទេ គឺពួកគេនាំគ្នាឡើងលើដំបូលផ្ទះ ដើម្បីពិនិត្យមើលទឹកភ្លៀងតាមការសន្យា ។ លើសពីនេះទៀត ពួកគេនិយាយទូរស័ព្ទ ឬអៃកូមទាំងភ្លៀងរន្ទះ មិនខ្លាចរន្ទះបាញ់ស្លាប់ទេ ឱ្យតែបានលុយឈ្នះការភ្នាល់នេះ ។

ខណៈពេលកំពុងផឹកកាហ្វេ ហើយកែវភ្នែក

សេង ម៉េងហុង បន្តថា សព្វថ្ងៃពេលភ្លៀងធ្លាក់ម្តងៗមានទាំងគាត់ និងអ្នកស្រុកមួយចំនួនខ្លះសើច ខ្លះយំ ព្រោះតែចាញ់នឹងឈ្នះល្បែងនេះ។ អ្នកដែលលេងធំពេលចាញ់ម្តងៗអស់លុយឡាន និងផ្ទះសម្បែងក៏មានដែរ ចំណែកគាត់លេងគ្រាន់តែយកលុយទិញកាហ្វេផឹកប៉ុណ្ណោះ ។

សេង ម៉េងហុង បន្តថា ពេលលេងម្តងៗអារម្មណ៍របស់គាត់ភ័យផងអរផង និងមានពេលខ្លះភ្លេចបាយទឹក ព្រោះតែចង់ដឹងពីលទ្ធផលឈ្នះចាញ់ ។ ក្នុងពេលនោះមនុស្សក៏ចាប់ផ្តើមតថ្លៃគ្នាចាប់ពី១០.០០០រៀលឡើងទៅ ដោយពីដំបូង១០០%បង់១០០% តែបើភ្លៀងចាប់ធ្លាក់គេប្តូរការភ្នាល់ពី៨០%បង់១០០% និងពេលខ្លះ២០%បង់១០០% ។

អ្នកស្រី លី គីមអេង អាយុ៥៦ឆ្នាំ រស់នៅក្បែរផ្សារបឹងឈូក ខេត្តបាត់ដំបងបានឱ្យដឹងថាល្បែងភ្នាល់ទឹកភ្លៀងលេងគ្មានការលាក់បាំងទេ ឱ្យតែមានភ្លៀងធ្លាក់ ឬមេឃជិតភ្លៀង ។ អ្នកស្រុកនាំគ្នាលេងនៅតាមផ្ទះ ឬទីសាធារណៈ សូម្បីតែអ្នករត់ម៉ូតូឌុបក៏លេងដែរ គឺនៅតាមចំណតរថយន្តដែលពួកគេឈប់ ។

អ្នកស្រី លី គីមអេង បន្តថា អ្នកលេងនៅ

( តទៅទំព័រទី១៨ )

# រៃអង្គាសលុយជួយខ្មែរ ផ្នែកអន្តោប្រវេសន៍

***ឡុងប៊ិច : មាជ សុវណ្ណារ៉ា***

●●●អង្គការមួយឈ្មោះ Mount Carmel បានរៀបចំពិធីរៃអង្គាសថវិកាជាលើកដំបូងរបស់ខ្លួន កាលពីចុងខែមេសានេះ បំណងស្វែងរកលុយពីសប្បុរសជនទៅជួយសង្គ្រោះជីវិតបងប្អូន ដែលមានបញ្ហាខាងផ្នែកអន្តោប្រវេសន៍ក្នុងទឹកដីសហរដ្ឋអាមេរិក ។

ប្រធានអង្គការ Mount Carmel អ្នកស្រី Mary Blatz និយាយថា តាមរយៈអង្គការអ្នកស្រីជិត៣០ឆ្នាំមកហើយ ដែលបានធ្វើការជាមួយបងប្អូនខ្មែរក្នុងសហគមន៍ Long Beach, Los Angeles ក្នុងការជួយសំរួលនូវផ្នែកកិច្ចការអន្តោប្រវេសន៍ ដូចជាជួយស្វែងរកសិទ្ធិរស់នៅដោយស្របច្បាប់ទាំងផ្នែកស៊ីវិល ឬផ្នែកនិរទេសនយោបាយ និងការទប់ស្កាត់ការបញ្ជូនមនុស្សទៅកាន់ស្រុកខ្មែរ ដូចជាស្វែងរកមេធាវីការពារក្តី និងរកដំណោះស្រាយក្នុងតុលាការរួមជាមួយការជួយបំពេញបែបបទសុំ Green Card និងបង្រៀនចូលសញ្ជាតិអាមេរិកជាដើម ដោយមិនគិតកម្រៃ ។

អ្នកស្រី Mary និយាយថា នេះជាការរៃអង្គាសប្រាក់ លើកដំបូងរបស់អង្គការគាត់ ដើម្បីរួមគ្នាជួយធ្វើការទាំងអស់គ្នា ក្នុងផលប្រយោជន៍សហគមន៍ខ្មែរ ព្រោះជិត៣០ឆ្នាំទៅហើយ គាត់តែងតែដាក់ចិត្តដាក់កាយបេះដូងជាខ្មែរ រស់នៅជាមួយបងប្អូនជានិច្ច ។ នៅពេលខ្មែរមានទុក្ខ រូបគាត់ក៏មានទុក្ខ ដែលមិនអាចនៅស្ងៀមបាន ត្រូវតែជួយរកយុត្តិធម៌តាមផ្លូវច្បាប់ឱ្យខ្មែរ ទាល់តែបាន ។

អ្នកដែលធ្វើការជាមួយអ្នកស្រី Mary ជាជនជាតិអាមេរិកាំងស្បែកសសុទ្ធតែអះអាង ដូចគ្នាថា Mary មិនដែលបដិសេធម្តងណាឡើយ នៅពេលដែលខ្មែរយើងរត់ទៅរកឱ្យគាត់ជួយនូវរាល់ករណីនៃការពឹងពាក់ ។ អ្វីដែលគាត់ប្តេជ្ញាជួយ គឺកម្របរាជ័យណាស់ក្នុងផ្លូវច្បាប់នៃកិច្ចការអន្តោប្រវេសន៍ ឬឧក្រិដ្ឋជាដើម ។

អ្នកទាំងនោះបន្តសំដីថា Mary លះបង់កាយ និងទ្រព្យរបស់ខ្លួនជាច្រើន ព្រោះចង់បំរើគេ ជួយគេឱ្យបានសម្រេចចំពោះជនរងគ្រោះ ដែលត្រូវបានគេចោទប្រកាន់ ឬបំពាន ដែលជាអ្នកក្រីក្រគ្មានលុយកាក់ដើម្បីតវ៉ាក្តីក្តាំ ។

ក្រុមខ្មែររស់នៅ Long Beach ឬអតីតជនភៀសខ្លួននៅតាមជំរំថៃ, ហ្វីលីពីន ភាគតិចណាស់ដែលថាមិនស្គាល់អ្នកស្រី Mary ។ ដោយក្រុមខ្មែរទាំងនោះអះអាងថា អ្នកស្រីជាមនុស្សត្រង់ជួយមនុស្សមិនរើសមុខ ដែលខ្មែររាប់រយពាន់គ្រួសារ ត្រូវបានអ្នកស្រីជួយក្នុងករណីទំនាស់នានា មិនថាកិច្ចការអន្តោប្រវេសន៍ ឬឧក្រិដ្ឋនានាបានយ៉ាងជោគជ័យ ។ ដោយជាក់ស្តែងបងប្អូនខ្មែរដែលធ្វើអ្វីខុសច្បាប់ ត្រូវអាមេរិកបញ្ជូនទៅស្រុកខ្មែរវិញរាប់សិបនាក់ ត្រូវបានអ្នកស្រីតវ៉ាប្រឈមមុខច្បាប់ទប់ស្កាត់មិនឱ្យបញ្ជូនត្រឡប់ទៅកម្ពុជាវិញ ។

បងប្រុសម្នាក់សុំមិនបញ្ចេញឈ្មោះនិយាយថា គាត់បានជាប់មន្ទីរឃុំឃាំង១៧ខែ នៅកន្លែង INS ត្រៀមកាត់ក្តីបញ្ជូនទៅកាន់ប្រទេសកម្ពុជាវិញ ប៉ុន្តែ ត្រូវបានអ្នកស្រី Mary រត់ការស្វែងរកមេធាវីដោយមិនអស់លុយមួយសេនជួយគាត់ឱ្យរួចខ្លួនពីការបញ្ជូនទៅស្រុកខ្មែរវិញ ។

បងប្រុសរូបនោះបន្តថា ឥឡូវគាត់មានសិទ្ធិរស់នៅ និងធ្វើការបាននៅលើទឹកដីអាមេរិក ហើយ ព្រោះតែការខំប្រឹងប្រែងជួយពីអ្នកស្រី Mary ។ គាត់បានជួលមេធាវីមុនឱ្យប្រពន្ធគាត់រត់មករកអ្នកស្រី Mary អស់ទឹកប្រាក់ជិត២ម៉ឺនដុល្លារ ដើម្បីឱ្យមេធាវីការពារក្តីឱ្យ ប៉ុន្តែ ទីបំផុតលុយក៏អស់លទ្ធផលក៏បរាជ័យ ក្តីសង្ឃឹមក៏កើតមាន ខ្លួនត្រូវគេនឹងបញ្ជូនទៅកាន់ស្រុកខ្មែរ ។

បងប្អូនខ្មែរមិនតិចទេ ត្រូវបានគេបោកប្រាស់ ព្រោះតែចង់រស់នៅឱ្យមានសិទ្ធិដូចគេឯង នៅលើទឹកដីអាមេរិក ហើយអ្នកខ្លះទៀតស៊ូរស់នៅខុសច្បាប់ ព្រោះមិនដឹងទៅពឹងពាក់អ្នកណាឱ្យជួយរកសិទ្ធិស្របច្បាប់ ចេះតែសម្ងំរស់នៅ ព្រោះខ្លាចគេបោកប្រាស់ ចំណែកកូនចៅខ្មែរយើងខ្លះទៀតត្រូវជាប់ចោទដោយគ្មានកំហុសនៅក្នុងពន្ធនាគារ ក៏ចេះស៊ូទ្រាំទាំងខ្លួនមិនខុស ព្រោះម៉ែឪមិនដឹងជាទៅពឹងពាក់អ្នកណាឱ្យជួយ ជួនកាលដឹងដែរថា ត្រូវធ្វើតាមផ្លូវណា ប៉ុន្តែ គ្មានលុយដើម្បីដោះស្រាយចំណោទបញ្ហាទាំងអស់នេះ អ្នកស្រី Mary បាននិយាយថា សូមបងប្អូនខ្មែរមេត្តាមករកយើងខ្ញុំ យើងខ្ញុំនឹងជួយបងប្អូនដោយធ្វើការទាំងអស់គ្នា ដើម្បីរកយុត្តិធម៌សំរាប់មនុស្សជាតិ ៕

# Opinion Section

and that John McCain wants to continue indefinitely. Only Senator Obama can achieve a new direction in our international relationships and restore goodwill toward America in all corners of the world.

On domestic issues as well, Senator Obama is uniquely qualified to lead our nation through its current problems. Barack Obama, unlike his opponents, will fix the economic mess that George Bush has mired us in. Unlike Hillary Clinton, Barack Obama voted against the bill sponsored by the credit-card companies that makes it harder for Americans to escape from crushing credit-card debt. Senator Obama also supports universal health care, recognizing that the current system of leaving millions of Americans uninsured and relying on the emergency room for primary care is something no one can afford. Through his unique bipartisan appeal, President Obama will lead reforms in healthcare that will help all Americans-including Cambodian Americans-afford health insurance.

Senator Obama also has led the call for reforms to America's flawed immigration system. He supports changes to the H1-B visa program that will help keep families together. Likewise, he supports the Development, Relief, and Education for Alien Minors (DREAM) Act, which will allow children of undocumented immigrants to have the same chance at an education as their peers. He has been a staunch advocate for small businesses and supports federal programs that invest in those owned by minorities.

America is at a crossroads. Only one candidate has the vision and the ability to lead people from of all political leanings, from all regions of this great country, and from all ethnic backgrounds to create a more prosperous and secure future for America: Senator Barack Obama.

--Leaksmy C. Norin

Ms. Norin is a member of the Obama Asian Americans and Pacific Islanders
National Leadership Council.

## លោក ឱត ប្រាណ បានលា...

សហរដ្ឋអាមេរិក ហើយដោយសាររូបលោក ពិភព លោកបានស្គាល់ថា "នរគ ប៉ុល ពត ជាឋាន របៀបណា " ។ ស្នាដៃដ៏ធំនេះអាចរាប់បានថា លោក ឱត ប្រាណ បាននាំពិភពលោកទាំងមូល ឱ្យឃើញថា ដោយសារតែអ្នកសារព័ត៌មាន ទោះជានៅក្នុងពិភពលោកងងឹតអន្ធការប៉ុណ្ណា គេត្រូវតែពុះពារយកមកបង្ហាញឱ្យទាល់តែបាន ៕

## ជនជាតិភាគតិចរៀបការ..

ចំពិធីសែនព្រេនរំលឹកដល់ឈ្មោះអ្នកថែរក្សាភ្នំ ជ្រោះជ្រលងដងអូរ និងទទួលធ្វើជាសាក្សីផ្តល់ សេចក្តីសុខសប្បាយជាក់ជាពុំខានឡើយ ។ ចាប់ តាំងពីពេលនោះមកជនជាតិព្នងពេលណាមាន គ្រោះអាសន្នតូចធំក្នុងក្រុមគ្រួសារ គេតែងរំលឹក ដល់ស្រុះផ្លូ ឱ្យជួយដល់ពួកគេ តាំងពីសម័យបុរាណ រហូតមក ។

ទំនៀមទំលាប់រៀបការរបស់បងប្អូនជនជាតិព្នង ដែលរស់នៅតំបន់ជួរភ្នំនៃប្រទេសកម្ពុជាតែង និយមរៀបចំពិធីសែនព្រេន ដោយមានការ យល់ចិត្តថ្លើមគ្នារវាងកូនប្រុសស្រីឪពុកម្តាយ ទាំងសងខាង និងមេកន្ទ្រាញក្នុងភូមិជាមុនសិន បើមិនដូចនេះ ត្រូវមេកន្ទ្រាញធ្វើការពិន័យ ។ អ្វីដែលប្លែកនោះ ពួកគេផ្តល់សិទ្ធិសេរីភាពគ្រប់ យ៉ាងឱ្យកូនចៅជ្រើសរើសគូស្រករ ដោយខ្លួន ឯង ដែលយុវជនក្នុងពិភពលោកកំពុងតែអនុវត្ត ការសម្រេចចិត្តបែបនេះ ហើយបានធ្វើការ ប្រឆាំងចំពោះការបង្ខិតបង្ខំរបស់ឪពុកម្តាយក្នុង ការរៀបចំទុកដាក់កូនចៅដោយមិនបានយល់ ចិត្តថ្លើមគ្នានោះ ៕

# សិប្បកម្មតម្បាញហូលទីផ្សារនៅចង្អៀត

*ដោយ : គីម សារឿន*

•••សិប្បកម្មតម្បាញនៅប្រទេសកម្ពុជា មានច្រើនប្រភេទណាស់ ក្នុងនោះមាន : តម្បាញ ក្រមា ហូល ផាមួង ចរបាប់ កន្ទេល កញ្ចើ ល្អី ចង្អេរ...។ មុខរបរទាំងនេះ ភាគច្រើនធ្វើការនៅ ក្នុងម្លប់ និងមានសុវត្ថិភាព ពិសេសផ្តល់ភាព ងាយស្រួលសំរាប់ស្ត្រីឱ្យមានឱកាសមើលថែទាំ កូនចៅ និងអាចរកចំណូលសំរាប់ជួយក្រុម គ្រួសារបានថែមទៀតផង ។

សិប្បកម្មតម្បាញទាំងនេះ ត្រូវបានប្រជាជនគ្រប់វ័យនិយម ធ្វើតាំងពីសម័យបុរាណ រហូត មកដល់សម័យបច្ចុប្បន្ន ហើយ គេសង្កេតឃើញមាននៅ ខេត្តតា- កែវ កណ្តាល កំពង់ចាម សៀម រាប និងបន្ទាយមានជ័យ ។

របរតម្បាញហូលនេះ ត្រូវ បានអ្នកស្រុកនិយម ធ្វើតៗគ្នាមិន ថាក្មេងចាស់ប្រុសស្រីនោះទេ ពីព្រោះ វាធ្វើនៅក្នុងម្លប់ មាន សុវត្ថិភាព ហើយអាចរកប្រាក់ សំរាប់ដោះស្រាយជីវភាព បាន យ៉ាងងាយស្រួលទៀតផង ។ ប៉ុន្តែ ត្រូវការសេចក្តីព្យាយាមអត់ធ្មត់ ខ្លាំងណាស់ ទើបអាចផលិតវា បាន និងមានគុណភាពខ្ពស់ ។



សកម្មភាពក្មេងៗកំពុងចងគាត



សកម្មភាពតម្បាញហូលរបស់ស្រ្តីជាពលរដ្ឋ

ទោះបីជារបរតម្បាញហូល មានតាំងពីសម័យមុនយ៉ាងណា ក្តី តែទីផ្សារហាក់ដូចជានៅចង្អៀត ហើយផលិតផលរបស់ពួកគាត់លក់បានថោក គឺវាមិនសមនឹងការចំណាយដើមទុន និងកម្លាំង ពលកម្មសោះ ។

នៅខេត្តតាកែវ ប្រជាជនភាគច្រើន ទាំងប្រុស ទាំងស្រី និយមតម្បាញ ហូល ផាមួង ខ្លាំងណាស់ ។ ដោយឡែកប្រជាជនដែលរស់នៅស្រុកបាទី និង ស្រុកព្រៃកប្បាស ក៏និយមត្បាញហូលនេះដែរ ។ មុននឹងចេញជាសំពត់ ហូល ពីដំបូង គឺត្រូវខាល់ សូត្រដាក់ក្នុងបំពង់ រួចអន្ទងដោយកំណត់ថា តើយកប្រវែងប៉ុន្មានម៉ែត្រ? ។ បន្ទាប់មកទៀត យកសូត្រ ដែលអន្លងរួចនេះ ស្ងោរនឹងទឹកក្បុង ហើយជ្រលក់ពណ៌ ដែលយើងចង់បាន ។

ក្រោយពីជ្រលក់ ពណ៌ហើយត្រូវយកសូត្រ ដែលជ្រលក់ពណ៌រួចនោះ ទៅហាលថ្ងៃមួរជាផ្ទៃ ដាក់ធ្នេញឈើហើយថ្កូរ ។ នៅពេលនោះ ត្រូវទិញ សូត្រមករវៃហើយអន្ទងជាគាត ដោយចងជា គោមរំលេចរូបភាពផ្សេងៗ និងដាក់ពណ៌ទៅ តាមចំណង់ចំណូលចិត្តរបស់អ្នកទិញ ។

ចំពោះការប្រើពណ៌ នៅក្នុងការធ្វើគាត និង ផ្ទៃនេះមានពីរប្រភេទ គឺតាមលក្ខណៈធម្មជាតិ និងទិញពីបរទេស ។ លក្ខណៈធម្មជាតិអាច ប្រើធនធានដែលមាននៅក្នុងភូមិស្រាប់ ដូចជា ស្លឹកអម្ពិលសម្បកព្រលូត និងសម្បកដើមឈើ ផ្សេងៗ ក៏បានការប្រើប្រាស់ពណ៌ធម្មជាតិ គឺត្រូវ ចំណាយពេលយូរអស់ថវិកាតិច ប៉ុន្តែគុណភាពល្អ អាចបោកទឹកបានមិនចេញពណ៌ និងមានតំលៃ ថ្លៃជាងការប្រើពណ៌ ដែលនាំចូលពីបរទេស ។

អ្នកស្រី ជី វណ្ណនី អាយុ៤៧ឆ្នាំ រស់នៅភូមិ ព្រៃជប់ ស្រុកបាទី ខេត្តតាកែវ ដែលមានជំនាញ ក្នុងរបរធ្វើហូលជាង២០ឆ្នាំ បានរៀបរាប់ថា ការ ត្បាញហូល ក្នុងមួយក្បិន ដែលមានប្រវែង៤ ម៉ែត្រនេះ ត្រូវចំណាយពេលវេលាជិតមួយខែ គឺ គិតទាំងការរវៃសូត្រ ដាក់ពណ៌ ចងគាត ខាល់ គាត និងត្បាញ ។ ប៉ុន្តែ បើសិនជាយើងចង់ធ្វើឱ្យ លឿនជាងនេះ គឺត្រូវចំណាយថវិកា ជួលគេខាល់ សូត្រ និងចងគាតនោះ វាចំណាយពេលតិច ហើយ ចំណេញក៏តិចដែរ ។ អ្នកស្រី ជី វណ្ណនី បាន បញ្ជាក់ថា សំពត់ហូល ដែលធ្វើពីល័ក្តខ្មែរ លក់ក្នុងមួយក្បិនតម្លៃប្រហែលជាង៨០ដុល្លារ ។ ចំណែកឯសំពត់ហូល ដែលធ្វើពីល័ក្ខចិន ក្នុង មួយក្បិនតម្លៃប្រហែល៦០ដុល្លារ ។

ដោយសារតែតម្បាញហូលធ្វើពីដៃសុទ្ធសាធ ហេតុនេះ ប្រជាជនត្រូវការចំណាយពេលវេលា ច្រើន ទំរាំបានហូលមួយក្បិនៗ តែចំណូលដែល ទទួលបានតិចតួច ជាហេតុធ្វើឱ្យសេដ្ឋកិច្ចនៅ

( តនៅទំព័រទី១៩ )

# ភ្នាល់ទឹកភ្លៀងក្លាយ...

កន្លែងធំយើងត្រូវបង់ឱ្យម្ចាស់ផ្ទះគេម្នាក់២០ម៉ឺនរៀល (៥០ដុល្លារ) ចំណែកអ្នកចំណូលថ្មី ឬមកពីខេត្តឆ្ងាយត្រូវបង់៥០០ដុល្លារ ទើបគេឱ្យលេង ។ អ្នកស្រីបន្តទៀតថា នៅពេលអាកាសធាតុផ្លាស់ប្តូរពីក្តៅទៅត្រជាក់អ្នកលក់ដូរក៏ចាប់ផ្តើមលេង ខ្លះក៏ឈប់លក់ដូរ ឬឈប់ធ្វើការដោយច្រើនមកជួបជុំគ្នានៅផ្សារបឹងឈូកនេះ ។

អ្នកស្រី លី គីមអេង បន្តទៀតថា ពាក្យដែលគេប្រើក្នុងការភ្នាល់គ្នានេះ គេហៅថា "ហ៊ុន" ១ហ៊ុនស្មើនឹង១.០០០ ប្រសិនបើឈ្នះទទួលបាន១.០០០ ។ ចំណែកនៅខេត្តបាត់ដំបង ១ដុំស្មើនឹង១០.០០០បាត នៅភ្នំពេញ១ដុំស្មើនឹង១០.០០០ដុល្លារ ។

លោក មុត សីហា អាយុ៤៥ឆ្នាំ បានឱ្យដឹងថា ការភ្នាល់គ្នានេះ គឺសំរាប់តែកន្លែងដែលមានភ្លៀងទឹកក្រដាស់ស ឬក្រណាត់សដែលគេដាក់ ដោយមានអ្នកយាមត្រឹមត្រូវមិនអនុញ្ញាតឱ្យមនុស្សណាទៅជិតឡើយ ។ រីឯអ្នកលក់គឺយកខាងអត់ភ្លៀង ។ លោក មុត សីហា បន្តថា ល្បែងភ្នាល់ទឹកភ្លៀងនេះ សព្វថ្ងៃមានអ្នកទីក្រុងភ្នំពេញ និងតាមបណ្តាខេត្ត-ក្រុងផ្សេងៗទៀតលេងដែរ គឺឱ្យតែមេឃស្រទុំ ពួកគេចាប់ផ្តើមទូរស័ព្ទសួរនាំគ្នាមិនថា យប់ ឬថ្ងៃទេ ។ អ្នកភ្នាល់តែងទូរស័ព្ទសួរបងប្អូនញាតិមិត្តនៅតំបន់នានា សួរពីអាកាសធាតុ តើវាអាចមានភ្លៀងដែរឬទេ ?

លោក មុត សីហា បន្តទៀតថា ចំពោះអ្នកលេងធំ គឺគេជួលមនុស្សឱ្យចាំឃ្លាំមើលពពក និងមេឃប្រែប្រួលយ៉ាងណា នៅពេលបានលទ្ធផលហើយ ក៏ទូរស័ព្ទប្រាប់ចៅហ្វាយនាយរបស់ខ្លួន ។ តាមការកត់សំគាល់របស់លោក ល្បែងភ្នាល់ទឹកភ្លៀងបានរីកសាយភាយខ្លាំង ហើយមានការភ្នាល់លុយច្រើនណាស់ ដែលនៅក្នុងនោះមានអ្នកខ្លះធ្លាក់ខ្លួនក្រ និងសំលាប់ខ្លួនដោយសារការចាញ់ល្បែងនេះផងដែរ ។

ល្បែងប្រជាប្រិយ និងកីឡាជាច្រើនប្រភេទដែលបុព្វបុរសយើងបានបន្សល់ទុក ត្រូវបានអ្នកស្រុកមួយចំនួនប្រែក្លាយទៅជាការភ្នាល់ដាក់លុយយកឈ្នះចាញ់ ធ្វើភាពមានបានស្មើរអស់ ។ ទង្វើនេះបានធ្វើឱ្យមានភាពអសន្តិសុខ អំពើចោរកម្ម អំពើហិង្សាក្នុងសង្គមគ្រួសារ និងសង្គមជាតិគួរឱ្យភ័យខ្លាចខ្លាំងណាស់ ៕

# ទស្សនៈឡប់ៗ

ត្រូវការទំនាក់ទំនងវត្តដើម្បីពិគ្រោះបុណ្យទានក៏មិនត្រូវគេអនុញ្ញាតឱ្យចូលរួមដែរ រហូត




ក្រោយមកទាល់តែមានការសម្រុះសម្រួលទើបបានឱ្យចូលក្នុងវត្ត Sic ! ។ អស្ចារ្យមែន... ខ្លាំងជាង ហ៊ុន សែន ទៅទៀត ! ...អ្នកដឹកនាំស្រុកខ្មែរ នាយ ខ្ទុយ ខ្ញុំសុំជួបពេលណាក៏បាន... ចូលទៅវិមានរដ្ឋាភិបាល, រដ្ឋសភា, ព្រឹទ្ធសភាក៏គ្មាននរណាឃាត់ឃាំងម្តងណាឡើយ ។ ខុសពីតែពួកអស់លោកពីរនាក់ មាន ពៅ ស៊ីវន, ទិត្យ ស៊ីផាន់ ដែលជាគ្រូបង្រៀន និងជាអ្នកឯកទេសជំនាញសេដ្ឋកិច្ចហិរញ្ញវត្ថុ មានចំណេះដឹងខ្ពស់បែរជាធ្វើផ្តេសផ្តាសទៅវិញ... ហ៉ឺ... ហ៉ឺ ! ... ម្យ៉ាងដែរហ្នំ ។ ដោយចុងបញ្ចប់នាយ ខ្ទុយ ខ្ញុំសុំសួរបែបឆ្ងល់ថា មនុស្សមានទស្សនៈឡប់ៗមួយថា ចុះហេតុអ្វីអ្នកកាសែតខ្មែរប៉ុស្តិ៍ និងកាសែតសេរីភាព ជាមួយមនុស្សម្នាដទៃទៀតមិនអាចចូលវត្ត... បែរជាចាងហ្វាងកាសែតខេមរា បានចូលទៅដល់ក្នុងកុដិលោក ជួបជាមួយអស់លោកយ៉ាងស្រួលម្ល៉េះ ឬក៏ចាងហ្វាងកាសែតរូបនោះជាចំណាប់ខ្មាំងរបស់អស់លោកក្នុងផ្លូវណាមួយ ដើម្បីឱ្យជួយបិទបាំងរឿងទំនាស់វត្ត ៕

# បេះដូងអ្នកប្រជាធិបតេយ្យ...

លេខាធិការគណបក្ស សម រង្ស៊ី ច្រានចោល ហើយបានហៅសន្និសីទនោះថា គ្រាន់តែជាសារមួយសំរាប់គណបក្សក៏ដូចជាភាពទ័លច្រករបស់អ្នកនយោបាយមួយចំនួនប៉ុណ្ណោះ ។

លោក អេង ឆៃអ៊ាង បានបន្តថា លោកមិនបានចាប់អារម្មណ៍ចំពោះការអំពាវនាវនោះទេ ពីព្រោះគណបក្សលោកមានការមមាញឹកខ្លាំងណាស់ ក្នុងការបំរើជាតិមាតុភូមិ ។ លោកបានចាត់ទុកការអំពាវនាវនេះ ជាការធ្វើជំនួញរបស់អ្នកនយោបាយ ដើម្បីបំរើផលប្រយោជន៍ផ្ទាល់ខ្លួនរបស់ពួកគេ ។

ចំណែកលោក មុត ចន្ថា មន្ត្រីអ្នកនាំពាក្យគណបក្សនរោត្តម រណឫទ្ធិ ដែលបាននិយាយក្នុងកម្មវិធីវាជានិយមថា ការអំពាវនាវរបស់គណបក្សសិទ្ធិមនុស្សភ្ជាប់ដោយលក្ខខណ្ឌបែបនេះ វាជាទង្វើមួយ គួរឱ្យសោកស្តាយណាស់ ពីព្រោះថា គណបក្សនរោត្តម រណឫទ្ធិ ទាំងអ្នកដឹកនាំទាំងសមាជិកមានសិទ្ធិសំរេចការងារមិនមែនចង់តែបង្រួបបង្រួមជាមួយសម្តេចក្រុមព្រះមួយអង្គនោះទេ ។

លោក មុត ចន្ថា ការលើកឡើងរបស់លោក កឹម សុខា នៅពេលសន្និសីទដែលថា លុះត្រាតែសម្តេចក្រុមព្រះយាងចូលប្រទេសទើបធ្វើការចរចាបង្រួបបង្រួម គឺជារឿងបំភ្លើសនិងជាការបោកបញ្ឆោតរាស្ត្រប៉ុណ្ណោះ ។ ចំណែកគណបក្សនរោត្តម រណឫទ្ធិ បើតាមព្រះរាជតម្រិះរបស់សម្តេចក្រុមព្រះ ព្រះអង្គនៅតែប្រកាន់ជំហរនៃការបង្រួបបង្រួមគណបក្សដែលមាននិន្នាការប្រជាធិបតេយ្យដដែល ។

លោក ញឹក ប៊ុនឆៃ អគ្គលេខាធិការនៃគណបក្សហ្វ៊ុនស៊ិនប៉ិច បានប្រាប់កាសែតខ្មែរប៉ុស្តិ៍ថ្មីៗនេះថា គណបក្សលោកមិនអាចចងសម្ព័ន្ធភាពជាមួយគណបក្សសិទ្ធិមនុស្សបានទេ ពីព្រោះបក្សរបស់លោកជាដៃគូចំរុះរបស់រដ្ឋាភិបាល ។

លោក ញឹក ប៊ុនឆៃ បន្តថា គណបក្សសិទ្ធិមនុស្ស ដែលបើកសមាជពេញអង្គលើកដំបូងកាលពីថ្ងៃទី២២ ខែកក្កដា ឆ្នាំ២០០៧ នៅពហុដ្ឋានជាតិអូឡាំពិកនោះ គឺមានទទួលប្រាក់ប្រមាណជិត២០ម៉ឺន ពីមន្ត្រីថ្នាក់ជាន់ខ្ពស់គណបក្សប្រជាជនកម្ពុជាផងដែរ ។ ក្នុងអង្គសមាជនោះមានសមត្ថកិច្ចជួយការពារយ៉ាងយកចិត្តទុកដាក់ខុសប្លែកពីគណបក្សប្រឆាំងដទៃទៀតឆ្ងាយណាស់ ។

ទាក់ទិននឹងការលើកឡើងនេះ លោក កឹម សុខា បានច្រានចោលទាំងស្រុង ហើយអះអាងថា បើលោកជាអ្នកប្រជាធិបតេយ្យហេតុអ្វីទៅធ្វើរឿងបែបនេះ ។ នេះគឺជាការមួលបង្កាច់ចំពោះរូបលោកទាំងស្រុងលោកមិនដែលជួបជាមួយ ហ៊ុន សែន ស្ងាត់ៗទទួលលុយម្តងណាទេ គឺមានតែជួបជាលក្ខណៈផ្លូវការ ដែលមានការចូលរួមពីអ្នកកាសែតជាតិអន្តរជាតិ ។ មិនដូចលោក ញឹក ប៊ុនឆៃ និងលោក សម រង្ស៊ី ជួបស្ងាត់ៗតែពីរនាក់លោក ហ៊ុន សែន មិនដឹងជាបាននិយាយគ្នាស្អីខ្លះនោះទេ ។

ទោះជាយ៉ាងណាមន្ត្រីអង្គការសង្គមស៊ីវិលដែលចូលរួមក្នុងសន្និសីទនោះ មួយចំនួនយល់ថា ការអំពាវនាវនេះវាជាឆន្ទៈដ៏ល្អរបស់អ្នកប្រ-


ញឹក ប៊ុនឆៃ អគ្គលេខាធិការគណបក្សហ្វ៊ុនស៊ិនប៉ិច

ជាធិបតេយ្យ ដែលចង់ប្រមូលកំលាំងឱ្យបានច្រើន ដើម្បីដណ្តើមយកជ័យជំនះពេលបោះឆ្នោតខាងមុខ ។ ប្រសិនបើគណបក្សដែលមាននិន្នាការទៅរកលទ្ធិប្រជាធិបតេយ្យមិនរួបរួមគ្នាទេនោះមិនអាចដណ្តើមបានជោគជ័យឡើយ ។ អ្នកវិភាគនយោបាយមួយចំនួនបានបញ្ចេញទស្សនៈថា ការអំពាវនាវរបស់លោក កឹម សុខា ឱ្យរួបរួមគ្នានេះហាក់ដូចជាតក់ក្រហល់ខ្លាំងណាស់ ពីព្រោះពេលវេលានៃការបោះឆ្នោតជិតមកដល់ទោះបីជាចង់ចូលរួមក៏ពិបាកដែរ ។ ប្រភពខាងលើបន្តថា ការប្រកួតប្រកាសនេះ ទំនងជាខ្លាចមានការរិះគន់ពីមហាជនដែលស្នើឱ្យរួបរួមគ្នា តាំងពីអំឡុងខែតុលា ឆ្នាំ ២០០៧ ម្ល៉េះ លុះដល់ចុងខែមេសាឆ្នាំ ២០០៨ ទើបយល់ព្រម ។ ទង្វើនេះវាអាចជាឆាកល្ខោនមួយប៉ុណ្ណោះសំរាប់លោក កឹម សុខា ដែលកំពុងសម្តែងឱ្យមហាជនមានការងឿងឆ្ងល់កាន់តែខ្លាំងប៉ុណ្ណោះ ។ សកម្មភាពចិត្តគំនិត និងសង្វាក់បេះដូងរបស់អ្នកប្រជាធិបតេយ្យពុំទាន់ដើរត្រូវនោះទេ ពីព្រោះពួកគេភ្លេចគិតថា "សាមគ្គីឈ្នះបែកបាក់សាមគ្គីចាញ់" ៕

# ប្រាសាទភ្នំជីសូរជាកេរដំណែលប្រវត្តិសាស្ត្រ ឧទ្ទិសថ្វាយលទ្ធិព្រហ្មញ្ញសាសនា

***កម្ពុជា : គីម សារឿន***

**ប្រាសាទភ្នំជីសូរ** គឺជារមណីយដ្ឋានវប្បធម៌ប្រវត្តិសាស្ត្រដ៏ល្បីល្បាញរបស់ខេត្តតាកែវ ដែលបុព្វបុរសយើងបានបន្សល់ទុកតាំងពីសម័យមហានគរ ចាប់តាំងពីរជ្ជកាលព្រះបាទសូរ្យវរ្ម័នទី១ម្ល៉េះ ។ ប្រាសាទបុរាណនេះ កសាងឡើងដើម្បីឧទ្ទិសថ្វាយចំពោះលទ្ធិព្រហ្មញ្ញសាសនា ដែលមនុស្សគ្រប់រូបនៅសម័យនោះ មានជំនឿយ៉ាងមុតមាំ តាំងពីព្រះមហាក្សត្រនាម៉ឺនសព្វមុខមន្ត្រីរហូតដល់ប្រជាពលរដ្ឋ ។

សស្ងាច និងធម្មជាតិពណ៌ខៀវស្រងាត់ ញ៉ាំងឱ្យអារម្មណ៍អ្នកទេសចរមានសេចក្តីសុខយ៉ាងខ្លាំង ភ្លេចអស់នូវទុក្ខកង្វល់ផ្សេងៗទៀតផង ។

យោងតាមឯកសារប្រវត្តិសាស្ត្របានបញ្ជាក់ថា ប្រាសាទភ្នំជីសូរកសាងឡើងក្នុងរជ្ជកាលព្រះបាទសូរ្យវរ្ម័នទី១ នាសតវត្សទី១១ នៃគ្រិស្តសករាជឆ្នាំ១០០២ ដល់១០៥០ ដើម្បីឧទ្ទិសថ្វាយចំពោះលទ្ធិព្រហ្មញ្ញសាសនា ។ ប្រាសាទនេះសង់ពីថ្មភក់ ថ្មបាយក្រៀម និងថ្មក្រហមមានបណ្តោយ៦០ម៉ែត្រ និងទទឹង៥០ម៉ែត្រ ដែល



បុរាណដ្ឋាននេះ ទោះបីជាទទួលរងនូវការគំរាមកំហែង ដោយសារសង្គ្រាមយ៉ាងណាក្តី ប៉ុន្តែសព្វថ្ងៃបានក្លាយជាគោលដៅក្នុងការទាក់ទាញភ្ញៀវទេសចរពីគ្រប់មជ្ឈដ្ឋាន ឱ្យទៅទស្សនានៅថ្ងៃបុណ្យភ្ជុំបិណ្ឌ និងបុណ្យចូលឆ្នាំខ្មែរយ៉ាងច្រើនកុះករ ។

ប្រសិនបើយើងធ្វើដំណើរពីក្រុងភ្នំពេញ តាមបណ្តោយផ្លូវជាតិលេខ២ ឆ្លងកាត់ភូមិសាស្ត្រស្រុកបាទី ក្នុងចម្ងាយប្រមាណ៦២គីឡូម៉ែត្រ រួចបត់តាមផ្លូវលំមួយទៅខាងឆ្វេងដៃ ចម្ងាយប្រមាណ៩គីឡូម៉ែត្រទៀត នឹងឃើញរមណីយដ្ឋានមួយមានសំណង់ប្រាសាទនៅលើកំពូលភ្នំឈ្មោះថា "ប្រាសាទភ្នំជីសូរ" ។

ប្រាសាទនេះ ស្ថិតនៅភូមិថ្លា ឃុំរវៀង ស្រុកសំរោង ខេត្តតាកែវ មានកំពស់ប្រមាណ១៣០ម៉ែត្រ ដែលមានជណ្តើរពីរសម្រាប់ឡើង ទៅកាន់ប្រាសាទ គឺជណ្តើរខាងលិចមានកាំ៣៩០កាំ និងជណ្តើរខាងត្បូងសង់ពីថ្មដែលមាន៤០៨កាំ ។

នៅចំពីមុខផ្នែកខាងកើតនៃប្រាសាទមានជណ្តើរមួយទៀត បែរមុខទៅទន្លេរអុំ ដែលជាកេរដំណែលបន្សល់ទុកតាំងពីសម័យមហានគរ នៅពេលដែលអ្នកឡើងទៅដល់ទីនោះ នឹងបានស្រូបយកខ្យល់អាកាសបរិសុទ្ធឃើញទឹកទន្លេ

មានថែវពីរជាន់ព័ទ្ធជុំវិញ គឺថែវទីមួយធំជាងថែវទី២ ហើយនៅចំថែវមានទីសក្ការបូជាសម្រាប់គោរពបូជា ដូចជារូបបដិមា លិង្គព្រះឥសូរ ចម្លាក់នៅតាមជញ្ជាំងប្រាសាទ និងសំណង់ប្រាសាទបែកបាក់ ។

តាមសិលាចារឹកបានបញ្ជាក់ថា ប្រាសាទភ្នំជីសូរកសាងឡើងដោយព្រះមហាក្សត្រ៣អង្គ គឺព្រះបាទសូរ្យវរ្ម័នទី១ គ.ស១០០២-១០៤៩ ព្រះបាទធរណីន្ទ្រវរ្ម័នទី១ គ.ស១១០៤-១១១៣ និងព្រះបាទសូរ្យវរ្ម័នទី២ គ.ស១១១៣-១១៤៥ ។ បន្ទាប់ពីកសាងរួច ពួកព្រហ្មណ៍បានរៀបចំអាសនៈផ្សេងៗ ដើម្បីគោរពបូជាឱ្យសមរម្យតាមសម័យកាលនីមួយៗ ។

ទាក់ទិននឹងសំណង់ប្រាសាទបុរាណនេះ លោកព្រឹទ្ធាចារ្យ សាវ៉ាយ ចន អាយុ៧២ឆ្នាំ ជាគណៈកម្មការវត្តភ្នំជីសូរ បានរៀបរាប់ថា ប្រាសាទនេះមានរាងស្ទើរបួនជ្រុង មានកំពែងព័ទ្ធជុំវិញ ប្រាសាទធំ នៅចំកណ្តាលមានប្រាសាទតូចៗ និងបណ្ណាល័យ២ ។ ដោយនៅខាងត្បូងមានប្រាសាទ ៤ និងផ្នែកខាងជើងមានប្រាសាទ៣ ប៉ុន្តែប្រាសាទទាំងនោះបានរងនូវការបំផ្លិចបំផ្លាញអស់មួយចំនួនហើយ ។

( តទៅទំព័រទី២១ )

## សិប្បកម្មតម្បាញហូល...

តំបន់ ដែលធ្វើហូលពុំសូវធូរធារ ។

បញ្ហានេះ លោក ប៉ោក ស្រ៊ុយ អាយុ៦៥ឆ្នាំ ជាមេភូមិព្រៃជប់ បានអះអាងថា ប្រជាជននៅក្នុងភូមិនេះ ប្រហែលជាង៩០% ប្រកបមុខរបរត្បាញហូល ទាំងប្រុសទាំងស្រី ក្មេងចាស់ ដើម្បីដោះស្រាយជីវភាពរស់នៅ ។ បើផ្ទះណាមានកូនចៅច្រើន មានក៏ត្បាញហូលច្រើនដែរ ហើយពួកគាត់មានជីវភាពមើលទៅធូរធារជាងអ្នកដែលមានសមាជិកតិច ។ ការត្បាញហូលនេះ គឺពិតជាចំណាយពេលវេលាច្រើន តែទទួលបានចំណូលតិច ព្រោះទំរាំត្បាញបានមួយក្បិនៗត្រូវចំណាយទៅលើសូត្រ ល័ក្ខ និងកម្លាំងពលកម្មផងដែរ ។ បើទូទាត់ទៅ គឺនៅសល់តិចសំរាប់ដោះស្រាយជីវភាពប្រចាំថ្ងៃ ទោះជាយ៉ាងនេះក្តី ក៏អ្នកស្រុកចៀសផុតពីការធ្វើចំណាកស្រុកដែរ ។ លោក ហៃ ហេង រស់នៅ ភូមិវាល ឃុំក្តាញ់ ស្រុកព្រៃកប្បាស ដែលជាឈ្មួញ ដើរទិញហូលបានបញ្ជាក់ថា គាត់ធ្លាប់ប្រកបរបរនេះជាង២០ឆ្នាំមកហើយ ដោយគាត់ទិញហូលពីអ្នកស្រុកតាមរយៈការឱ្យសូត្រ និងល័ក្តទៅមុន ។ នៅពេលត្បាញបានហើយ ពួកគាត់យកមកលក់ឱ្យ ហើយគាត់ក៏យកទៅលក់បន្តនៅផ្សារអូរឫស្សី ទួលទំពូង និងផ្សារធំថ្មី ក្រុងភ្នំពេញ ។

កញ្ញា ស៊ុយ ចាន់ស៊ីថា អាយុ២២ឆ្នាំ ជាអ្នកលក់ហូលនៅវិមានសូត្រខ្មែរ ផ្សារទួលទំពូង ក្រុងភ្នំពេញ បានរៀបរាប់ថា នៅក្នុងហាងរបស់កញ្ញាមានទទួលទិញ និងលក់ហូលឱ្យទៅភ្ញៀវទាំងបរទេស និងទាំងខ្មែរ ស្ទើរគ្រប់ប្រភេទ ព្រមទាំងមានការលក់ផលិតផល ដែលធ្វើពីសូត្រខ្មែរ ជាច្រើនទៀត ដូចជាសម្លៀកបំពាក់ កាបូបស្រោមសំបុត្រ កម្រាលតុ កៅអី ធៀបការ សឺមីដាក់ឯកសារ ។ សំភារៈទាំងនេះ គឺមានការពេញនិយមពីភ្ញៀវបរទេសណាស់ និងលក់បានតម្លៃគួរសម ពីព្រោះផលិតផលធ្វើពីសូត្រទាំងនោះអាចបោកទឹកបាន ឬអាចប្រើប្រាស់ជាអចិន្ត្រៃយ៍បានទៀតផង ។

សិប្បកម្មតម្បាញហូល ទោះបីជាមិនទាន់មានការប្រកួតប្រជែងពីបរទេស ឬមិនទាន់មានទីផ្សារឱ្យបានទូលំទូលាយក៏ដោយ ក៏ប៉ុន្តែ ភ័ព្វសំណាងល្អណាស់ ហូលខ្មែរធ្លាប់បានបង្ហាញរូបរាង និងបញ្ចេញមុខមាត់លើឆាកអន្តរជាតិ ជាពិសេសនៅក្នុងឱកាសការតាំងពិព័រណ៍សិប្បកម្ម ធ្វើដោយ ដៃ លើកទី១ នៅទីក្រុងបាងកក ប្រទេសថៃ កាលពីឆ្នាំ១៩៩៩ ដោយមានប្រទេសក្នុងសហគមន៍អាស៊ានចូលរួមផងដែរ ។

មន្ត្រីនាយកដ្ឋានសិល្បៈសូន្យរូប ដែលបានចូលទៅចូលរួមនៅក្នុងការតាំងពិព័រណ៍នោះ បានរៀបរាប់ថា ក្នុងចំណោមផលិតផលសិប្បកម្មដោយដៃ ដូចជា ចម្លាក់ឈើ ចម្លាក់ស្ពាន់ និងហូល មានការចាប់អារម្មណ៍ពីសំណាក់ជនបរទេសជាងគេ គឺហូលខ្មែរ ព្រោះវាមានគុណភាពល្អ និងមានគោមក្បាច់ចម្លាក់យ៉ាងស្រស់ស្អាត ។

បើយើងធ្វើការប្រៀបធៀបរវាងហូលខ្មែរ ជាមួយនឹងហូលប្រទេសផ្សេងៗទៀត ដូចជា ហូលឡាវ ថៃ និងឥណ្ឌូនេស៊ី គឺហូលខ្មែរយើងស្អាត និងមានគុណភាពល្អជាងគេ ។ ប៉ុន្តែ គួរឱ្យស្តាយនៅប្រទេសយើងសិប្បកម្មតម្បាញហូលពុំទាន់មានលក្ខណៈស្តង់ដា និងទីផ្សារឱ្យទូលំទូលាយ ដែលជាហេតុធ្វើឱ្យប្រជាពលរដ្ឋតម្បាញហូលនៅតែមានជីវភាពមិនធូរធារមិនទាន់អាចឆ្លើយតបទៅតាមតម្រូវការនៅឡើយទេ ៕

## ពិធីដង្ហែក្បួនចូលឆ្នាំខ្មែរ...

មោទនភាពក្នុងការចូលរួមគ្នាតាមស្ថានវប្បធម៌ជាតិ ដែលការចាប់ដៃគ្នាជាសម្ព័ន្ធភាពនេះ ធ្វើឱ្យយើងមានការវិវត្តន៍ ដែលមិនអាចនិយាយថាមិនដើរទៅមុខនោះទេ ។ យោងតាមសេចក្តីរាយការណ៍របស់អ្នកឆ្លើយឆ្លងកាសែតខ្មែរប៉ុស្តិ៍ប្រចាំក្រុង Long Beach តាមការសាកសួរប្រជាពលរដ្ឋខ្មែរនៅទីនោះ បានឱ្យដឹងថា ការដង្ហែក្បួនចូលឆ្នាំនេះ ពុំសូវមានមនុស្សម្នាចូលរួមច្រើនកុះ ករដូចបណ្តាឆ្នាំមុនៗទេ ព្រោះមតិបង្ហាញថា ពួកគេមិនចង់ចូលរួមទទួល និងផ្តល់កិត្តិយសឱ្យអ្នកដឹកនាំខ្មែរដែលមានបាតដៃ ប្រឡាក់ឈាមបង្កពុករលួយបណ្តេញប្រជាពលរដ្ឋឯង ជិះជាន់រំលោភដីធ្លី រំលោភសិទ្ធិសេរីភាព ។ល។

បើទោះបីមានមតិខាងលើនេះក៏ដោយត្រូវបានពួកអ្នកដឹកនាំក្រុងខ្មែរ Long Beach បានអះអាងថា ឆ្នាំនេះពិធីដង្ហែក្បួនមានភាពរលូន និងសប្បាយរីករាយ ក្រោយកិច្ចសហប្រតិបត្តិការនៃសហគមន៍ខ្មែរ Long Beach និងរាជរដ្ឋាភិបាលកម្ពុជា ដើម្បីពង្រីកនយោបាយសេដ្ឋកិច្ចវប្បធម៌នៅលើឆាកអន្តរជាតិ ។ គួរបញ្ជាក់ថា ការរៀបចំក្បួនដង្ហែវប្បធម៌ខ្មែរ តាំងដើមទីមកដល់ឆ្នាំ២០០៨ចំនួន ៤ លើក ទៅហើយ ដែលការខ្វែងយោបល់គ្នានៃសហគមន៍ Long Beach នៅតែបន្ត ប្រេះស្រាំនឹងគ្នាជាពីរក្រុមឱ្យកាន់តែឃ្លាតឆ្ងាយគ្នានៅឡើយ ដោយគេពុំទាន់ឃើញចំណុចផ្លូវរួមណាមួយសំរាប់ផ្សះផ្សាគ្នាបាននៅឡើយទេដែរ ៕

***រាយការណ៍បន្ថែមដោយ : ឯល វ៉ាន់ថា***

# ស្ពានអូរជីកជាទ្វារទឹកនៃការងារកសិកម្ម និងជាប្រព័ន្ធគមនាគមន៍ តាំងពីសម័យនគរ

**ឧត្តរមានជ័យ : ម៉ី សម្ផស្ស**

●●●នៅសម័យមហានគរដ៏រុងរឿងព្រះមហាក្សត្របានអនុវត្តនយោបាយទឹក ដើម្បីលើកកំពស់ជីវភាពប្រជាពលរដ្ឋ និងធ្វើឱ្យប្រទេសជាតិមានការរីកចំរើនរុងរឿងដល់កំរិតកំពូលទៀតផង សូម្បីតែនៅបរិវេណសំណង់ប្រាសាទក៏មានតួទឹកស្រះ ឬកស្សិណដែរ ។



ស្ពានអូរជីកដែលកសាងពីថ្មបាយក្រៀមនៅសម័យមហានគរ

ក្នុងនោះគេសង្កេតឃើញស្ពានអូរជីកដែលមានប្រវែងប្រមាណ៣០០ម៉ែត្រ និងកំពស់ប្រមាណ១០ម៉ែត្រ ជីកតាំងពីសម័យបុរាណរហូតដល់បច្ចុប្បន្នក្លាយជាទ្វារទឹកសំរាប់តភ្ជាប់បណ្តាញប្រព័ន្ធធារាសាស្ត្រពី បឹង ទន្លេ ព្រែក អូរ ល្បើក បារាយណ៍ ដើម្បីជាប្រយោជន៍ដល់ការងារកសិកម្ម និងតភ្ជាប់ទៅប្រព័ន្ធគមនាគមន៍ ព្រមទាំងជាសំណង់ប្រវត្តិសាស្ត្រដ៏ធំអស្ចារ្យសំរាប់ទាក់ទាញភ្ញៀវទេសចរទៀតផង ។

ស្ពានអូរជីក ឬព្រែជីកស្ថិតនៅឃុំជើងទាន ស្រុកចុងកាល់ ខេត្តឧត្តរមានជ័យ កសាងពីថ្មបាយក្រៀម នាសម័យមហានគរដ៏រុងរឿងនៅរឹងមាំដល់សព្វថ្ងៃ បើយើងធ្វើដំណើរមិនចាប់អារម្មណ៍ប្រាកដជាមិនដឹងថា ស្ពាននោះស្ថិតនៅត្រង់ណានោះទេ ។

ប៉ុន្តែតាមឯកសារខ្លះបញ្ជាក់ថា ស្ពានអូរជីកនោះកសាងក្នុងសម័យមហានគរ គឺមុនរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧ ដែលតំបន់នោះមានទឹកភ្លៀងជោគជាំខ្លាំងនារដូវវស្សា ធ្វើឱ្យលិចផ្លូវពិបាកក្នុងការធ្វើដំណើរឆ្លងកាត់លិចភូមិឋានដំណាំ កសិកម្មជាញឹកញាប់ ទើបកសាងស្ពាននេះឡើង ដើម្បីជាប្រយោជន៍កុំឱ្យស្ទះទឹកផង និងជាមធ្យោបាយតភ្ជាប់នៃប្រព័ន្ធគមនាគមន៍ទៅកាន់តំបន់នានាផង ។

បើយើងពិនិត្យតាមលក្ខខណ្ឌធម្មជាតិ តាមបណ្តោយព្រែកអូរជីកមានទឹកហូរធ្លាក់មកពីតំបន់ផ្សេងៗ ដូចជាតំបន់ភ្នំគូលែន ភូមិសាស្ត្រ ខេត្តសៀមរាប, ឧត្តរមានជ័យ បានហូរមកចាក់បំពេញព្រែកអូរជីក រួចហូរឆ្ពោះទៅបឹងទន្លេសាបដ៏ធំល្វឹងល្វើយ ដែលធ្វើឱ្យព្រែកនេះមានទឹកយ៉ាងច្រើនសន្ធឹកសន្ធាប់ សំរាប់ការងារស្រែចំការរបស់ប្រជាពលរដ្ឋ និងជួយឱ្យមានជីវភាពខ្ពស់ទៀតផង ។

ទាក់ទិននឹងព្រែកអូរជីកនេះ តាមអត្ថបទស្រាវជ្រាវរបស់លោក រុន សម្បត្តិ បានបញ្ជាក់ថា ព្រែកជីកនេះកសាងឡើងនៅមុនរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧ ព្រោះនៅក្នុងរាជរបស់ព្រះអង្គទ្រង់បានកសាងផ្លូវមួយខ្សែកាត់តាមខ្លោងទ្វារខាងត្បូងក្រុងអង្គរធំ ទៅទិសខាងកើតឆៀងខាងត្បូង សំដៅទៅខេត្តកំពង់ធំ មានបណ្តោយប្រវែង១៥០គីឡូម៉ែត្រ ដោយកាត់ទំនប់ ព្រែជីកនេះជាពីរកំណាត់ នៅត្រង់ចំណុចថ្នល់ចែកនៃឃុំដំដែក ស្រុកសូត្រនិគមសព្វថ្ងៃ (បច្ចុប្បន្ននេះគឺជាកំណាត់មួយនៃផ្លូវជាតិលេខ៦) ។

ជាក់ស្តែងយើងឃើញមានបន្សល់ទុកនូវស្ពានបុរាណចំនួន១០ នៅតាមបណ្តោយកំណាត់ផ្លូវចាប់ពីកំពង់ក្តី (ព្រះប្រទល់ខេត្តកំពង់ធំ) មកខេត្តសៀមរាប ។ ប៉ុន្តែកាលពីទសវត្សរ៍ឆ្នាំ៧០ មានស្ពានដល់ទៅ២២ឯណោះ ហើយបាត់បង់ដោយសារតែការកសាង និងជួលជុលផ្លូវ ។ កាលដែលព្រះបាទជ័យវរ្ម័នទី៧ ទ្រង់សម្រេចព្រះទ័យបញ្ជាឱ្យគេកសាងផ្លូវ ដោយពុះកាត់ទទឹងព្រែកជីកនេះ ប្រហែលជាពេលនោះព្រែកជីកបានកកស្ទះ ឬក៏ឈប់ដំណើរការមិនអាចប្រើប្រាស់ទៀតកើត និងយល់ថា វាលែងមានសារប្រយោជន៍ក្នុងការប្រើប្រាស់ ទើបព្រះអង្គសម្រេចព្រះទ័យកសាងផ្លូវនេះឡើង ។

សព្វថ្ងៃនេះនៅមានទស្សនៈជាច្រើនដែលទាក់ទងទៅនឹងសារសំខាន់របស់ព្រែកជីកនេះ ដោយបានចោទសួរថា តើវាមានតួនាទីសំខាន់អ្វីខ្លះបានជាប្រជាជននៅសម័យបុរាណនាំគ្នាជីកព្រែកមានទំហំដល់ថ្នាក់នេះ ? ហើយគេប្រើប្រាស់វាសំរាប់ធ្វើអ្វី ?

អ្នកសិក្សាខ្លះបានបញ្ចេញគំនិតថា ព្រែកជីកនេះមានតួនាទីមិនត្រឹមតែបង្ហូរទឹកនៅរដូវវស្សា

( តទៅទំព័រទី២៤ )

# ជនជាតិគាគតិចរៀបការ..

ត្រូវស្តោះទឹកមាត់ឱ្យចូលក្នុងត្រឡោកដូង ដែលមានឈាមរបស់សត្វ រួចហើយពួកគេត្រូវត្រឡោកដូងទៅខោកក្បាលភ្ញៀវឱ្យបានគ្រប់គ្នា ។ កាយវិការនេះជាសេចក្តីបញ្ជាក់ពីការសប្បាយ និងជាអំណោយរបស់កូនកម្លោះក្រមុំតាំងពីបុរាណ ដែលឈ្មោះថា "សីលខាង" ។

ប្រភពខាងលើបន្តទៀតថា នៅថ្ងៃទី២គេរៀបចំពិធីបឹតស្រាជុំគ្នាក្នុងពាងដ៏ធំមួយ ដែលមានឪពុកម្តាយ មេបា មេកន្ទ្រាញ និងកូនកំលោះក្រមុំ ដើម្បីជាការថ្លែងអំណរគុណដល់ភ្ញៀវដែលបានចូលរួម ។ ក្នុងពេលនោះមេកន្ទ្រាញក៏បាន



បងប្អូនជនជាតិព្នងកំពុងធ្វើគោ



ស្ត្រីជនជាតិព្នងកំពុងជក់បារី

យកក្រមាទៅរុំកូនក្រមុំកំលោះឱ្យជាប់គ្នា ក្នុងន័យបញ្ជាក់ថា ចាប់ពីពេលនោះទៅអ្នកទាំងពីរនឹងក្លាយទៅជាប្តីប្រពន្ធនៅជាមួយគ្នាអស់មួយជីវិត ។

នៅពេលចប់ពិធីសែនព្រេន កូនកំលោះត្រូវនាំប្រពន្ធទៅផ្ទះរបស់ខ្លួន ដើម្បីណែនាំឱ្យស្គាល់ពីសាច់ញាតិរបស់ខ្លួន ហើយទើបវិលត្រឡប់មកផ្ទះវិញ ។ ចាប់តាំងពីថ្ងៃនេះទៅកូនប្រុសត្រូវរស់នៅខាងប្រពន្ធរហូត គឺមិនត្រូវមកលេងផ្ទេសផ្តាស់នោះទេ លើកលែងតែឪពុកម្តាយមានជំងឺធ្ងន់ធ្ងរប៉ុណ្ណោះ ។

ទាក់ទិននឹងបញ្ហានេះ ចាស់ទុំព្នងបាននិទានពីប្រពៃណីនេះ ថាពួកគាត់យកតម្រាប់តាមលោក ស្រុះផ្លូ ដែលជាបុព្វការីជន ត្រូវបានគេធ្វើអាស្រម និងរូបសំណាកដើម្បីគោរពបូជា ពិសេសអ្នករស់នៅទីប្រជុំជនខេត្តមណ្ឌលគីរី ។ កាលពីជំនាន់នោះបុរសម្នាក់ឈ្មោះ ស្រុះ បានចាកចេញពីផ្ទះរបស់ខ្លួនទៅដើរលេងផ្ទះញាតិមិត្តនៅក្នុងភូមិណ្ហោងអង្ការបោះ ក៏បានជួបនឹងក្រមុំគ្រប់លក្ខណ៍ម្នាក់ឈ្មោះនាង ផ្លូ អ្នកទាំងពីរចាប់ចិត្តស្រឡាញ់គ្នាសន្យាយកគ្នាធ្វើជាគូគាប់ ។

បន្ទាប់មកអ្នកទាំងពីរក៏មានការយល់ចិត្តថ្លើមគ្នាបានឱ្យឪពុកម្តាយខាងប្រុសចូលស្តីដណ្តឹងតាមទំនៀមទំលាប់ រីឯឪពុកម្តាយនាង ផ្លូ យល់ព្រម ។ ជនជាតិព្នងមានត្រណមមួយ ក្រោយពីស្តីដណ្តឹងរួច មិនទាន់កំណត់ថ្ងៃរៀបការនោះទេ គឺរង់ចាំមួយរយៈសិន លុះត្រាតែកូនប្រុសមានគ្រឿងបណ្ណាការ គោ ក្របី ជ្រូក ពាង សំរាប់បឹតស្រា និងគ្រឿងអលង្ការបានគ្រប់ចំនួនសិន ទើបកំណត់ថ្ងៃរៀបការជាក្រោយ ។

ប៉ុន្តែនៅពេលនាង ផ្លូ ទៅដងទឹកក៏បាត់ខ្លួនរហូត ទោះបីជាក្រុមគ្រួសារ ស្វែងរកយ៉ាងណាក៏ដោយ ចំណែកឯ ស្រុះ ជាគូដណ្តឹងក៏ប្រឹងស្វែងរកដែរ នៅថ្ងៃមួយពេលកំពុងកាប់ឆ្ការព្រៃក្បែរជើងភ្នំជំហ្ការ លោកយាយ ជីហ្ការ និង ជីហូវ បានយកដំណឹងនេះទៅប្រាប់នាង ផ្លូ ។ អ្នកទាំងពីរបានជួបគ្នាមានទឹកចិត្តសប្បាយខ្លាំងណាស់ សុខចិត្តរស់នៅជាមួយគ្នា ហើយដំណឹងនេះ ធ្វើឱ្យក្រុមគ្រួសារ និងអ្នកស្រុកមានការភ្ញាក់ផ្អើលយ៉ាងខ្លាំង ទោះបីជាធ្វើការបន់ស្រន់យ៉ាងណាក្តី ។

ប្រភពខាងលើបន្តថា លុះចំណារកាលក្រោយមកនៅពេលឪពុកម្តាយ ស្រុះ មកកាប់ឆ្ការព្រៃនៅក្បែរជើងភ្នំនេះ ដើម្បីធ្វើស្រែចំការអ្នកថែរក្សា ភ្នំឃើញក៏យកដំណឹងនេះទៅប្រាប់ ស្រុះ ផ្លូ ហើយអ្នកទាំងនោះក៏មកជួបជុំគ្នាយ៉ាងសប្បាយរីករាយក្រៃលែង ។

ខណៈនោះ ស្រុះផ្លូ បានប្រាប់ទៅឪពុកម្តាយថា ខ្លួនបានក្លាយជាអ្នកបន្តវេនថែរក្សាភ្នំនេះ ដោយប្រាប់ទៅឪពុកម្តាយឱ្យយកដំណឹងនេះទៅប្រាប់អ្នកស្រុកភូមិថា បើកាលណាមានទុក្ខលំបាកគ្រោះចង្រៃគ្រោះធម្មជាតិ អំពើចោរកម្ម បាត់បង់បងប្អូនកូនប្រពន្ធ សូមឱ្យពួកគាត់រៀប

( តទៅទំព័រទី១៧ )

# គំនិតតូចមួយសំរាប់ជួយមាន...

មួយប៉ែល១ ដែលបោះទៅប៉ះខ្នងសត្វលាក៏បានធ្វើនូវអាការៈគួរឱ្យងឿងឆ្ងល់ ។ វាគ្រវែងខ្លួនអាចម៍ដីក៏ធ្លាក់ចុះអស់ ហើយបោះមួយជំហ៊ានឡើងលើ ។ ពួកគេទាំងនោះ បន្តបោះអាចម៍ដីលើខ្នងវា សត្វលាក៏ចេះតែគ្រវែងខ្លួនវា ហើយបន្តបោះជំហ៊ានឡើងលើមួយជំហ៊ានទៀត ។ មិនយូរឡើយម្នាក់ៗងឿងឆ្ងល់នឹងសត្វលាបោះជំហ៊ានឡើងលើមាត់អណ្តូង ហើយដោយសភាពរីករាយលាក៏បានបោលចេញទៅ ។ សតិសីលធម៌ : ជីវិតនេះនឹងត្រូវរងនូវខ្សាច់ធូលីគ្រប់បែបយ៉ាងល្បិចកលដកខ្លួន ចេញពីអណ្តូង គឺត្រូវបានគ្រលាស់ខ្លួនឱ្យចាកផុតពីធូលីកខ្វក់ទាំងនោះ ហើយបោះជំហ៊ានឡើង ។

បញ្ហានីមួយៗរបស់យើងគ្រប់រូបជាកាំជណ្តើរថ្មួយ ។ យើងអាចរំដោះខ្លួនឡើង រួចពីជម្រៅអណ្តូងដោយសារការប្រឹងប្រែងមិនឈប់ឈរ សូមកុំប្រែប្រួល កុំបោះបង់ចោលឱ្យសោះ !

វិន័យដ៏សាមញ្ញទាំង ៥ ដើម្បីបានសុខសប្បាយសូមចងចាំ :

១. សូមឱ្យបេះដូងរបស់អ្នករួចចាកពីក្តីស្អប់ខ្ពើម
២. សូមឱ្យចិត្តអ្នកស្រឡះផុតពីក្តីកង្វល់
៣.ចូររស់នៅយ៉ាងសាមញ្ញ ហើយពេញចិត្តនឹងអ្វីដែលយើងមាន
៤. ចូរចេះតែឱ្យ
៥.សង្ឃឹមយ៉ាងតិចពីអ្នកដទៃ តែយ៉ាងច្រើនពីកុសលកម្ម(ទេវតា)

ចូរញញឹមនឹងចូរសប្បាយរីករាយក្នុងសុខភាពនៃជីវិត ៕

## NEW YEAR BABY ...

តាមការណែនាំរបស់អ្នកស្រី រ៉ង ស៊ន ដំណាងឱ្យសហមាគមខ្មែរនៅហ្វីឡាដែលហ្វីយ៉ា អ្នកទស្សនាខ្សែភាពយន្តនាងបានបញ្ជាក់យ៉ាងនេះថា "បានថតប្រមូលជាឯកសារអស់រយៈពេល៥ឆ្នាំយ៉ាងព្យាយាមក្នុងចំណោមរូបភាពថតប្រមាណ១៥០ម៉ោង នាងចម្រាញ់យកមកបង្ហាញបានតែមួយម៉ោងកន្លះប៉ុណ្ណោះ នោះគឺដោយសារតែចង់ដឹងណាស់អំពីឫសគល់ប្រវត្តិនៃក្រុមគ្រួសាររបស់នាង ៕

**ពិនសំខុន**

## ប្រាសាទភ្នំជីសូរជាកេរ...

លោកព្រឹទ្ធាចារ្យបានបន្តថា នៅក្នុងប្រាសាទ មានតម្កល់លិង្គព្រះឥសូរ និងយោនីព្រះនាង ឧមា ចម្លាក់ក្បាច់រចនាផ្សេងៗ ។

នៅពេលសួរថា ហេតុអ្វីបានជាសំណង់ធ្លាក់បែកបាក់នោះ លោកព្រឹទ្ធាចារ្យ បានរៀបរាប់ទាំងទឹកមុខស្លូតថា បើតាមលោកដឹងក្នុងអំឡុងឆ្នាំ១៩៧០ មានការទម្លាក់គ្រាប់បែកពីសំណាក់ទាហានអាមេរិក រយៈពេល៣យប់ និងបួនថ្ងៃ ។ ដោយសារពួកទាហានអាមេរិកសង្ស័យថា មានទាហានយៀកណាមនៅលាក់ខ្លួន និងឆ្លងកាត់ទីនោះ ក៏ទម្លាក់គ្រាប់បែកយ៉ាងច្រើន បានបង្កឱ្យសំណង់ប្រាសាទ និងសមិទ្ធផលនានាទទួលរងនូវការខូចខាតយ៉ាងដំណំ ។

បន្ទាប់ពីនោះមកទៀត ពួកជនទុច្ចរិតបានលួចគាប់រូបចម្លាក់កាត់ក្បាលអ្នកតាចំនួន៩លើក ធ្វើឱ្យសម្បត្តិវប្បធម៌ជាតិត្រូវទទួលនូវការខូចខាតស្ទើរអស់ ។

ព្រះតេជគុណ សុខ ហ៊ុត អាយុ៧០ឆ្នាំ ជាគ្រូសូត្រស្តីទីវត្តភ្នំជីសូរ បានមានសង្ឃដីកាថា នៅបរិវេណប្រាសាទនេះ គណៈកម្មការវត្តបានចាត់ចែងឱ្យមនុស្សធ្វើការបោសសម្អាត និងថែទាំទីកន្លែងសក្ការបូជា ដើម្បីជួយសម្រួលដល់ភ្ញៀវទេសចរ ។

តាមការសង្កេតរបស់ព្រះសង្ឃនៅថ្ងៃសៅរ៍ និងអាទិត្យមានភ្ញៀវមកមើលប្រាសាទដែរ ប៉ុន្តែមានចំនួនតិចតួចនោះទេ ។ ភ្ញៀវទេសចរ ដែលមកទស្សនាច្រើន គឺនៅពេលបុណ្យចូលឆ្នាំខ្មែរ កាន់បិណ្ឌ និងកឋិនទាន ដែលនៅពេលនោះ មានមនុស្សច្រើនខ្លាំងណាស់ រកកន្លែងអង្គុយស្ទើរតែពុំបាន ។

នៅលើកំពូលភ្នំជីសូរនេះ មានបារមីអ្នកតាក្រហម.ក យាយម៉ៅ ខ្លាំងពូកែណាស់កាលពីសម័យមុន ។ សព្វថ្ងៃនេះអ្នកស្រុកនៅតែមានជំនឿ ហើយទៅធ្វើការបួងសួងបានសមប្រកបទៀតផង ដែលជាហេតុធ្វើឱ្យមានសមិទ្ធយ៉ាងច្រើននៅទីនេះ ៕

## ប្លែកៗ... ប្លែកៗ... ប្លែកៗ...

ជួយទប់គ្នាយើង ទាន់ប៉ូលិសបាយថ្ងៃត្រង់

សម្លាញ់កុំដើរខ្យល់ណា ប្រយ័ត្នគ្នាបាញ់ខុសសត្រូវ

អ្នកដឹងរឿងសម្ងាត់ ត្រូវគេយកលុយបិទមាត់

មិនខ្វល់ពីនរណាថា ឱ្យតែភ្លៀងមិនទទឹក

អូននៅឱ្យស្ងៀម បងរកចៃឱ្យ

ប្អូនប្រុសកុំភ័យអង្គុយឱ្យជាប់ អ្នកណាធ្វើបាបឯង

នរណាអស់មុនសម្លាញ់ ទាន់ម្ចាស់នៅផ្សារ

ដឹកកូនទាហានយកទៅបង្វឹកការពារបន្ទាយ

មិនបាច់ប្រើទេតទេអូន បងក្តៅមុខតាយហើយឃ្លីង!

ឃ្មក...ញ៉ីបន្តិចទៅសម្លាញ់ ដើម្បីស៊ូឱ្យចប់ទឹក

# ដីឡើងថ្លៃទំនាស់កាន់តែច្រើន

**ឡុងប៊ិច : សុភាឫទ្ធិ**

•••ចាប់តាំងពីដីមានហាងឆេងខ្ពស់អ្នករស់នៅជាយទីក្រុងភ្នំពេញក៏ដូចជានៅតាមបណ្តាខេត្ត-ក្រុងនានា កំពុងតែត្រូវប៉ាន់ខ្លាំងណាស់ ។ ពួកគេបានលក់ដីផ្ទះសម្បែង និងស្រែចំការ ដើម្បីយកលុយដោះស្រាយជីវភាពឱ្យប្រសើរជាងមុន ។

ទន្ទឹមនឹងនោះដែរ អ្នកមានលុយ មានអំណាចមួយចំនួន បានឃុបឃិតជាមួយអាជ្ញាធរ រំលោភដីកម្មសិទ្ធិរបស់ខ្លួននោះ ។

កន្លងមកប្រជាពលរដ្ឋដែលរស់នៅទីក្រុងភ្នំពេញ និងបណ្តាខេត្ត-ក្រុងនានា បានលើកគ្នាមកដេកនៅមុខរដ្ឋសភា និងទៅតវ៉ានៅមុខផ្ទះ ហ៊ុន សែន ឱ្យជួយរកយុត្តិធម៌ស្ទើររាល់ថ្ងៃ ។ សូម្បីតែបងប្អូនជនជាតិ ព្នង កួយ ដែលរស់នៅខេត្តមណ្ឌលគិរី ក៏លើកគ្នាមកតវ៉ាដែរ គឺពួកគាត់បានចោទអ្នកស្រី គាត កល្យាណី ថា បានរំលោភយកដីរបស់ពួកគាត់យ៉ាងអយុត្តិធម៌ ។



ប្រជាពលរដ្ឋលើកគ្នាមកតវ៉ារឿងដីនៅមុខរដ្ឋសភា



សមត្ថកិច្ចប៉េអឹមចាប់ប្រជាពលរដ្ឋតវ៉ារឿងទំនាស់ដីធ្លីនៅតំបន់ដីក្រហមរាជធានីភ្នំពេញ

បំពានដីប្រជាពលរដ្ឋក្រីក្រ ក្រោមរូបភាពដីសម្បទាន សំរាប់ធ្វើការអភិវឌ្ឍសំណង់ផ្ទះល្វែង ក្រុម-ហ៊ុន ឬអាជីវកម្មផ្សេងៗ ។ ទង្វើនេះបានធ្វើឱ្យប្រជាកសិករមួយចំនួនត្រូវបាត់បង់ដីស្រែចំការ និងលំនៅឋានស្ទើរគ្រប់ខេត្ត-ក្រុង ហើយនាំគ្នាមកប្តឹងដល់នាយករដ្ឋមន្ត្រី រដ្ឋសភា និងប្តឹងដល់តុលាការរាប់សិបឆ្នាំនៅតែគ្មានដំណោះស្រាយដដែល ។

ការរំលោភបំពាននេះកាន់តែមានទ្រង់ទ្រាយធំ និងកាន់តែសាហាវពីសំណាក់អ្នកមានលុយដែលឃុបឃិតគ្នាជាមួយអ្នកមានអំណាច បានចាប់ប្រជាពលរដ្ឋម្ចាស់ដើមបណ្តឹងមួយចំនួនដាក់គុកយ៉ាងអយុត្តិធម៌ ដើម្បីគំរាមកំហែងបំបាក់ស្មារតី ។ អ្នកខ្លះទៀត ត្រូវសមត្ថកិច្ចដែលចុះអន្តរាគមន៍បាញ់ឱ្យរបួស និងស្លាប់បាត់បង់ជីវិតដូចសត្វតិរច្ឆានក៏មាន ពីព្រោះតែចេញមុខការពារ

ជាឧទាហរណ៍នៅទីក្រុងភ្នំពេញ ក្រោមរូបភាពតំបន់អភិវឌ្ឍន៍សាលាក្រុងបានបណ្តេញអ្នកស្រុកចេញយកដីសង់ផ្ទះល្វែងលក់ ហើយឱ្យពួកគាត់ទៅរស់នៅជាយក្រុង ក្នុងខណ្ឌដង្កោយ៉ាងអយុត្តិធម៌ ។ ដីតំបន់ទំនាស់ទាំងនោះរួមមានតំបន់បឹងកក់ ឬកប៉ុរីកីឡា មន្ទីរពេទ្យធំ ជាពិសេសនៅតំបន់ដីក្រហម ដែលមានប្រជាពលរដ្ឋ១.៤៦៥ គ្រួសារ ត្រូវអាជ្ញាធរបណ្តេញកាលពីថ្ងៃទី២៩ សីហា ឆ្នាំ២០០៧ ។

អ្នកស្រុកទាំងនោះត្រូវអាជ្ញាធរ ប៉េអឹម ប៉ូលិស ចុះរុះរើផ្ទះសម្បែងយ៉ាងអយុត្តិធម៌ ហើយអ្នកណាដែលចេញមុខប្រឆាំងខ្លាំង ដូចអ្នកស្រី ឡុង ស្រីលក្ខណ៍ អាយុ៨៨ឆ្នាំ រួមទាំងកូនចៅត្រូវសមត្ថកិច្ចចាប់ដាក់ខ្នោះ ។ ទំនាស់ដីធំរូងធំរាស់នោះ ភាគច្រើនបណ្តាលមកពីក្រុម-ហ៊ុនឃុបឃិតជាមួយអាជ្ញាធរ ដែលអាជ្ញាធរផ្តល់ដីសម្បទានមិនបានសិក្សាឱ្យល្អិតល្អន់ប៉ះពាល់ដល់លំនៅឋានរបស់ប្រជាពលរដ្ឋ ក៏ដូចជាដីសំរាប់ធ្វើស្រែចំការផងដែរ ។

បញ្ហានេះត្រូវបានអ្នកស្រី ជួង ចំរុង មន្ត្រីកម្មវិធីសមាគមអាដហុកការពារសិទ្ធិមនុស្សបានឱ្យដឹងថា ការផ្តល់ដីសម្បទានទៅឱ្យក្រុមហ៊ុនឯកជនពុំបានសិក្សាច្បាស់លាស់ ធ្វើឱ្យប៉ះពាល់ដល់ដីរបស់ប្រជាពលរដ្ឋ បង្កឱ្យមានទំនាស់មិនឈប់ឈរ ហើយរដ្ឋគ្មានដីបំរុងទុកសំរាប់ដោះស្រាយជាបន្ទាន់ ។ ម្យ៉ាងទៀតពួកឈ្មួញបានទិញដីទុកច្រើន ធ្វើឱ្យប្រជាកសិករបាត់បង់ដីស្រែចំការជាបន្តបន្ទាប់ ។

អ្នកស្រីបន្តថា : ក្នុងរឿងទំនាស់ដីធ្លីនេះ



ប្រជាពលរដ្ឋស្រុកស្វាយចេកខេត្តបន្ទាយមានជ័យតវ៉ារឿងដីធ្លីនៅសាលាស្រុក

ប្រជាពលរដ្ឋតែងតែដាក់ពាក្យបណ្តឹងទៅអាជ្ញាធរមូលដ្ឋាន ឱ្យជួយដោះស្រាយដែរ ប៉ុន្តែមានភាពយឺតយ៉ាវពេក ។ ទង្វើនេះ ធ្វើឱ្យពួកគាត់អស់ជំនឿលើកគ្នាមកទីរួមខេត្ត ឬក្រុងភ្នំពេញដើម្បីបញ្ចប់រឿង ប៉ុន្តែក្តីសង្ឃឹមរបស់ពួកគាត់ភាគច្រើនពុំបានសំរេចនោះទេ ។

បញ្ហាទំនាស់ដីធ្លីនេះ នៅតាមខេត្តខ្លះ មានទំនាស់៥ឆ្នាំ ខ្លះទៀត១០ឆ្នាំ នៅតែដោះស្រាយមិនទាន់ចេញដោយសារខាងក្រុមហ៊ុនគេមានលុយទៅសូកប៉ាន់មន្ត្រីតុលាការ ឬអាជ្ញាធរមានសមត្ថកិច្ច ផ្ទិបសំណុំរឿងនោះ ។ ម្យ៉ាងទៀតពួកគេឱ្យតុលាការកាត់ក្តីឱ្យអ្នកស្រុកចាញ់ និងគំរាមចាប់អ្នកដែលចេញមុខតវ៉ាដាក់គុកយ៉ាងអយុត្តិធម៌បំផុត ។

ក្នុងពេលជាមួយគ្នានោះផងដែរ ពួកអ្នកមានលុយបានរត់ការទៅទីស្តីការគណៈរដ្ឋមន្ត្រី ឬនាយករដ្ឋមន្ត្រី ដើម្បីយកពេលយល់ព្រមថាដីនោះស្របច្បាប់ជារបស់ខ្លួន គំរាមកំហែងប្រ-ជាពលរដ្ឋលែងឱ្យប្រឆាំងតវ៉ាបន្តទៀត ។

យោងតាមទស្សនាវដ្តីប្រជាប្រិយចុះផ្សាយកាលពី ខែកុម្ភៈ ឆ្នាំ២០០៨ បានបញ្ជាក់ថា ទំនាស់ដីធំរូងធំរាស់ធំៗមិនទាន់ដោះស្រាយចេញ តាំងពីឆ្នាំ២០០៧ បន្ត ដល់ឆ្នាំ ២០០៨ រួមមាន :

**១. ខេត្តតាកែវ :** ប្រជាពលរដ្ឋចំនួន ១៨៣ គ្រួសារ រស់នៅភូមិឃ្លាំងសម្បត្តិ ឃុំពុតសរ ស្រុកបាទី មានទំនាស់ដីធ្លីជាមួយអនុប្រធានមណ្ឌលអភិវឌ្ឍប្រជាពលវប្បកម្មលើផ្ទៃដីទំហំ ១២ ហិកតា និង២២ អារ ។ ក្នុងបណ្តឹងនោះបញ្ជាក់ថា ដីនោះពីដើមឡើយ អាជ្ញាធរ ស្រុកខ្ចីពីពួកគាត់នៅឆ្នាំ១៩៨៦ ដើម្បីធ្វើស្រែពិសោធន៍ ប៉ុន្តែ ឆ្នាំ២០០៦ ខាងមណ្ឌលអភិវឌ្ឍប្រជាពលវប្បកម្ម លួចកាត់ដីលក់ឱ្យឈ្មួញអស់ ៥៥.២៩៨ ហិកតា ។ ឃើញដូច្នេះ ពួកអ្នកស្រុកក៏បានដាក់ពាក្យបណ្តឹងទៅអាជ្ញាធរឃុំ-ស្រុក និងឡើងដល់ភ្នំពេញ នៅតែគ្មានដំណោះស្រាយដដែល ។

**២. ខេត្តបាត់ដំបង :** ប្រជាពលរដ្ឋចំនួន៦៥៤ គ្រួសារ នៅភូមិអង្គ ឃុំតាម៉ឺន ស្រុកថ្មគោល មានក្តីក្តាំងជាមួយអនុប្រធានសហគមន៍កសិករស្រែប្រាំង ។ នៅថ្ងៃទី២៦ ឧសភា ឆ្នាំ២០០៧ សាលាខេត្តបាត់ដំបង បានចេញសេចក្តីណែនាំមួយចំនួនតាមការស្នើសុំរបស់ប្រជាពលរដ្ឋ ប៉ុន្តែសហគមន៍កសិករមិនយល់ព្រម គឺមិនអនុញ្ញាតឱ្យកសិករនេសាទត្រីនៅតំបន់នោះឡើយ ។

ករណីមួយទៀតអ្នកស្រុកចំនួន៣៨គ្រួសារ នៅភូមិជ្រោយស្នាយ និងភូមិរូងអំពិល ឃុំខ្នារមាស ស្រុកបវេល បានប្តឹងឈ្មោះ អៀង អឿង អាយុ៦៦ ឆ្នាំ រស់នៅភូមិដង្កត់ធ្នង់ ឃុំ តាក្រាម ស្រុកសណ្តាន់ថា បានរំលោភយកដីពួកគាត់នៅចំណុចអូរល្វ័ប្រេងទំហំ១១០ហិកតា តាំងពីឆ្នាំ ១៩៩៩ ។

**៣. ខេត្តសៀមរាប :** ប្រជាពលរដ្ឋចំនួន១៦៧ គ្រួសារ នៅភូមិព្រះធាតុ ឃុំខ្វាវ ស្រុកជីក្រែង បានប្តឹងអាជ្ញាធរមានសមត្ថកិច្ចឱ្យជួយដោះស្រាយករណីក្រុមហ៊ុនសុភ័ណធារីបានរំលោភយកដីពួកគាត់អស់ ១.២០១ហិកតា ។

ដីនោះជារបស់ប្រជាកសិករ ប៉ុន្តែត្រូវអាជ្ញាធរធ្វើសម្បទានឱ្យក្រុមហ៊ុនខាងលើ ដែលពុំមានការយល់ព្រមមិនតែប៉ុណ្ណោះអាជ្ញាធរគំរាមប្រ-ជាកសិករទៀត ។ ( **តទៅទំព័រទី២៥** )

# បច្ចុប្បន្នភាពរឿងមិនគួរកើតនៅកម្ពុជា

## ក្អួតឈាមដូច អុកសារ៉េន ពេលប្រពន្ធលួចរួមរ័កជាមួយកូនប្រសា

***កម្ពុជា : សម្ពស្ស***

ភាពស្និតស្នាលរវាងម្តាយក្មេក និងកូនប្រសាប្រុសញីកញាប់ ក៏បណ្តាលឱ្យភ្លើងតណ្ហាពុះកញ្ជ្រោលឡើង ភ្លេចអស់នូវសេចក្តីអៀនខ្មាសបុណ្យបាប ហើយបានលួចរួមរ័កជាមួយគ្នាថែមទៀត ។ ចំណែកបុរសជាប្តី និងត្រូវជាឪពុកក្មេកនៅពេលឃើញហេតុការណ៍បែបនេះ ណែនាំប្រពន្ធមិនព្រមស្តាប់ខ្មាសគេពេកឈឺចាប់រហូតក្អួតឈាមស្លាប់ដូច អុក-សារ៉េន អ៊ីចឹង ។

គូស្នេហាមិនខ្លាចរកាដែកនេះ ម្តាយក្មេកឈ្មោះ យាយ សារ៉ាយ អាយុ៦៥ឆ្នាំ ចំណែកកូនប្រសាឈ្មោះ ដុង ធី អាយុ ៣៨ឆ្នាំ រស់នៅភូមិ ស្ទឹងកំបុត ឃុំរហាល ស្រុកព្រះនេត្រព្រះ ខេត្តបន្ទាយមានជ័យ ។

ស្ត្រីឈ្មោះ ចាន់ កា អាយុ៤០ឆ្នាំ ត្រូវជាកូនផង និងជា ប្រពន្ធរបស់ ដុង ធី បានឱ្យដឹងថា គាត់បានចាប់ដៃគ្នាជាប្តីប្រពន្ធជាង១០ឆ្នាំហើយ រហូតបង្កើតកូន៥នាក់ ជាចំណងដៃនៃអាពាហ៍ពិពាហ៍ ។

ស្ត្រីរូបនេះបន្តថា ប្តីរបស់នាងជាមនុស្សឧស្សាហ៍ព្យាយាម ពូកែរកស៊ី និងមានចរិតស្លូតបូត គួរឱ្យស្រឡាញ់ខ្លាំងណាស់ សូម្បីតែមនុស្សម្នាក្នុងភូមិក៏ស្រឡាញ់គាត់ដែរ ។ ប៉ុន្តែនៅឆ្នាំ ២០០៦ គាត់ហាក់ដូចជាមានអកប្បកិរិយា ចំលែកមិនសូវចង់រកស៊ីខាងក្រៅ ហើយសំងំនៅតែក្នុងផ្ទះដោយយកលេសថា មិនសូវស្រួលក្នុងខ្លួន ។

នាង ចាន់ កា បានបន្តថា មិនយូរប៉ុន្មាន ស្រាប់តែមាន ឮពាក្យចចាមអារ៉ាមថា ម្តាយខ្លួន និងប្តីលួចរួមរ័កគ្នា ។ ពាក្យទាំងនេះ នាងយល់ថា មិនពិតទេ ប៉ុន្តែពេលឪពុកគាត់មកប្រាប់ទៀត ធ្វើឱ្យនាងមានការសង្ស័យ ។ នៅថ្ងៃមួយនាងធ្វើជាចេញទៅលក់ត្រី រួចត្រឡប់មកវិញ ស្រាប់តែឃើញប្តី និងម្តាយកំពុងរួមរ័កគ្នាទាំងថ្ងៃដូចគេថាមែន ។

នាង ចាន់ កា បានរៀបរាប់ទាំងឈឺចាប់ថា ឪពុករបស់នាង (ចាន់ មុត) ពេលឃើញហេតុការណ៍នេះ ទឹកខ្មាសគេខ្លាំង ។ម្យ៉ាងទៀតណែនាំប្រពន្ធ និងកូនប្រសាមិនព្រមស្តាប់ ក៏ធ្លាប់ខ្លួនឈឺក្អួតចេញឈាមទាំងដុំៗ រហូតស្លាប់ គួរឱ្យសង្វេគខ្លាំងណាស់ ។

ចំណែក យាយ សារ៉ាយ បានរៀបរាប់ថា គាត់ពិតជាធ្លាប់រួមរ័កជាមួយកូនប្រសាតាំងពីឆ្នាំ២០០០ម្ល៉េះ ដោយសារតែឃើញកូនប្រសាស្អាត និងមានភាពស្និតស្នាលពេលកោសខ្យល់ម្តងៗ ។ ម្យ៉ាងទៀតពេលយប់ ឬថ្ងៃ គាត់ហាក់ដូចជាភ្លេចអស់នូវសេចក្តីខ្មាសអៀន ទោះប្តី និងកូនហាមឃាត់យ៉ាងណាក្តី ។

យាយ សារ៉ាយ បន្តថា ដោយសារតែគាត់ពុំជឿតាមប្តី ធ្វើឱ្យគាត់ឈឺចិត្តរហូតស្លាប់ខ្លួន ហើយពេលនេះ គាត់ខ្មាសញាតិមិត្តពេញភូមិ សូម្បីកូនចៅឯងក៏មើលមុខគ្នាលែងចង់ត្រង់ដែរ ។

លោក ដុង ធី កូនប្រសាថ្លើមធំបានឱ្យដឹងថា ស្នេហាគាត់ជាមួយម្តាយក្មេកនេះ ផ្តើមចេញពីភាពស្និតស្នាលកោសខ្យល់ចាប់សរសៃ ហើយម្តាយក្មេកនេះតែងឱ្យដៃផង ។ ម្តាយក្មេកគាត់សក់ស្កូវធ្មេញបាក់មែន តែគាត់ប្រសប់គ្រាន់ បើរឿងលើគ្រែនេះ ។ ពេលនេះគាត់ភ្លេចពីរឿងបុណ្យបាបអស់រលីងទោះស្មៅចាស់ក៏ស៊ីដែរ ។

លោក ដុង ធី បន្តថា ពេលនេះគាត់សូមសច្ចាថា លែងធ្វើ ដូច្នេះទៀតហើយ ព្រោះសកម្មភាពរបស់គាត់បានសំលាប់ឪពុកក្មេកម្នាក់ហើយ ។ ជាពិសេសធ្វើឱ្យក្រុមគ្រួសារបែកបាក់គ្នា និងខ្មាសអៀនអ្នកពេញភូមិ ៕

## រលំចង្កៀងប្រេងកាតឆេះសុគតព្រះចៅអធិការវត្ត និងកុដិ២ខ្នង

***កម្ពុជា : សម្ពស្ស***

គ្រោះថ្នាក់អគ្គីភ័យមួយបានឆាបឆេះសន្ធោរសន្ធៅឡើងពេញបន្ទុកបានបង្កឱ្យសុគតព្រះចៅអធិការវត្ត និងឆេះអស់កុដិ២ខ្នង ព្រមទាំងសំភារៈមួយចំនួនទៀត ។

គ្រោះមហន្តរាយនេះ កើតនៅភូមិវត្ត ឡ ភូមិឡ ឃុំកំពាន ស្រុកមេមត់ ខេត្តកំពង់ចាម កាលពីថ្ងៃទី១ ខែមីនា ឆ្នាំ២០០៨ វេលាម៉ោង៥ និង១៥នាទីទៀបភ្លឺ ។

សមត្ថកិច្ចកងរាជអាវុធហត្ថស្រុកមេមត់បានឱ្យដឹងថា ក្នុងហេតុការណ៍គ្រោះថ្នាក់អគ្គីភ័យក្នុងវត្តឡនោះ បានបណ្តាលឱ្យព្រះចៅអធិការវត្ត ព្រះនាម ខេ.ស ព្រះជន្ម៨៨វស្សាសុគតបាត់បង់ជីវិតបន្ទាប់ពីបញ្ជូនទៅដល់មន្ទីរពេទ្យ ។

មន្ត្រីរូបនោះបន្តថា កុដិដែលឆេះនោះមានចំនួន ២ខ្នង មានទំហំ៨ម៉ែត្រ x ៧ម៉ែត្រ ត្រូវឆេះម៉ត់ រួមទាំងម៉ាស៊ីនភ្លើង, ម៉ូទ័របូមទឹក និងបច្ច័យចំនួន ៨០ម៉ឺនរៀលទៀត ។ ព្រះចៅអធិការត្រូវភ្លើងឆេះរលាកពេញខ្លួន ដោយសារគ្មាននរណាជួយសង្គ្រោះទាន់ពេលវេលា ។

ចំណែកព្រះសង្ឃដែលគង់នៅកុដិជាមួយព្រះ-ចៅអធិការបានមានសង្ឃដីកាថា នៅពេលដែលភ្ញាក់ដឹងខ្លួនឃើញភ្លើងឆេះពេញបន្ទុកទៅហើយ គឺភ័យស្ទើរស្លោរត់យកអាយុរៀងៗខ្លួន ។ រីឯអ្នកស្រុកដែលនៅជិតនោះទំរាំមកជួយទាន់ភ្លើងបានឆេះ អស់ទៅហើយ គឺមិនអាចជួយសង្គ្រោះបានទេ។

ព្រះសង្ឃបានមានសង្ឃដីកាបន្តថា តាមធម្មតាចៅអធិការតែងតែឡើងអុជធូបចង្កៀងប្រេងកាតថ្វាយបង្គំនៅម៉ោង៥ទៀតភ្លឺ ហើយហេតុ-ការណ៍នេះទំនងបណ្តាលមកពីចង្កៀងប្រេងកាតដួលកំពប់ប្រេងឆេះសៀវភៅ និងឯកសារផ្សេងៗ ។ ទើបបណ្តាលឱ្យភ្លើងឆេះខ្លាំងឡើងបែបនេះ គ្មានលទ្ធភាពជួយសង្គ្រោះបាន គឺគ្រាន់តែរយៈពេលកន្លះម៉ោងប៉ុណ្ណោះ អ្វីៗបានក្លាយទៅជាផេះទាំងអស់ ៕

## បងយកម៉ែ ប្អូនយកកូន

***កម្ពុជា : សម្ពស្ស***

ក្នុងសម័យនេះ អ្វីៗបានផ្លាស់ប្តូរប្រែប្រួលខ្លាំងណាស់ សូម្បីតែចិត្តរបស់មនុស្សក៏មិនដូចគ្នាដែរ ។ ករណីស្នេហាខុសក្រិត្យក្រមមួយ ដែលកើតឡើងនៅភូមិហាន់ជី ឃុំហាន់ជី ស្រុក ឆ្លូង ខេត្តក្រចេះ គឺបងយកអ្នកម្តាយមេម៉ាយ ចំណែកឯប្អូនយកកូនស្រី ។

ស្នេហាចំឡែកនេះ បានធ្វើឱ្យឪពុកម្តាយខាងប្រុសខឹងដាច់ក្បាលដាច់កន្ទុយ ហើយចោទប្រកាន់ភាគីខាងស្រីយ៉ាងធ្ងន់ធ្ងរ និងមិនព្រមទទួលស្គាល់កូនប្រុសថែមទៀត ។

លោក ម៉ុង តុល អាយុ២០ឆ្នាំ រស់នៅភូមិកំពង់រាំង ឃុំសេដា ស្រុកដំបែរ ខេត្តកំពង់ចាម បានឱ្យដឹងថា កាលពី៤ឆ្នាំមុន រូបគេបានចាប់ចិត្តស្រ-ឡាញ់យុវត្តីឈ្មោះ មិត្ត ស្រីណាត អាយុ១៤ឆ្នាំ ដែលកាលណោះនាងមកនៅជាមួយអ៊ំស្រីភូមិជាប់គ្នា ។

លោក ម៉ុង តុល បានបន្តថា ពួកគេទាំងពីរបានស្រឡាញ់គ្នាចិត្ត និងចិត្ត ប៉ុន្តែក្រោយមកក៏បានជ្រុលជ្រោះរំលងច្បាប់ប្រពៃណី ។ នៅពេលនោះពួកគេក៏បានរង់ចាំឱកាសដើម្បីចូលស្តីដណ្តឹងតាមទំនៀមទំលាប់ប្រពៃណី ។ ក្នុងពេលជាមួយគ្នានោះ គេក៏ឧស្សាហ៍ចេញចូលផ្ទះរបស់នាងដែរ ចំណែកបងប្រុសរបស់ខ្លួន ម៉ុង ធា អាយុ២៩ឆ្នាំ ដែលមកស្នាក់នៅផ្ទះរបស់នាង ណាត ក៏បានលបលួចស្រឡាញ់ម្តាយរបស់នាង ណាត គឺអ្នកមីង ផេន អាយុ៣៨ឆ្នាំ ដែលមេម៉ាយច្រើនឆ្នាំមកហើយ ។

ម៉ុង តុល បន្តទៀតថា នៅពេលនេះគេ ពិបាកចិត្តខ្លាំងណាស់ បងប្រុសក្លាយជាឪពុកក្មេក រីឯម្តាយក្មេកជាបងថ្លៃវិញ មិនដឹងត្រូវហៅថា យ៉ាងម៉េចទេ ។ ចំណែកឪពុកម្តាយបង្កើតរបស់ខ្លួន គាត់បានបដិសេធដាច់អហង្កាមិនអនុញ្ញាតឱ្យខ្លួនភ្ជាប់និស្ស័យជាប្តីប្រពន្ធនិងគ្នានោះទេ ។ ទោះជាយ៉ាងណាពួកគេសុខចិត្តលះបង់អ្វីៗ គ្រប់បែបយ៉ាងឱ្យតែបានរស់នៅជាមួយគ្នា ហើយពួកគេក៏បានបញ្ជាក់ថា នៅទីបញ្ចប់សុខចិត្តជ្រើសរើសការស្លាប់ដូចទុំទាវដែរ ។

ចំណែកអ្នកស្រី ផេន ដែលជាអ្នកមេម៉ាយយូរជូរមាត់ទៅលួចស្នេហ៍ជាមួយកំលោះនោះ បានឱ្យដឹងថា គាត់ដូចជាឆ្ងល់ខ្លួនឯងខ្លាំងណាស់ មិនដឹងជាកម្មពៀរអ្វីទេ បានជាគាត់ទៅស្រឡាញ់កំលោះធា ដែលជាបងបង្កើតរបស់ ម៉ុង តុល និងត្រូវជាបងថ្លៃរបស់កូនស្រីខ្លួនទៀត ។

អ្នកស្រី ផេន បានបន្តថា គាត់យល់ថា ទង្វើរបស់គាត់នេះហាក់ដូចជាខុសឆ្គងនឹងកូនស្រីរបស់ខ្លួនខ្លាំងណាស់ ប៉ុន្តែមិនអាចឃាត់ចិត្តបាន ។ ចំណែកឯសេចក្តីស្នេហាកូនស្រីគាត់ និងកំលោះ តុល នោះគឺមានជាច្រើនឆ្នាំហើយ ប៉ុន្តែឪពុកម្តាយខាងប្រុសគេជំទាស់មិនឱ្យកូនចៅទាក់ទងគ្នាឡើយ ។

លោក ម៉ៅ និងអ្នកស្រីថា ជាឪពុកម្តាយកូនកំលោះទាំងពីរ ដែលទៅស្រឡាញ់ម្តាយ និងកូននេះ បាននិយាយទាំងកំហឹងថា ពួកគាត់មិនអនុញ្ញាតឱ្យកូនទាំងពីរ ទៅធ្វើសកម្មភាពផ្តេសផ្តាសនោះទេ គឺវាខុសនឹងទំនៀមទំលាប់ប្រពៃណីខ្លាំងណាស់ ។ តើឱ្យពួកខ្ញុំនេះគួរហៅនាង ផេន នោះយ៉ាងម៉េច បើជាមួយកូនបងជាប្រពន្ធ ? បើជាមួយកូនប្អូនជាម្តាយក្មេកនោះ ? ហើយពួកគាត់ចង់ឆ្កួត និងខ្មាសញាតិមិត្តក្នុងភូមិខ្លាំងណាស់ មិនគួរមានរឿងបែបនេះទេ ។

អ្នកភូមិកំពង់រាំង ក៏ដូចជាអ្នកភូមិហាន់ជី ដែលដឹងរឿងនេះ បានបញ្ចេញទស្សនៈបែបចំអកផង និងផ្តល់ជាគំនិតផងថា គូស្នេហារបស់ពួកគេ គួរតែបញ្ចប់ ព្រោះជារឿងមួយគួរឱ្យអាម៉ាស់ និងប៉ះពាល់ដល់ទំនៀមទំលាប់ប្រពៃណី ។

ទន្ទឹមនឹងនេះដែរ ក៏មានអ្នកខ្លះថា គួរតែឪពុកម្តាយខាងប្រុសបណ្តោយតាមកូនចៅទៅ បើអ្វីៗវាហួសអស់ទៅហើយនេះប្រហែលជាកម្មពៀររបស់គេពីជាតិមុនមកទេ ។ ប្រសិនបើគាត់រឹងទទឹងអាចនឹងបណ្តាលឱ្យបាត់បង់កូនទាំងពីរ ព្រោះពួកគេបានសំរេចចិត្តយកសេចក្តីស្លាប់រួចទៅហើយ ៕

## មានកូនជាមួយសង្សារ ទើបរៀបការជាមួយគូដណ្តឹង

***កម្ពុជា : សម្ពស្ស***

កម្មការិនីរោងចក្រកាត់ដេរ ដែលមានចិត្តសាវ៉ាម្នាក់ ក្រោយពេលភ្ជាប់ពាក្យតាមទំនៀមទំលាប់ប្រពៃណីហើយបានទៅលបលួចមានសង្សាររហូតមានកូន លុះអស់សង្ឃឹម ទើបត្រឡប់មកផ្ទះវិញ ។

នាងចិត្តរាយមាយនេះ បានបង្ហូរទឹកភ្នែកមិនឈប់ឈរ ដែលកាលបង្ហូរទឹកភ្នែកនេះ សូមក្តីមេត្តាពីគូដណ្តឹង នៅទីបំផុតក៏បានរៀបការតាមប្រពៃណីទំនៀមទំលាប់ឡើងវិញ ដើម្បីលុបលៀងនៃការខ្មាសអៀន និងផ្តល់សេចក្តីសង្ឃឹមចំពោះនាង ។

នាង ផន សារ៉ាត់ អាយុ២០ឆ្នាំ រស់នៅភូមិប្រមូល ឃុំទ្រមែង ស្រុកឈូក ខេត្តកំពត បានរៀបរាប់ថា ក្នុងអំឡុងឆ្នាំ២០០១ នាងបានចាកចេញពីស្រុកកំណើតទៅភ្នំពេញធ្វើកម្មកររោងចក្រ ដើម្បីរកលុយមកដោះស្រាយជីវភាពប្រចាំថ្ងៃ ។

នាង ផន សារ៉ាត់ បានបន្តថា ក្រោយមកនាងក៏មានទំនាក់ទំនងស្នេហាជាមួយនិងកម្លោះ ទូច

( តទៅទំព័រទី២៥ )

# ប្រជាពលរដ្ឋ៥ភូមិចង់បានផ្លូវ និងអណ្តូងទឹកប្រើប្រាស់

*សៀមរាប : ម៉ី សម្ផស្ស*

●●●ប្រជាពលរដ្ឋដែលរស់នៅតំបន់ចុងកាត់មាត់ញក ពួកគាត់ជួបការលំបាកសព្វបែបយ៉ាងក្នុងជីវភាពប្រចាំថ្ងៃយ៉ាងខ្លាំង ។ ជាក់ស្តែងអ្នកស្រុក៥ភូមិ រស់នៅឃុំស្រែណូយ ស្រុកវ៉ារិន្ទ ខេត្តសៀមរាប កំពុងប្រឈមមុខនឹងការលំបាកលើគ្រប់វិស័យ ។

ជាពិសេសនោះ ពួកអ្នកគ្មានផ្លូវ សំរាប់ធ្វើដំណើរពីតំបន់មួយទៅតំបន់មួយឱ្យស្រួលដូចតំបន់ផ្សេងៗ ។ បើសិនជាផ្លូវនៅរដូវវស្សាត្រូវ


លោក ម៉ឿង ម៉ៅ មេភូមិរលំរន្ធថ្មី


ទិដ្ឋភាពភូមិរលំរន្ធ ឃុំស្រែណូយ ស្រុកវ៉ារិន្ទ

ទឹកលិចលង់នោះ គឺត្រូវធ្វើក្បូនសំរាប់ ចរាចរណ៍ដោយជួបការ និងចំណាយពេលវេលាអស់ជាច្រើនម៉ោងទើបដល់គោលដៅ ។

ស្រុកវ៉ារិន្ទ ជាតំបន់អភិវឌ្ឍន៍ចុងក្រោយរបស់ខេត្តសៀមរាប ដែលគេសង្កេតឃើញមានផ្ទះអ្នកស្រុករស់នៅមួយៗ តាមបែបបុរាណនៅឡើយ ។ ចំណែកឯហាងឆេងដីក៏ចាប់ផ្តើមឡើងថ្លៃជាបណ្តើរៗដែរ ដោយមានឈ្មួញពីតំបន់នានាទៅទិញទុកចំណេញនៅថ្ងៃក្រោយ ។

ចលនានៃការទិញលក់ដីនៅតំបន់នោះ ក៏បានរីកដុះដាល ហើយការរុករានទន្ទ្រានដីរដ្ឋធ្វើកម្មសិទ្ធិពីសំណាក់អ្នកមានលុយ និងមានអំណាចមួយចំនួនក៏កើតមានជាហូរហែរផងដែរ ។

ចំណែកឯអ្នកស្រុកក្រីក្រខ្លះដែលបាត់បង់ដី ក៏ធ្វើការប្តឹងប្តល់ ឈ្លោះប្រកែកគ្នាមិនសូវឈប់ឈរ ធ្វើឱ្យអាជ្ញាធរ និងមន្ត្រីមានសមត្ថកិច្ចឈឺក្បាលមិនតិចទេ ។

ទន្ទឹមនឹងការរុករានទន្ទ្រានដីធ្លីនេះ គេសង្កេតឃើញប្រជាពលរដ្ឋដែលរស់នៅឃុំស្រែណូយ របស់ស្រុកវ៉ារិន្ទចំនួន៥ភូមិ កំពុងតែជួបការលំបាក ដោយសារគ្មានផ្លូវធ្វើដំណើរ គឺពួកគាត់ត្រូវដើរតាមផ្លូវរទេះ ឬកាត់វាលស្រែ ។ ភាពលំបាកនេះនៅរដូវវស្សា ធ្វើឱ្យពួកគាត់មិន

( តទៅទំព័រទី២៥ )


ផ្លូវសំរាប់ធ្វើដំណើរកាត់តាមព្រៃរបស់អ្នកភូមិ

# ស្ពានអូរជីកជាទ្វារទឹក...

ប៉ុណ្ណោះទេ គឺគេកសាងសំរាប់ដឹកជញ្ជូនថ្មពីអូរថ្មដាប់ (នៅបាតអូរនេះ យើងឃើញមានបន្សល់ទុកនូវស្លាកស្នាម ដែលអាចឱ្យយើងយល់បានថា កន្លែងនេះគឺជាការដ្ឋានសំរាប់យកថ្មមួយក្នុងចំណោមការដ្ឋានយកថ្មជាច្រើនកន្លែងទៀត នៅភ្នំគូលែន មានឈ្មោះថា អូរថ្មដាប់) ចុះមកក្រោមបណ្តោយព្រែកជីកនេះបន្តរហូតដល់បឹងទន្លេសាប ហើយបន្តមកកាន់តំបន់អង្គរ តាមដងស្ទឹងសៀមរាប ដើម្បីយកថ្មទាំងអស់នោះមកកសាងប្រាសាទ ។

ដោយហេតុថា ការដឹកជញ្ជូនតាមផ្លូវទឹកបែបនេះ វាមានភាពងាយស្រួលជាងការដឹកជញ្ជូន


ទិដ្ឋភាពស្ពានអូរជីកមើលពីចម្ងាយដែលមានលក្ខណៈរឹងមាំនៅឡើយ

តាមមធ្យោបាយផ្សេងៗទៀត ណាមួយវាធូរកំលាំងច្រើនទៀតផង ។ ការដឹកជញ្ជូននេះ ប្រហែលជាធ្វើឡើងតាមរយៈក្បូន ឬតាមទូកនេះ អាស្រ័យដោយពោះនៃព្រែកជីកនេះ មានទំហំធំសមល្មមនឹងធ្វើជាផ្លូវសំរាប់ដឹកជញ្ជូនបានផង ។

ទោះជាយ៉ាងណាក៏ដោយ ក៏សម្មតិកម្មនេះ គឺជាគំនិតមួយក្នុងការពិចារណារកហេតុផលដែរ ។ ប៉ុន្តែចំណុចដែលជាការកំណត់ជាក់ច្បាស់នេះ គឺវាមានតួនាទីមួយក្នុងការបង្ហូរទឹកនៅរដូវវស្សាពីតំបន់លើភ្នំគូលែនទៅបឹងទន្លេសាប ព្រោះបើយើងពិនិត្យមើលអំពីទីតាំងភូមិសាស្ត្រនៃតំបន់ភ្នំគូលែនឃើញថា វាមានកំពស់យ៉ាងខ្ពស់ ហើយសម្បូរទៅដោយព្រៃឈើក្រាស់ៗ ដែលនេះជារបាំងទឹកភ្លៀង និងជាប្រភពទាក់ទាញទឹកភ្លៀង ។

ចំណែកចាស់ទុំដែលចេះចាំពីប្រវត្តិសាស្ត្រអូរជីកនេះ បញ្ជាក់ថា ព្រែក និងស្ពាននេះមិនត្រឹមតែជាទ្វារសំរាប់បញ្ចេញបញ្ចូលទឹកក្នុងការងារកសិកម្មប៉ុណ្ណោះទេ តែក្នុងព្រែកនេះមានថ្មល្អប្រណីតៗសំរាប់យកទៅកសាងសំណង់ប្រាសាទនានានៅតំបន់អង្គរ ក៏ដូចជាទូទាំងខេត្ត-ក្រុងកាលពីសម័យមុនមនុស្សនាំគ្នាទៅជីកថ្ម នៅទីនោះជញ្ជូន ទៅកាន់ភូមិសាស្ត្រផ្សេងៗ ហើយវាជាប្រព័ន្ធផ្លូវទឹកដ៏សំខាន់ទៀតផង ។

ក្រៅពីនេះទៀត នៅសម័យអាណានិគមបារាំង ក៏ដូចជាសម័យក្រោយៗដែរពួកអ្នកមានអំណាច មួយចំនួនបានសហការជាមួយឈ្មួញបានកាប់ឈើបណ្តែតនៅភូមិសាស្ត្រក្បែរៗនោះតាមព្រែកជីកឆ្ពោះទៅតំបន់បឹងទន្លេសាប រួចបង្ហូសទៅប្រទេសជិតខាង ដើម្បីលក់បំរើផលប្រយោជន៍បុគ្គល ឬបក្សពួករបស់ខ្លួន បណ្តាលឱ្យព្រៃឈើមួយភាគធំរងការបំផ្លិចបំផ្លាញយ៉ាងរង្គាល ។

នៅសម័យមហានគររុងរឿង គេសង្កេតឃើញមានសេសសល់ស្ពានបុរាណធំពីរ គឺស្ពានកំពង់ក្តីជាប់ព្រំប្រទល់ខេត្តកំពង់ធំ និងខេត្តសៀមរាបស្ពាន អូរជីក ខេត្តឧត្តរមានជ័យ ដែលកំពុងតែទាក់ទាញភ្ញៀវទេសចរពីគ្រប់មជ្ឈដ្ឋាន ព្រមទាំងស្ពានតូចៗជាច្រើនទៀត នៅពាសពេញផ្ទៃប្រទេស ។

ចំណែកផ្លូវបុរាណមួយចំនួនគេសង្កេតឃើញប្រសព្វគ្នានៅបរិវេណប្រាសាទបន្ទាយឆ្មារ ស្រុកថ្មពួក ខេត្តបន្ទាយមានជ័យ គឺផ្លូវមួយខ្សែឆ្ពោះទៅតំបន់ក្បាលទន្សោងជួរភ្នំដងរែក ឆ្លងកាត់ទៅប្រទេសថៃ មួយខ្សែទៀតឆ្ពោះមកទិសខាងកើត ឆ្លងកាត់ភូមិសាស្ត្រស្រុកភ្នំស្រុក កាត់តាមខ្នងទំនប់អាងត្រពាំងថ្មឆ្ពោះទៅស្រុកចុងកាល់ ខេត្តឧតរមានជ័យ និងស្ពានអូរជីកឆ្ពោះទៅស្ពានកំពង់ក្តី ខេត្តកំពង់ធំ ។

ក្រៅពីស្ពាន និងផ្លូវថ្នល់ គេសង្កេតឃើញមានបារាយណ៍ ព្រែក ស្រះទឹក អណ្តូង ប្រព័ន្ធធារាសាស្ត្រជាច្រើនទៀត សំរាប់បំរើប្រយោជន៍ការងារកសិកម្ម ស្របតាមលក្ខខណ្ឌធម្មជាតិ ធ្វើឱ្យប្រទេសជាតិមានការរីកចំរើនរុងរឿងដល់កំពូលនាសម័យមហានគរ ៕

## ដីឡើងថ្លៃទំនាស់កាន់...

**៤. ខេត្តស្វាយរៀង :** ប្រជាពលរដ្ឋចំនួន ១០០នាក់ តំណាងឱ្យ៥៦៧គ្រួសារ នៅភូមិត្រពាំងបន្ទាយ, តាសួស, ពពេល, សេរីឪ, មុនីប្រឹក្សា, បឹង និងភូមិម្រោក់ទាប ក្នុងឃុំគ្រោស់ ស្រុករមាសហែកបានលើកគ្នាមកភ្នំពេញ ប្ដឹងឈ្មោះ ម៉ក់ ភន់ និង ម៉ែន ស៊ីផាន់ ថា បានយកគ្រឿងចក្រទៅឈូសឆាយដីពួកគាត់អស់១៥.០០០ហិកតា ។ រឿងនេះកើតតាំងពីឆ្នាំ១៩៩០ រហូតដល់ពេលនេះពុំទាន់ដោះស្រាយចេញទៀត ។

**៥. ក្រុងព្រះសីហនុ :** នៅថ្ងៃទី១៦ តុលា ឆ្នាំ២០០៧ សមត្ថកិច្ចចំរុះបានចុះ ទៅរុះរើលំនៅឋានប្រជាពលរដ្ឋនៅភូមិពូ ធឿង សង្កាត់បិទត្រាង ខណ្ឌព្រៃនប់ ។ ក្នុងព្រឹត្តការណ៍នោះសមត្ថកិច្ចពុំបានប្រាប់ប្រជាពលរដ្ឋមន្ត្រីអង្គការសង្គមស៊ីវិលទេ គឺបានវាយដំចាប់អ្នកស្រុកដាក់ខ្នោះ និងរឹបអូសយកទ្រព្យសម្បត្តិមួយចំនួនទៀត ។

**៦. ខេត្តព្រះវិហារ :** តាមរបាយការណ៍របស់សមាគម អាដហុក បានបញ្ជាក់ថា នៅថ្ងៃទី១៦ វិច្ឆិកា ឆ្នាំ២០០៧ ទំនាស់ដីស្រូចស្រាវមួយបានផ្ទុះឡើងរវាងប្រជាពលរដ្ឋចំនួន៣១៧គ្រួសារ នៅភូមិអូរ ឈើទាល ឃុំកន្ទួត ស្រុកជាំក្សាន្ត ។ ក្នុងហេតុការណ៍នោះ បានបង្កឱ្យអ្នកស្រុក២នាក់ ស្លាប់៦នាក់រងរបួសធ្ងន់ និង១៨នាក់ ត្រូវចាប់ខ្លួន ។

កន្លងមកក្នុងទំនាស់ដីធ្លីនៅខេត្តបន្ទាយមានជ័យ នៅភូមិក្បាលស្ពាន ឃុំប៉ោយប៉ែត ស្រុកអូរជ្រៅ រវាងប្រជាពលរដ្ឋ និងឈ្មួញបានបាញ់ប្រជាពលរដ្ឋស្លាប់៣នាក់ របួស២នាក់ ដែលប្រជាពលរដ្ឋភាគច្រើន ជាជនពិការ និងយោធិនរំសាយ ។ ចំណែកប្រជាពលរដ្ឋនៅស្រុកម៉ាឡៃមួយចំនួនក៏ត្រូវគេគំរាមចាប់ដាក់គុកដែរ គឺរស់នៅក្នុងសភាពភ័យខ្លាចយ៉ាងខ្លាំង ។

ចំណែកជនជាតិព្នង នៅខេត្តមណ្ឌលគិរីបានលើកគ្នាមកប្ដឹងនៅភ្នំពេញ គឺចោទប្រកាន់អ្នកស្រីគាត កល្យាណី ប្អូនស្រីលោក គាត ឈុន ថាបានរំលោភដីរបស់ពួកគាត់ និងបណ្ដេញពួកគាត់ឱ្យចេញពីលំនៅឋានយ៉ាងអយុត្តិធម៌ ។

ប្រជាពលរដ្ឋគ្រប់ខេត្ត-ក្រុង មានរឿងចំរូងចំរាស់ដីធ្លី មានការប្ដឹងប្ដល់គ្នាមិនឈប់ឈរ ពួកគាត់ត្រូវរងនូវការគំរាមកំហែងសុវត្ថិភាពផ្ទាល់ខ្លួន អស់លុយកាក់ទ្រព្យរបស់ និងដីស្រែចំការ ពីព្រោះចង់ឈ្នះក្ដីក្ដាំង ។ ទីបំផុតសំណុំរឿងដីធ្លីមិនដែលអ្នកស្រុកឈ្នះទេ គឺពួកនាយទុនយកលុយទៅសូកប៉ាន់អាជ្ញាធរ និងមន្ត្រីតុលាការនិងខ្លះ ទៀតចែកដីឱ្យអ្នកដែលមានសមត្ថកិច្ចកុំឱ្យដោះស្រាយរឿងនោះ ។

បញ្ហាដីឡើងថ្លៃនេះ អ្នកក្រភាគច្រើនមិនសូវបានលក់ដីរបស់ខ្លួនទេ គឺត្រូវពួកឈ្មួញរំលោភយកអស់ អ្នកខ្លះទៀតបង្ខំចិត្តលក់ក្នុងតំលៃថោក ពីព្រោះខ្លាចបាត់បង់ទទេ ។

យោងតាមព្រឹត្តិប័ត្រ **"អ្នកជា"** បានឱ្យដឹងថា នៅឆ្នាំ២០០៧ ទំនាស់ដីធ្លីមានការកើនឡើងចំនួន៣៨២ករណី ប្រជាពលរដ្ឋ១៩.៣២៩ គ្រួសារ លើផ្ទៃដីទំហំ៤២.៤០០ហិកតា ។

ប្រភពដដែលបានបន្តថា ការបណ្ដេញប្រជាជនមានការកើនឡើង ប៉ះពាល់ដល់ប្រជាជនចំនួន ៥.៥៣៥គ្រួសារ ចាប់ខ្លួនប្រជាពលរដ្ឋ១៤៩នាក់ ពាក់ព័ន្ធនឹងរឿងដីធ្លី ដែលកើនឡើងខ្ពស់ជាងឆ្នាំកន្លងមក ។

នាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន បានថ្លែងក្នុងមហាសន្និបាតប្រចាំឆ្នាំរបស់ក្រសួងដែនដីនគរូបនីយកម្ម កាលពីចុងខែមីនាថា នឹងរំសាយអាជ្ញាធរជាតិដោះស្រាយដីធ្លីចោល ដែលមាន សុខ អាន ជាប្រធាន ។ ក្នុងនោះក៏បញ្ជាឱ្យដោះលែងប្រជាពលរដ្ឋ៣នាក់ នៅក្រុងព្រះសីហនុ ដែលត្រូវគេចាប់ដាក់គុក ។ លោក អេង ឆៃអ៊ាង អនុប្រធានទី១ នៃអាជ្ញាធរជាតិនោះ ក៏យល់ស្របឱ្យមានការរំសាយអាជ្ញាធរជាតិនេះ ។ លោកក៏បានផ្ញើលិខិតលាលែងពីតំណែងរួចហើយដែរ ពីព្រោះអាជ្ញាធរនោះ គ្មានគោលការពិតប្រាកដដោះស្រាយបញ្ហាដីធ្លីជូនប្រជាពលរដ្ឋឡើយ ៕

### រមណីយដ្ឋានការពីជារអន្លង់...

រីងស្ងួតហួរជាប់មិនដាច់ ធ្វើឱ្យសត្វប្រភេទនេះបង្កកូនចៅ និងទីកន្លែងតែមួយគត់ដែលមានប្រភេទសត្វដ៏កំរនេះរស់នៅច្រើន ។

រមណីយដ្ឋានអន្លង់ផ្សោតបច្ចុប្បន្នកំពុងតែមានប្រជាប្រិយភាពខ្លាំង ហើយទាក់ទាញភ្ញៀវទេសចរពីគ្រប់មជ្ឈដ្ឋានរាប់ម៉ឺននាក់ឱ្យទៅទស្សនាកំសាន្តគ្រប់រដូវកាលថែមទាំងបានរួមចំណែកលើកស្ទួយជីវភាពរស់នៅរបស់អ្នកនៅតំបន់នោះមួយកំរិត តាមរយៈសេវាកម្មលក់ម្ហូបអាហារ ក៏ដូចជាផ្ទះសំណាក់មធ្យោបាយដឹកជញ្ជូនផងដែរ ។

ភ្ញៀវទេសចរបាននាំគ្នាទៅទស្សនាមានចំនួនកាន់តែច្រើន ដោយសារទីនោះ មានអំណោយផលផ្នែកសេវាកម្មបំរើភ្ញៀវសំរាប់ផ្ញើរថយន្ត ម៉ូតូ ផ្ទះ ទឹក អាហារដ្ឋាន ភ្នាក់ងារសង្គ្រោះបន្ទាន់ ក្រុមសន្តិសុខដែលទទួលខុសត្រូវខ្ពស់ ដែលធ្វើឱ្យពួកគេមានភាពកក់ក្ដៅក្នុងការធ្វើដំណើរកំសាន្តរបស់ខ្លួន បន្ទាប់ពីបានមកទស្សនាហើយថ្ងៃក្រោយ គេរំពឹងថានឹងវិលមកទស្សនាម្ដងទៀត ៕

# បច្ចុប្បន្នភាពរឿងមិនគួរកើតនៅកម្ពុជា

ភឿន អាយុ ២១ឆ្នាំ មានទីលំនៅភូមិកំពង់ប្រទង់ ក្រុងកែប រហូតដល់មានចាស់ទុំចូលមកចែចូវ ភ្ជាប់ពាក្យតាមទំនៀមទំលាប់ប្រពៃណី ។

ខណៈនោះនាងក៏មកភ្នំពេញ ដើម្បីធ្វើជាកម្មកររោងចក្រកាត់ដេរ ។ ចំណែកឯកម្លោះ ទូច ភឿន ក៏លានាងចុះទូក ដើម្បីរកលុយមករៀបការ ។ ការបែកគ្នាអស់រយៈពេលយ៉ាងយូរ គឺគ្មានការទំនាក់ទំនងគ្នាបន្តិចសោះ សូម្បីតែងលិខិតស្នាម ឬទូរស័ព្ទមួយនាទីក៏គ្មានដែរ ។ ការបាត់ដំណឹងនេះ ធ្វើឱ្យចាស់ទុំចេះតែនិយាយថា "ប្រុសកាលណាគេទៅទីណាមានស្រីនៅទីនោះហើយ" មិនចាំបាច់រង់ចាំគេនាំតែខកខ្លួននោះទេ ។ ពាក្យពេចន៍ទាំងនោះ បានធ្វើឱ្យនាងមានការតូចចិត្តយ៉ាងខ្លាំងស្ទើរតែចង់តែសំលាប់ខ្លួនទេ ប៉ុន្តែដោយមានការជួយលួងលោមពីកម្លោះ ឃីម នាងក៏ ឈប់គិតខ្លី ហើយក៏ចាប់ចិត្តស្រឡាញ់គេរហូតជ្រុលខ្លួន ។

នាង សារ៉ាត់ បានបន្តទៀតថា ដោយសារតែជឿតាមសំដីផ្អែមល្ហែមរបស់កម្លោះ ឃីម នាងក៏ផ្ដាច់ពាក្យពីគូដណ្ដឹង ហើយសច្ចារប្តូរផ្ដាច់រស់នៅជាមួយ ឃីម រហូតមានផ្ទៃពោះ។ នៅពេលនោះឈ្មោះ ឃីម ក៏ឈប់ធ្វើការរោងចក្រ ហើយទៅនៅខេត្តរតនគិរី ដើម្បីរកលុយឱ្យបានច្រើនមកផ្គត់ផ្គង់គ្រួសារ ។

នាង សារ៉ាត់ បន្តថា ទោះបីតែដឹងថា ឈ្មោះ ឃីម នេះ បានបោកខ្លួន ហើយក៏នៅតែមិនអស់ចិត្ត គឺនាងបានព្យាយាមទូរស័ព្ទទៅគាត់ជាញឹកញាប់ តែគាត់ឆ្លើយដោះសារថា អត់លុយមិនហ៊ានមកជួបមុខទេ ។ ដោយសារតែគ្មានជំរើសនាងក៏សំរេចចិត្តវិលត្រឡប់មកផ្ទះវិញ ទាំងមានផ្ទៃគ្មានប្ដីធ្វើឱ្យអ្នកស្រុកគេសើចចំអកមិនតិចនោះទេ ។

បន្ទាប់ពីសំរាលកូនស្រីបាន៦ខែ រស់នៅក្នុងជីវិតអស់សង្ឃឹម និងភាពអាម៉ាស់ផងនោះ ស្រាប់តែកម្លោះ ទូច ភឿន អតីតគូដណ្ដឹងត្រឡប់មកវិញ ធ្វើនាងមេម៉ាយមានការរំជួលចិត្តខ្លាំងណាស់ ហើយបង្ហូរទឹកភ្នែកមិនឈប់សោះ ។ នាងមេម៉ាយនោះបន្តថា ទឹកភ្នែករបស់នាងធ្វើឱ្យកម្លោះ ទូច ភឿន មានការអាណិតអាសូរ ហើយមិនប្រកាន់រឿងអតីតកាល ក៏សុខចិត្តរៀបការជាមួយនាងបន្តទៀត ។

អាពាហ៍ពិពាហ៍រវាងកម្លោះ ភឿន និងនាង សារ៉ាត់ នេះ កម្លោះក្នុងភូមិមួយចំនួនបានសើចចំអកយ៉ាងខ្លាំងថា កម្លោះ ភឿន ជាអាវែក ។

ប៉ុន្តែអ្នកស្រុកមួយចំនួនចាត់ទុកថា គឺជាគុណធម៌ដ៏ប្រពៃរបស់កម្លោះ ភឿន ដែលជួយស្រោចស្រង់ចំពោះជីវិតមនុស្សដូចគ្នា មិនប្រកាន់រឿងរ៉ាវអតីតកាល ៕

## ប្រជាពលរដ្ឋ៥ភូមិចង់...

អាចធ្វើដំណើរដោយរ ទេះ ម៉ូតូ កង់ បានទេ លុះត្រាតែប្រើទូក ឬក្បូន ទើបអាចធ្វើដំណើរដល់គោលដៅ គឺប្រើរយៈពេលយ៉ាងយូរ ។

លោក មឿន ម៉ៅ មេភូមិរលំរន្ធថ្មី បានឱ្យដឹងថា ប្រជាពលរដ្ឋក្នុងភូមិនេះមានជាង២០០ គ្រួសារ ដែលជាជនជាតិកួយរស់នៅទីនេះយូរយារណាស់មកហើយ គឺជួបការលំបាកខ្លាំងណាស់ណាគ្មានផ្សារ សាលារៀន ស្រះទឹក អណ្ដូងទឹក។ ជាពិសេសផ្លូវថ្នល់សំរាប់ធ្វើដំណើរប្រកបរបរចិញ្ចឹមជីវិតប្រចាំថ្ងៃ ក៏ដូចជាទៅតំបន់ផ្សេងៗឱ្យរហ័សទាន់ចិត្តដែរ ។

លោក មឿង ម៉ៅ បន្តថា អ្នកស្រុកដែលគ្មានផ្លូវដើរ ដូចជាភូមិរលំរន្ធថ្មី ភូមិភ្នំទៃ, ភូមិឫស្សីស្រុក, ភូមិស្ដាំកែប, ភូមិយាយរស់ ដែលមានប្រវែងប្រមាណ២៥គីឡូម៉ែត្រ ។ ផ្លូវនេះត្រូវតភ្ជាប់ពីចំណុចទំនប់ស្ពានបែតាប់ រហូតដល់ចំណុចប្រសព្វស្រែកណ្ដាលនៃខេត្តឧត្តមានជ័យ និងព្រះវិហារ ។

លោកមេភូមិរលំរន្ធថ្មី បានឱ្យដឹងថា បញ្ហាខ្វះផ្លូវសំរាប់ធ្វើដំណើរនេះ នៅរដូវវស្សាប្រជាពលរដ្ឋក្នុងភូមិ ក៏ដូចជានៅភូមិផ្សេងៗដែលរស់នៅតាមបណ្ដោយផ្លូវនេះជួបការលំបាកខ្លាំងណាស់ ។

ពួកគាត់ត្រូវចំណាយពេលជិតមួយថ្ងៃ ដើម្បីទៅទិញម្ហូបអាហារនៅឯផ្សារ ហើយក្នុងមួយអាទិត្យ ឬពីរអាទិត្យទើបទៅម្ដង ។ ការធ្វើដំណើរនោះ គឺជិះទូក ឬក្បូន ព្រោះផ្លូវលិចទឹកអស់មិនអាចជិះកង់ ឬម៉ូតូបានឡើយ ។

ដោយសារតែគ្មានផ្លូវនេះហើយ លោកបានបញ្ជាក់ថា បានបង្កលំបាកដល់កូនចៅអ្នកស្រុកដូចជា ពិបាកទៅសាលារៀន រហូតដល់ពេលនេះក្នុងភូមិរបស់លោកមានត្រឹមតែសាលាបឋមសិក្សាប៉ុណ្ណោះ ហើយគ្មានគ្រូបខណ្ឌទៅបង្រៀនទេ មានតែគ្រូចាត់តាំង ។ ក្រៅពីនេះ សូម្បីតែអណ្ដូងទឹក ស្រះទឹក មន្ទីរពេទ្យ ដែលជាតំរូវការចាំបាច់របស់ប្រជាពលរដ្ឋក៏គ្មានដែរ ។

លោក មឿង ម៉ៅ ក៏បានធ្វើការអំពាវនាវដល់រាជរដ្ឋាភិបាលអង្គការសង្គមស៊ីវិល សប្បុរសជនជិតឆ្ងាយទាំងក្នុង និងក្រៅប្រទេសមេត្តាជួយកសាងផ្លូវសំរាប់ពួកគាត់ធ្វើដំណើរនិងសមិទ្ធផលនានាផង។ ប្រជាពលរដ្ឋដែលរស់នៅតំបន់នោះ សព្វថ្ងៃកំពុងជួបការលំបាកខ្លាំងណាស់ ព្រោះសព្វថ្ងៃពួកគាត់គ្មានប្រកបរបរអ្វីក្រៅពីធ្វើការបន្តិចបន្តួចសំរាប់ចិញ្ចឹមជីវិតឡើយ ៕

# ហោរាសាស្ត្រប្រចាំខែ ឧសភា ថ្ងៃទី ០៨_២៥



## ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)

រាសីលោកអ្នកស្រុតចុះយ៉ាងខ្លាំង ។ បណ្ដាលឱ្យការងារ និងមុខជំនួញជួញដូរ ទាំងឡាយមានការរអាក់រអួល រយៈពេលនេះដែរ លោកអ្នកមានបញ្ហានេះមិនឈប់ឈរ ដូច្នេះចូរពិចារណាឱ្យបានល្អិតល្អន់មុនសំរេចចិត្តធ្វើអ្វីមួយ ។ លោកអ្នកនឹងអាចជួបវិបត្តិសេដ្ឋកិច្ចម្ដងហើយម្ដងទៀត ព្រោះរាល់ចំណូលទាំងពួងត្រូវខកខានទៅវិញ ។ ឯស្នេហាដែលធ្លាប់មានសុភមង្គលត្រូវកើតរឿងជម្លោះទាស់ទែងរវាងប្ដីប្រពន្ធ ក៏ដោយសារលុយកាក់នេះផងដែរ ។ ហើយរយៈពេលនេះសុខភាពលោកអ្នកមិនសូវល្អទេ ៕



## ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រយៈពេលនេះអារម្មណ៍លោកអ្នកមិននឹងនរឡើយ តែកិច្ចការងាររបស់លោកអ្នកនៅតែមានដំណើរការទៅមុខជារឿយៗ ។ ឯភ័ព្វសំណាងលុយកាក់របស់លោកអ្នកក៏បានមកដល់ដៃផងដែរ តែបញ្ហាសេដ្ឋកិច្ចនៅតែចោទឡើងដដែល ។ អំឡុងពេលនេះលោកអ្នកកើតមានរឿងរ៉ាវមិនចេះចប់ រវាងស្វាមី-ភរិយា រីឯសុខភាពវិញ អាចកើតមានជម្ងឺសើស្បែក ដូច្នេះត្រូវថែរក្សាផ្លូវចិត្ត និងសុខភាពផ្លូវកាយឱ្យបានល្អផង ៕



## ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់ការងារទាំងពួងដែលធ្លាប់រអាក់រអួលនោះ បែរជាមានសន្ទុះទៅមុខយ៉ាល្អប្រសើរ ដែលធ្វើឱ្យលោកអ្នកមានសង្ឃឹមសារជាថ្មីម្ដងទៀត រីឯបញ្ហាលុយកាក់ក៏បានកាក់កបផងដែរ លោកអ្នកអាចទទួលបានលុយកាក់ពីអ្នកចម្ងាយ តែកុំសប្បាយភ្លេចខ្លួនឱ្យសោះ ត្រូវជៀសឱ្យផុតពីវង់ល្បែងប្រយ័ត្នសល់តែសំបកខ្លួន ចំណែកស្នេហាវិញមានការរីកស្រស់បំព្រង ដូចបុប្ផាត្រូវទឹកសន្សើម ទាំងប្ដីប្រពន្ធកូនចៅបានជួបជុំគ្នាឡើងវិញ តែចូរប្រយ័ត្នសុខភាពឱ្យបានល្អផងដែរ ៕



## ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកល្អបង្គួរ ។ រាល់កិច្ចការងារទាំងពួងមានដំណើរការទៅមុខជារឿយៗ លោកអ្នកអាចមានភាពតឹងតែងដែលបណ្ដាលមកពីចៅហ្វាយនាយស្ដីបន្ទោសបន្តិចបន្តួច ។ រីឯបញ្ហាលុយកាក់នៅមានចាយវាយហូរហៀ តែកុំខ្ជះខ្ជាយ ។ ព្រោះពេលវេលានៅឆ្ងាយទៀត ទម្រាំសំណាងល្អឈានមកដល់ ។ ចំណែកចំណងស្នេហាគូស្វាមី-ភរិយា ក៏មានសុភមង្គលផ្អែមល្ហែមជាងពេលណាៗទាំងអស់លោកអ្នកអាចធ្វើដំណើរទៅកំសាន្តឆ្ងាយៗបានយ៉ាងសប្បាយ រីឯសុខភាពក៏មិនមានបញ្ហាអ្វីចោទដែរ ៕



## ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)

រាសីលោកអ្នកល្អបង្គួរ ។ រាល់ការងារផ្សេងៗ លោកអ្នកអាចទទួលបានជោគជ័យក៏ពិតមែនតែនឿយហត់បន្តិច ។ រយៈពេលនេះលោកអ្នកដូចជាធុញថប់តប់ប្រមល់ ដូច្នេះគួរសំរាកលំហែតែកុំលេងល្បែងស៊ីសង ព្រោះក្រែងជួបវិបត្តិសេដ្ឋកិច្ច រីឯចំណូលបានត្រឹម១០ តែចំណាយដល់ទៅ២០ឯណោះ ។ ចំណងស្នេហាដូចជាមានភាពផ្អែមល្ហែមជាងពេលមុនតែប្រយ័ត្នមានអ្នកទីបីចេញមុខមកកកូរកកាយក្នុងរង្វង់គ្រួសារលោកអ្នក ។ អំឡុងពេលនេះត្រូវថែរក្សាសុខភាពបន្តិចប្រយ័ត្នមានការឈឺថ្កាត់ ៕



## ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកល្អបង្គួរ ។ ចំពោះការងារផ្សេងៗមានសន្ទុះទៅមុខគួរឱ្យកត់សំគាល់ អំឡុងពេលសាកសមសំរាប់លោកអ្នកពង្រីកការងារ ឬមុខរបរថែមទៀតបាន ។ ចំណែកបញ្ហាលុយកាក់មានការរអាក់រអួលបន្តិច តែសំណាងល្អក៏វិលមកវិញ ដែលធ្វើឱ្យលោកអ្នកអាចទទួលបានលាភសក្ការៈមួយចំនួនធំផងដែរ ។ ឯចំណែកស្នេហាវិញទោះកំលោះក្រមុំ ឬស្វាមីភរិយា ក៏អាចទទួលបានភាពផ្អែមល្ហែមដូចៗគ្នា ឯសុខភាពលោកអ្នកល្អណាស់ក្នុងរយៈពេលនេះ ៕



## ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះយ៉ាងខ្លាំង ។ រាល់កិច្ចការផ្សេងៗដែលលោកអ្នកធ្លាប់គ្រប់គ្រងបែរជាផ្លាស់ប្ដូរអស់រលីង ឯការចុះហត្ថលេខាលើលិខិតស្នាមអ្វីមួយ ចូរពិចារណាឱ្យបានល្អិតល្អន់ជាមុនសិនជៀសវាងការកើតមានរឿងរ៉ាវផ្សេងៗ ។ ចំណែកបញ្ហាលុយដូចជាខ្សត់ខ្សោយបន្តិច ដូច្នេះត្រូវខិតខំប្រឹងប្រែងធ្វើការកុំសំចៃកំលាំងឱ្យសោះ ។ លោកអ្នកនឹងបានទទួលសុភមង្គលដ៏ផ្អែមល្ហែមពីចំណងស្នេហាតែកុំភ្លេចថែរក្សាសុខភាពឱ្យបានល្អ ៕



## ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងារ ឬមុខជំនួញជួញ ដូរមានការរីកចំរើនជឿនលឿនទៅមុខយ៉ាងល្អប្រសើរ តែចូរប្រុងប្រយ័ត្នរាល់ការចុះហត្ថលេខាលើឯកសារផ្សេងៗ មិនដូច្នេះអាចជួបនឹងផលវិបាកជាមិនខាន ។ ចំពោះបញ្ហាលុយកាក់អាចហូរចូលដោយមិនដឹងខ្លួន លោកអ្នកនឹងសប្បាយចិត្តជាខ្លាំង ព្រោះទាំងលុយ និងសុខភាព គឺគួរឱ្យទុកចិត្តបានតែបើលោកអ្នកដែលមានស្នេហាថ្មីថ្មោងអាចមានឧបសគ្គដែលបណ្ដាលមកពីចាស់ទុំទាំងសងខាង ៕



## ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អបង្គួរ ។ រាល់កិច្ចការងាផ្សេងៗដែលបានប៉ងប្រាថ្នាទុក នោះនឹងបានជោគជ័យជាមិនខាន តែក៏មានរឿងក្ដីក្ដាំមួយចំនួនដែលត្រូវដោះស្រាយ ព្រោះវាពាក់ព័ន្ធទៅនឹងឯកសារសំខាន់ៗដែលលោកអ្នកបានធ្វើដោយខ្វះការប្រុងប្រយ័ត្ននោះ ។ ចំពោះរឿងលុយកាក់វិញលោកអ្នកពិតជាមានសំណាងល្អណាស់ ព្រោះមានអ្នកឋានៈខ្ពស់ជួយផ្ដត់ផ្គង់ជាហូរហៀ រីឯសេចក្ដីស្នេហារបស់លោកអ្នកអាចមានរឿងប្រេះឆា ដូច្នេះចូប្រយ័ត្នពាក្យសម្ដី ចំណែកសុខភាពក៏មិនសូវល្អប៉ុន្មានដែរ ៕



## ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អបង្គួរ ។ រាល់ការងារដែលខ្លួនប្រាថ្នាចង់បាននោះ បានទទួលជោគជ័យ តែត្រូវប្រើសមត្ថភាព ឬថ្វីមាត់បន្តិចក្នុងរយៈពេលនេះ មិនត្រូវចូលហ៊ុនរកស៊ីគ្នាច្រើនឡើយ ព្រោះអាចនាំរឿងក្ដៅក្រហាយដល់ខ្លួនឯង ។ រីឯបញ្ហាលុយកាក់ដូចជាពិបាកបន្តិច ព្រោះបើបានពីក្អែកទៅចែកតាវៅ ។ បើជាស្វាមី-ភរិយាពិតជាមានសេចក្ដីសុខ តែបើកំលោះ-ក្រមុំ ពិតជាមានគូស្នេហ៍ចាស់វិលមករកទ្រនំដើម ដូច្នេះត្រូវសំរេចឱ្យបានល្អ រីឯបញ្ហាសុខភាពរបស់អ្នកមិនល្អបណ្ដាលមកពីជម្ងឺចាស់រើឡើងវិញ ៕



## ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកល្អបង្គួរ ។ រាល់ការងារផ្សេងៗដែលកំពុងដំណើរការចាប់ផ្ដើមអាចបានទទួលជោគជ័យគួរជាទីមោទនៈ ប៉ុន្តែសុខភាពផ្លូវចិត្តរបស់លោកអ្នកដូចជាពុំល្អសោះ ឆាប់មួម៉ៅឆេវឆាវ ចូរទប់ចិត្តឱ្យបានល្អផង ។ រយៈពេលនេះមិនត្រូវចូលក្នុងវង់ល្បែងឡើយ ព្រោះសំណាងលុយកាក់របស់លោកអ្នកមិនល្អទាល់តែសោះ ។ រីឯរឿងស្នេហាវិញមុននឹងសំរេចចិត្ត គួរគិតឱ្យបានល្អិតល្អន់បន្តិចដើម្បីកុំឱ្យមានវិប្បដិសារីទៅថ្ងៃក្រោយ ។ រីឯបញ្ហាសុខភាពល្អជាធម្មតា ៕



## ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កង្វល់ទាំងពួងបានរសាត់ផុត អស់ទៅហើយ ដូច្នេះរយៈពេលនេះអ្វីៗដែលបានមក គឺជាការជោគជ័យទាំងការងារ និងលុយកាក់ បើឱកាសមកដល់ដូច្នេះចូរខិតខំប្រមែប្រមូលទុកដាក់កុំខ្ជះខ្ជាយ ។ អំឡុងពេលនេះមុននឹងសំរេចចិត្តចុះហត្ថលេខាលើឯកសារផ្សេងៗត្រូវពិចារណាឱ្យល្អិតល្អន់បន្តិចក្រែងនាំផលវិបាកដាក់ខ្លួន ។ ចំពោះចំណងស្នេហាស្វាមី-ភរិយា ពិតជាមានសេចក្ដីសុខសាន្តជាខ្លាំង រីឯសុខភាពរបស់លោកអ្នកពុំមានបញ្ហាអ្វីឡើយ ៕

# the World's Most Powerful Anti-Aging Food

## ចំណីដែលទប់ទល់ជរាភាពដ៏ខ្លាំងជាងគេ ក្នុងលោក គឺទឹកផ្លែឈើ "គោជី " នៃព្រៃហេមពាន្ត

**FreeLife**

*The Himalayan Goji Company®*




### HIMALYAN GOJI Juice

ការសម្ងាត់នៃសុខភាពល្អរបស់ពួកអាស៊ីបានត្រូវរកឃើញ នារជ្ជកាលស្តេចតាំងឆ្នាំ ៨00 គ.ស ពលរដ្ឋនៃតំបន់មួយនៅព្រៃហេមពាន្តមិនព្រមចាស់-សក់ក៏មិនស-ធ្មេញក៏មិនបាក់-គេថា អ្នកស្រុកបានផឹកទឹកអណ្តូងមួយដែលមានដើម "គោជី "ដុះជុំវិញ គេស្មានថា មានវត្ថុសក្តិសិទ្ធអ្វីមួយជួយថែរក្សាពួកគេ ។
ទើបឥឡូវនេះ គេដឹកថា "គោជី " មានជីវជាតិពិសេសមួយឈ្មោះ POLYSACHARIOES ដែលពុំមាននៅផ្លែឈើឯណាទៀតសោះ ដែលជួយដល់ប្រព័ន្ធការពារខ្លួនរបស់មនុស្សបាន ។
បើចង់បានមកពិសារ www.forever.freelive.com
ឬក៏ទូរស័ព្ទលេខ : (267) 253-3947

SHARE THE SECRET

## TIME Magazine wrote :

" this year's breakout (Superfruit ) was the Himalayan Goji Berry , said to be A source of energy and longevity "
To order, please visit the website at : www.forever.freelive.com
Or please call (267) 253-3947 to order